សារព័ត៌មាន ខ្មែរផុស ស.រ.អា
# KhmerPost USA
E-mail: info@khmerpost.us / Website : khmerpost.us
Advertising: 978-656-8141/ Hotline news: 978-942-1641

Free

មាតិការរឿង **Issue 176 May 17th-31st. 2015**



**Office:** Tel: (978) 677-7163 Fax: (978) 677-7092
45 Merrimack St. Suite 218A Lowell, MA 01852



## បុណ្យពិសាខបូជានៅឡូវែលឆ្នាំនេះអធិកអធមខ្លាំង

## Over 800 people observed the Vesakha in Lowell

ដោយ: ស្តាយ បុណ្យ. រូបថត សមាគមខ្មែរ
កាលពីថ្ងៃសៅរ៍ ទី២ ខែឧសភា ឆ្នាំ២០១៥

តទៅទំព័រទី ៥

Lowell, MA: On Saturday, May 2, 2015, three Khmer temples in Lowell

Continued to Page 5



## វិចារណកថា

### ឃ្លុំមាត់អ្នកប្រឆាំង

ដោយ: ពិន សំខុន

ពិន សំខុន

ហ្គាលីឡេ អ្នកវិទ្យាសាស្ត្រខាងចក្រវាលនាសតវត្សទី១៦ បានរកឃើញដំបូង គេបង្អស់ថា «**ផែនដីវិលជុំវិញព្រះអាទិត្យ**» ក៏ប៉ុន្តែមេសាសនាកាតូលិក ពេលនោះជាអ្នកត្រួតត្រាលើអ្នក កាន់អំណាចប្រទេស បាន

តទៅទំព័រទី ៤

### SILENCE THE OPPONENTS!

By Samkhon Pin

Galileo Galilei, who was an Italian astronomer, physicist, mathematician, engineer, and philosopher, of the 16th Century, was the first person to discover- that Th earth orbits around the sun. However the Catholic Church leader ordered him beheaded after he was accused of having denounced Jesus Christ with his findings. Jesus Christ never mentioned that the earth rotated.

Continued to Page 4

# ចៅក្រមខ្មែរដំបូងបង្អស់ចូលរួមទិវាកេរ ដំណែលអាស៊ី_ប៉ាស៊ីហ្វិកនៅក្រុងឡូវែល

ដោយៈ ស្វាយ បុណ្យ

កាលពីថ្ងៃទីសុក្រ ទី៨ ខែឧសភា សារព័ត៌មាន **ខ្មែរប៉ុស ស.រ.អា** បានរៀបចំប្រារព្ធទិវាកេរដំណែលជនជាតិអាមេរិក ដើមកំណើតអាស៊ី-ប៉ាស៊ីហ្វិក ដែលរៀបចំធ្វើនៅក្រុងឡូវែល ។

លោកឌីក ហាវ ជាពិធីករជាភាសាអង់គ្លេស លោក តុលា យុទ្ធ ជាភាសាខ្មែរ បានដឹកនាំកម្មវិធីប្រកបដោយបច្ចេកទេសខ្ពស់ធ្វើឱ្យភ្ញៀវចាប់អារម្មណ៍ខ្លាំង លោកបានអញ្ជើញ សូបិន នឹង រ៉ដ្ឋ័រ សំខុន ពិន មកបើកកម្មវិធីពន្យល់ពីបុព្វហេតុដែលរៀបចំកម្មវិធីទទួលទិវាកេរ្តិ៍ដំណែលអាស៊ី-ប៉ាស៊ីហ្វិកនេះឡើង ។ បន្ទាប់មកអ្នកទាំងពីរ ក៏អញ្ជើញលោក រ៉េតនី អេលីយ៉ុត អភិបាលក្រុង មកសម្តែងការទទួលស្វាគមន៍ភ្ញៀវកិត្តិយសទាំងអស់ដែលមកចូលរួមកម្មវិធីនារាត្រី សម្រាប់អាស៊ី-ប៉ាស៊ីហ្វិកនេះ ។

លោកស្រី ម៉ូរ៉ា ហ៊ីលី ជាអគ្គរដ្ឋអាជ្ញាអាមេរិក ប្រចាំរដ្ឋម៉ាស្សាឈូសេត បានចូលរួមក្នុងកម្មវិធីនេះផងដែរ ។ លោកស្រីជាសមាជិកខាងគណៈបក្សប្រជាធិបតេយ្យមានវត្តមានក្នុងកម្មវិធីនេះផងដែរ ។ លោកស្រីបានមានប្រសាសន៍ថា អំពីកិច្ចការរបស់អគ្គរដ្ឋអាជ្ញា ដែលជួយតស៊ូមតិ ដើម្បីការដោះស្រាយបញ្ហានានា ក្នុងសង្គមដូចជា បញ្ហាគ្រឿងញៀន បងធំបង តូចបញ្ហាយុវជនគ្មានការងារធ្វើ ។ល។

លោកស្រីបានបន្តរថ្លែងអំណរគុណដល់កាសែត**ខ្មែរប៉ុសស.រ.អា**. ដែលបានជឿជាក់ដល់បេក្ខភាពលោកស្រីកាលពីឆ្នាំមុនថា កាសែតខ្មែរប៉ុសជាកាសែតដំបូងបង្អស់ដែលបានប្រកាសគាំទ្របេក្ខភាពលោកស្រី មុននឹងកាសែតឯទៀតៗធ្វើតាមជាក្រោយ ។

លោកចៅក្រម លីម ម៉េង ជាចៅក្រមខ្មែរដំបូងគេដែលបានជាប់ឆ្នោតជាចៅក្រមក្នុងតុលាការជាន់ខ្ពស់ក្នុងរដ្ឋជរចា ។ ថ្លែងក្នុងទិវាកាលពីថ្ងៃសុក្រ ទី៨ ខែឧសភា លោកចៅក្រម លីម ម៉េង

**តទៅទំព័រទី ៧**





ម៉ូរ៉ា ហ៊ីលី ជាអគ្គរដ្ឋអាជ្ញាអាមេរិក រដ្ឋម៉ាស្សាឈូសេត



លីម ម៉េង ជាចៅក្រមតុលាការជាន់ខ្ពស់រដ្ឋជរចា

# Powerful Speeches at KhmerPost USA Gala

By Richard P. Howe Jr.

The KhmerPost USA Gala celebration of Asian-American Heritage Month featured three powerful speeches from three individuals with impressive credentials. Massachusetts Attorney General Maura Healey made her remarks first. She first thanked the Cambodian community of Lowell in helping her win election to the office of Attorney General last fall. She especially thanked the KhmerPost USA which was the first newspaper in all of Massachusetts to endorse her candidacy. Now that she is in office, Healey assured everyone that she will make the Attorney General's office the "people's law firm" by emphasizing things like safe and affordable housing for tenants, fair dealings with banks for homeowners, and streets safe from gun violence and drug addiction.

The second speaker of the evening was the Honorable Meng Lim, a Superior Court Judge from the state of Georgia who spent ten years as the County Attorney (the "District Attorney" in Massachusetts). Judge Lim was born in Cambodia but escaped with his family to America. He said that only 0.4% of the population of his county in Georgia is Asian (that is all Asian, not just Cambodians) so he was delighted to be in the presence of so many Cambodians here in Lowell and to experience the cultural dances that were part of the Gala Program. Judge Lim strongly urged all in attendance to vote in every election, saying that the only way to make the community stronger and better is for everyone to participate as voters.

The third speaker was U.S. Army Staff Sergeant VeasnaRoeun, a combat veteran of the war in Afghanistan who is now in the Connecticut National Guard. Sergeant Roeun emphasized the importance of joining together as a team to pursue common objectives, urging people not to let individual desires stand in the way of the common good. He said those are the lessons he learned in the United States Army and that they are lessons that apply to life in the community, as well.











# REMEDIUM PHARMACY



2 VINAL Square
N. Chelmsford, MA 01863

Phone: (978) 251-7070

## FREE Daily Home Delivery

**Blisterpack Packaging**

**Friendly Consultations**

**Compounded Medications**

**Easy Transfers**

បុគ្គលិកទាំងអស់របស់ឱសថស្ថានរីមីឌីមយើងខ្ញុំមានបទពិសោធន៍គ្រប់គ្រាន់ក្នុងការបំរើសេវាផ្តល់ឱសថជូនដល់សហគមន៍ខ្មែរ។ គេទាំងអស់គ្នាបានត្រៀមរួចជាស្រេចដើម្បីជួយ និង ត្រៀមបំរុងជានិច្ច ដើម្បីប្រើគ្រប់ជំនាញ និងការពិសោធន៍ក្នុងការបំរើលោកអ្នក។

ឱសថស្ថានរីមីឌីម ផ្តល់ជូនលោកអ្នកនូវៈ

**ជូនឱសថឲ្យដល់លំនៅស្ថានដោយឥតគិតថ្លៃ**
**ដាក់ៅឱសថក្នុងបន្ទះបែងចែកឱសថសំរាប់ប្រើតាមពេល**
**ការពិគ្រោះយោបល់យ៉ាងរាក់ទាក់ស្និទស្នាល**
**មានផ្តល់ជូនម្សៅថ្នាំលាយ**
**ភាពងាយស្រួលក្នុងការផ្ទេរចេញចូល**






**Cristina គ្រីស្ទីណាៈ**
គ្រីស្ទីណាមានការពិសោធន៍គ្រប់គ្រាន់នៅក្នុងកិច្ចការបំរើសហគមន៍ខ្មែរក្រុងឡូវែលអស់រយៈពេលជាង៣ឆ្នាំមកហើយ។អ្នកស្រីគឺជាឱសថការិនីដែលគ្រប់គ្រងឱសថស្ថាន រីមីឌីម នេះ ហើយគាត់ក៏អាចធ្វើការពិគ្រោះអំពីឱសថ ជូនលោកអ្នកដល់ផ្ទះផងដែរ។ ដោយសារការផ្តល់នូវសេវាកម្មផ្នែកឱសថនេះ បានច្បាស់លាស់ទើប អ្នកស្រីអាចបង្កើត បាននូវចំណងមិត្តភាពយ៉ាងល្អប្រពៃក្នុងសហគមន៍ខ្មែរក្នុងក្រុងឡូវែល ហើយអ្នកស្រីមានសេចក្តីរីករាយណាស់ដើម្បីរង់ចាំបំពេញនូវបំណងរបស់លោកអ្នកដែលត្រូវការឱសថ។



**Kelly ខែលលីៈ**
គឺជាឱសថការិនីយើងដែលអាចនិយាយភាសាខ្មែរហើយដែលយកចិត្តទុកដាក់ចេះជួយលោកអ្នក។ គាត់ជាឱសថការិនី ចេញពីមហាវិទ្យាល័យឱសថសាស្រ្តរដ្ឋម៉ាសាឈូសេត និង ពេញចិត្តធ្វើការបំរើសហគមន៍ខ្មែរដែលគាត់ក៏ជាសមាជិកម្នាក់នៃសហគមន៍នេះដែរ។



**Pahim លោកប៉ាហ៊ីមៈ**
គឺជាបុគ្គលម្នាក់ដែលមានការគោរពច្រើននៅក្នុងសហគមន៍ខ្មែរ គាត់ក៏ជាសមាជិកម្នាក់នៅក្នុងគណកម្មការវត្តត្រៃរតនារាម ហើយធ្លាប់មានការពិសោធន៍ជាច្រើនឆ្នាំក្នុងការជួយសហគមន៍ដែលត្រូវការព្យាបាលជម្ងឺ។ ក្នុងរយៈកាលកន្លងមក គាត់ធ្លាប់បានធ្វើការយ៉ាងច្រើនជួយគាំទ្រដល់អ្នកជម្ងឺនៅមជ្ឈមណ្ឌលសុខភាពសហគមន៍ក្រុងឡូវែលនិងមណ្ឌលសុខភាពពេទ្យមេត្តាព្រមទាំងធ្លាប់បានចូលរួមចំណែកក្នុងការថែទាំដោយឱសថសំរាប់សហគមន៍ខ្មែរក្រុងឡូវែលអស់រយៈពេលជាង២ឆ្នាំផងដែរ។ ក្នុងនាមជសមាជិកម្នាក់នៃឱសថស្ថានរីមីឌីម គាត់នឹងបន្តធ្វើការបំរើឱ្យកាន់តែខ្លាំងខ្លាថែមទៀតដើម្បីបំពេញនូវតំរូវការក្នុងការផ្តល់ឱសថដល់លោកអ្នក។



**Daniela ដានីញែលឡាៈ**
មានជំនាញច្បាស់លាស់ក្នុងការវេចខ្ចប់ឱសថដាក់ក្នុងបន្ទះពង្រាយថ្នាំសំរាប់ប្រើតាមពេលហើយធ្លាប់ឆ្លងកាត់ការថែទាំអ្នកជម្ងឺខ្មែរដែលរស់នៅក្នុងក្រុងឡូវែលនេះអស់រយៈពេលជាង៣ឆ្នាំមកហើយ។ ប្រសិនបើលោកពេញចិត្តនឹងការប្រើថ្នាំដាក់ក្នុងបន្ទះបែបនេះ ដានីញែលឡាពេញចិត្តណាស់នឹងធ្វើកិច្ចការនេះជូនលោកអ្នក។



**Dary ដារីៈ**
តែងបានយកចិត្តទុកដាក់ជាប់ជានិច្ចក្នុងសេវាកម្មផ្តល់ឱសថ ដើម្បីបំពេញតាមតំរូវការនៃសហគមន៍ខ្មែរក្រុងឡូវែលអស់រយៈជាង២ឆ្នាំមកហើយ ហើយតែងទទួលបាននូវការកោតសរសើរពីសំណាក់អតិថិជនដែលបានជួបបាប្រស័យជាមួយគាត់។ ក្នុងឋានៈជាអ្នកបច្ចេកទេសម្នាក់របស់ឱសថស្ថាន គាត់មានការយល់ដឹងយ៉ាងជ្រៅជ្រះអំពី តំរូវការ និងប៉ិនប្រសប់ក្នុងការផ្តល់សេវាជូនលោកអ្នកនិងចេះសំដែងនូវការគោរពយ៉ាងទន់ភ្លន់ចំពោះលោកអ្នកផងដែរ។



**Kassandraកាសាន់ដ្រាៈ**
គឺជាបុគ្គលិកដែលមានការពិសោធន៍ច្រើនក្នុងការធ្វើទំនាក់ទំនងជាមួយសហគមន៍ខ្មែរ និងស្បានិសសដែលរស់កក្នុងងក្រុងឡឡូវែលលនេះ។
លោកអ្នកអាចនឹងពេញចិត្តអំពីភាពរាក់ទាក់រាល់ពេលនិយាយឆ្លើយឆ្លងតាមទូរស័ព្ទជាមួយនាង និងប៉ិនប្រសប់ក្នុងការរៀបចំឱសថជូនលោកអ្នកនៅរាល់ពេលដែលលោកអ្នកត្រូវការ។

# បោះឆ្នោតគណបក្សសង្គ្រោះជាតិនៅឡូវែល

ដោយៈ ពិនសំខុន

សមាជិក សមាជិកាគណបក្សសង្គ្រោះជាតិ ចំនួន១៣៥នាក់ បានធ្វើការបោះឆ្នោតដ៏មានភាពចម្រូងចម្រាសមួយ ដើម្បីជ្រើសរើសប្រធានថ្មីរបស់ខ្លួន កាលពីថ្ងៃទី១០ឧសភា២០១៥នេះ នៅភោជនីដ្ឋានសំពៅមាស។ ប្រធានចេញពីដំណែង គឺលោក ខាំ ស៊ីនួន ដែលបានកាន់ដំណែងជាប្រធានរដ្ឋគណបក្ស សម រង្ស៊ី រួចមកជាប្រធានសហរដ្ឋអាមេរិកនេះអស់រយៈពេល៥ឆ្នាំ បេក្ខជនឈរឈ្មោះបន្តដំណែងមាន២រូប គឺលោក ឆាន ទូច អាយុ៤៧ឆ្នាំ និង លោក វណ្ណៈ ម៉ែន អាយុ៤១ឆ្នាំ អ្នកទាំងពីរសុទ្ធតែជាមនុស្សមានកេរ្តិ៍ឈ្មោះ និងមានប្រជាប្រិយភាពក្នុងសហគមន៍ ច្រើនឆ្នាំមកហើយ។ គណកម្មការបោះឆ្នោតដឹកនាំដោយលោក អ៊ុង រីទ្ធី អមដោយសមាជិក៧រូបទៀត។ បន្ទាប់ពីបោះឆ្នោតចប់ លោក អ៊ុង រីទ្ធី ប្រកាសលទ្ធផល បាន៨៣សម្លេងទៅ វណ្ណៈ ម៉ែន ទៅ៥៣សម្លេងបានទៅ ឆាន ទូច សន្លឹកឆ្នោតមិនបានការ២សម្លេង តែលោក ឆាន ទូចប្រកាសមិនទទួលស្គាល់លទ្ធផលនៃការបោះឆ្នោតនេះទេ ដោយសំអាងថា មានការកៀងគរមនុស្សដែលថ្មីមិនមានឈ្មោះក្នុងបញ្ជីពីមុនមកឱ្យមកបោះឆ្នោតក្នុងគណបក្សដែរ។


លោក ឆាន ទូច លោក វណ្ណៈ ម៉ែន




ជួបសម្ភាសន៍ជាមួយលោក វណ្ណៈ ម៉ែន សួរថា លោកទទួលដំណែងជាប្រធានបក្សនៅរដ្ឋម៉ាសាឈូសិតហើយមែនទេ? វណ្ណៈ តបថា "នៅទេ! ពីព្រោះយើងត្រូវជជែកគ្នាឱ្យស្រួលបួលសិន យើងបានព្រមព្រៀងគ្នាថាបើនរណាម្នាក់ទៀតជាប់ជាប្រធានត្រូវយកម្នាក់ទៀតជាអនុប្រធាន ខ្ញុំនឹកថាទំនាស់នឹងបានត្រូវបញ្ចប់ហើយ។ ស្រាប់តែបោះឆ្នោតចប់បែរជាមានការណ៍មិនទទួលស្គាល់ការបោះឆ្នោតទៅវិញ ខ្ញុំមិនឃើញថាមានលួចបន្លំសន្លឹកឆ្នោតអីទេ ហើយអ្នកមកបោះឆ្នោតទាំងអស់ រាប់ទាំងអ្នកមកពីឆ្ងាយៗ ពីរដ្ឋផ្សេងសុទ្ធតែសមាជិកសកម្មរបស់បក្សទាំងអស់ ..."

តាមពិតទៅ ភាពចម្រូងចម្រាសនេះ ជាជំងឺចាស់ធ្លាប់មានប្រវត្តតាំងពីជាង២ឆ្នាំហើយ នៅពេលដែលគណបក្សសង្គ្រោះជាតិ បានប្តូររចនាសម្ព័ន្ធរួមគ្នា ចេញពីបក្សដាច់គ្នានៃគណបក្សសិទ្ធិមនុស្សនឹងគណបក្ស សម រង្ស៊ី មក។ ក្រុម USA ជាក្រុមថ្មីដែល ការគ្រប់គ្រងនៃគណបក្សសង្គ្រោះជាតិនៅស.រ.អា.នេះមានសកម្មភាពជាមួយមេដឹកនាំសង្គ្រោះជាតិថ្មីជារៀងរហូតមក រីឯក្រុមមួយទៀតឈ្មោះ គ.ស.ជ. (North America Or NA) គឺជាអតីតគណបក្ស សម រង្ស៊ី ឆ្លងមករជ្ជកាលគណបក្សសង្គ្រោះជាតិ តែមិនបានរំលាយខ្លួន នៅរក្សារចនាសម្ព័ន្ធចាស់ជារៀងរហូតដែរ គ្រាន់តែមិនមានសកម្មភាពអ្វីធំដុំទេ។ តែទោះជាយ៉ាងនេះក្តី ក្រុមទាំង២បានខិតខំលាក់បាំងទំនាស់នៃការគ្រប់គ្រងជា២ក្រុមនេះ ដោយការចរចារមួយកាលពី២សប្តាហ៍មុន ដើម្បីរកដំណោះស្រាយរួមមួយ គឺការបោះឆ្នោតរួមជាមួយគ្នានេះ តែជាអកុសល ការខ្វះខាតបច្ចេកទេសបោះឆ្នោត ក៏បានទម្លាយនូវរឿងអាស្រូវផ្ទៃក្នុងនេះឡើងបានដដែល។

លោក ឆាន ទូច បានកោតសសើរដល់ គួរ

តទៅទំព័រទី ២៩

តមកពីទំព័រទី ១

## ឃ្លុំមាត់អ្នកប្រឆាំង...

បញ្ជាឱ្យចាប់ហ្គាលីឡេ យកទៅកាត់ក្បាល ពីព្រោះតែនិយាយបរិហាព្រះយេស៊ូគ្រីស្ត ព្រះអង្គមិនដែលមានព្រះបន្ទូលថា «**មានផែនដីវិលម្តងណានោះទេ**» នៅពេលពេជឃាដរៀបនឹងប្រហារជីវិត ហ្គាលីឡេបានធ្វើការ សុំទោសជាសាធារណៈថា «**សុំទោសដល់ទាំងអស់គ្នា ដែលខ្ញុំបាន និយាយថាផែនដីយើងវិល តាមពិតផែនដីមិនមានវិលទេ**» ពេជឃាដ្ឋក៏ដោះលែង ហ្គាលីឡេវិញទៅ តែនៅពេលចេញទៅក្រៅ ហ្គាលីឡេនិយាយម្នាក់ឯងថា «**បើទោះជាខ្ញុំបានសុំ ទោសក៏ដោយ ក៏ផែនដីនៅតែវិលតែដដែល**» តាំងពីពេលនោះមកដល់សព្វថ្ងៃ ប្រជាជនពិភពលោកនៅចងចាំការពិតមួយ ដែលថាផែនដីនៅតែវិល ជុំវិញព្រះអាទិត្យ តែមិនបានចងចាំការសុំទោសនោះទេ។ ដូចគ្នានឹងថ្មីៗនេះ លោក សម រង្ស៊ី មេបក្សប្រឆាំងបានផ្តើមឃ្លុំមាត់ខ្លួនឯង បញ្ឈប់ការទិតៀន ពេលដើរត្រូតពលជាមួយលោក ហ៊ុន សែន បច្ចុប្បន្នជានាយករដ្ឋមន្ត្រី ដែលទាមទារឱ្យ លោក សម រង្ស៊ី ប្រាប់ទៅលោក កឹម សុខា អនុប្រធានឱ្យធ្វើដូចលោកដែរ ឈប់ហៅលោក ហ៊ុន សែន ថា «**ជាមេកុម្មុយនិស្ត មេផ្តាច់ការ**»។ លោក សុខា ធ្លាប់បរិយាយជាសាធារណមុននេះបន្តិចថា «**នឹងដាក់ជណ្តើឱ្យលោកហ៊ុន សែនចុះពីអំណាច បើនៅតែមិនចុះទេ នឹងទាញទម្លាក់**»ចំពោះប្រយោគ នេះលោក ហ៊ុន សែន បានតបទៅវិញថា «**សំណាងល្អហើយដែលលោកឯងបានត្រឹមតែនិយាយ តែបើជាបានធ្វើទៅវិញ គឺថ្ងៃនោះហើយជាថ្ងៃខួបបុណ្យខ្មោចលោកឯង**»។ លោក ហ៊ុន សែន ដែលមិនចង់បានងារជា មេកុម្មុយនិស្ត មេផ្តាច់ការ តែបានសារភាពពេញមាត់សម្រាប់ប្រមាថជីវិតលោកសុខា មិនតែប៉ុណ្ណោះទេ លោកសារភាពថា ធ្លាប់បានបញ្ជាទាហ៊ានឱ្យផ្តាច់ជីវិតកម្មករ ជីវិតបាតុករ រួមទាំងជីវិតប្រជាពលរដ្ឋខ្លួនឯង អស់ជាច្រើននាក់រួចទៅហើយពីអតីតកាល បើទោះជាលោកសុខា មិនបានហៅឱ្យចំឈ្មោះក៏ដោយ ក៏គុណសម្បត្តិប្រឡាក់ដោយឈាមនេះ បានចារុក្នុងដួងចិត្តកូនខ្មែរអ្នកបោះឆ្នោតទៅហើយ ពុំមែនការហាមឃាត់មិនឱ្យហៅងាររបស់គាត់ បានន័យថាពលរដ្ឋ នឹងភ្លេចបាត់ទៅហើយនោះទេ។

**តើមេបក្សសង្គ្រោះជាតិចាំបាច់នឹងឃ្លុំមាត់ខ្លួនឯង ដើម្បី ហ៊ុន សែន ធ្វើអ្វី?** សម រង្ស៊ី- កឹម សុខា បានបញ្ចៀសការសម្លាប់រង្គាលមួយ ខកខានមិនបានយកចុងឆ្នាំ២០១៣ ជាខួបបុណ្យសពរបស់ពួកគាត់ ជាកាយវិការដំបូងប្រកបដោយសម្បជញ្ញៈថ្លៃថ្លាបំផុត ស្មើរបុរសមហាត្មៈគន្ធី... រីឯអ្នកពូកែ រង់ចាំតែយកជីវិតអ្នកដទៃគឺជាគំរូរបស់ហ៊ីត្លែ ជាឡេនីន ជាហូជីមិញ ដែលមានប៉ុលពត-

តទៅទំព័រទី ២២

Continued from page 1

## SILENCE THE OPPONENTS!...

Galileo Galilei was brought to the execution site. The moment be he was executed he made his public apology. He asked everyone to excuse him for stating that the Earth orbited the Sun. He said the Earth actually did not orbit the Sun. His apology was accepted. He was spared and freed. When leaving the execution site Galileo Galilei talked to himself that even though he apologized the Earth would always orbit the Sun. The historical fact that the Earth orbits the Sun is well remembered by the world, but not Galileo Galilei's apology.

Likewise recently Mr. Sam Rainsy the leader of the opposition party has started to silence himself. He has refrained from criticizing Hun Sen who has demanded Mr. Sam Rainsy to tell Mr.KemSokha, the deputy opposition leader , to tone down his rhetoric and stop labelling the ruling CPP as "communist" and him as a Dictator.Mr.Kem Sokha used to make a threat to build a ladder for Mr. Hun Sen to use to stand down or for the opposition to shake if he refused.

Mr. Hun Sen recently responded that Mr.KemSokha was lucky that he didn't build that ladder or shake it. If he did, this time would be the anniversary of Mr.Sokha's death.Mr. Hun Sen who doesn't wish to be called a communist or dictator has publicly threatened to kill Mr.Sokha. On top of that he has admitted that he holds power and not only command the military but also created the military whose members have killed several workers, protesters and his own people.

Though Mr.Sokha may tone down his rhetoric, Hun Sen's reputation has already been badly tainted with bloods and violence. Average Cambodians and voters will never fail to remember Hun Sen as the worst leader.

Why does the CNRP need to silence itself for Hun Sen?

Sam Rainsy and KemSokha managed to save Cambodians from a foreseeable bloodshed in late 2013 when they decided not pursuit further mass demonstration against the fraudulent National Election results. They have proven to be the great leaders with great conscience and humanity. They are among the great leaders of all time including Mahatma Gandhi. They are unlike Hun Sen who is good at killing his own people. He is now among the infamous leaders of all time including Adolf Hitler, Vladimir Lenin, Ho Chi Minh and Pol Pot. Hun Sen who is so hungry for power will them sooner or later.

The CNRP always values the

Continued to Page 22

## តមកពីទំព័រទី ១ បុណ្យពិសាខបូជានៅឡូវែលឆ្នាំនេះអធិក...

កន្លងទៅនេះ វត្តពន្លឺពុទ្ធចក្ក វត្តត្រៃរតនារាម និងវត្តខ្មែរសាមគ្គីសន្តិរាម(**អតីតវត្តក្រោម**) បានធ្វើពិធីដង្ហែបុណ្យពិសាខបូជារួមមួយ ដែលមិនធ្លាប់មានពីមុនមក នៅជុំស្ថានីយ៍រថភ្លើង ដោយមាន-បងប្អូនខ្មែរប្រុសស្រី ចាស់ក្មេងចូលរួមដង្ហែជាង ៨០០ នាក់។

បុណ្យពិសាខបូជា ប្រារព្ធដើម្បីរម្លឹកព្រះសក្យមុនីសម្មាសម្ពុទ្ធទ្រង់ប្រសូត្រ,ទ្រង់បានបរមាភិសម្ពោធិ,ទ្រង់រលត់ខន្ធចូលកាន់បរិនិព្វានក្នុងថ្ងៃតែមួយ គឺថ្ងៃទី៦ ខែឧសភា ថ្ងៃពេញបូណ៌មីខែពិសាខ។ ថ្ងៃនេះ ជាថ្ងៃសំខាន់បំផុតក្នុងប្រតិទិនចន្ទគតិខាងពុទ្ធសាសនា។ ឆ្នាំនេះបុណ្យវិសាខបូជាប៉ះចំថ្ងៃទី ៤ ខែ ឧសភា។

ក្នុងពិធីដង្ហែនេះត្រូវចំណាយពេលជិត ៤០ នាទី ដោយហែចេញពីវត្តពន្លឺពុទ្ធចក្កបត់ឆ្វេងតាមផ្លូវ Hale Street រួចបត់ឆ្វេងតាមផ្លូវ Thorndike Street បង្ហួសកាត់តាមមុខស្ថានីយ៍រថភ្លើង និងដើរកាត់ផ្លូវ Chelmsford Street រហូតបានគម្រប់មួយជុំ។ ព្រះសង្ឃ ដូនជី តាអាចារ្យ និងពុទ្ធបរិស័ទគ្រប់ទិសទីចូលរួមដង្ហែពិធីនេះទាំងចិត្តត្រេកអរ។ ប៉ូលិសក្រុងឡូវែលបានបើករថយន្ត និងម៉ូតូនាំផ្លូវ។ អ្នកធ្វើដំណើរតាមរថយន្តបានឈប់ និង អ្នកឈរក្បែរផ្លូវបានបក់ដៃអបអរសាទរគ្រប់គ្នា។

សម្លេងអនុមោទនា និងសាធុ! សាធុ! សាធុ! ឮកងរំពងមិនដាច់សូរ។ អ៊ំចាស់ៗមួយចំនួនដែលដើរមិនរួច បានអង្គុយលើរទេះរុញ ឱ្យកូនចៅរុញដង្ហែមួយជុំនឹងគេដែរ។ មើលទៅទឹកមុខរបស់ពួកគាត់ សុទ្ធតែពោរពេញដោយភាពញញឹម និងក្នុងចិត្តពោរពេញដោយសទ្ធាជ្រះថ្លាក្នុងការចូលរួមពិធីប្រចាំសាសនាព្រះពុទ្ធដ៏អធិកអធមនេះ។

យើងសង្ឃឹមថាឆ្នាំក្រោយៗតទៅមុខទៀតនឹងការធ្វើពិធីដង្ហែបុណ្យពិសាខបូជាឱ្យបានល្អដូចឆ្នាំនេះ ឬ កាន់តែអធិកអធមជាងនេះ៕




Continued from page 1

## Over 800 people observed the Vesakha in...

jointly observed the Vesakha. Over 800 people of Lowell marched from the Glory Buddhist Temple at 2 pm to mark the anniversary of Buddha's birth and death.

Bangladesh, Bhutan, India, and the South East Asian countries of Philippines, Singapore, Vietnam, Thailand, Cambodia, Laos, Malaysia, Myanmar and Indonesia, and other places all over the world.



Vesskhais also known as Buddha Purnima and Buddha Day, is a holiday observed traditionally by Buddhists on different days in Sri Lanka, Nepal, Tibet, Sometimes informally called "Buddha's Birthday", it actually commemorates the birth, enlightenment, and death of Gautama Buddha.

# "ដំណើរឆ្ពោះទៅទិសខាងត្បូង"

ដោយៈ ថាច់វណ្ណា

**ឯប្រទេសចាម្ប៉ាវិញក៏មានវាសនាដូចកម្ពុជាក្រោមដែរៈ**



Tiến trình Nam Tiến của dân tộc Việt

ប្រទេសចាម្ប៉ាសព្វថ្ងៃហៅថាៈ ភូមិភាគកណ្ដាល(Mien Trung) ត្រូវរងគ្រោះក្រោមការឈ្លានពានរបស់ស្ដេចយួនលើកទី១នៅឆ្នាំ១០២១, លើកទី២ឆ្នាំ១០២៦ លើកទី៣ឆ្នាំ១០៤៦ លើកទី៤ឆ្នាំ១០៦៩, សម័យស្ដេច ដាយ-វៀត (គឺវៀត-ណាមសព្វថ្ងៃ)ឈ្មោះ លី ថាញ់ តុង (Ly´ Tha´nh Tông) ឈ្មោះពិតគឺៈ លី ញឹត តុង (Lý Nhat Tôn) បានវាយចូល ប្រទេសចម្ប៉ា សម្លាប់ប្រជារាស្ដ្រចម្ប៉ា ៣០,០០០នាក់, រួចចាប់បានស្ដេចចម្ប៉ាឈ្មោះ រុទ្រៈវម្ម៌ ទី៣ និងទ័ព ៥០,០០០នាក់បញ្ជូនទៅស្រុកដាយ-វៀត, ស្ដេចចាមក៏បានសុំចុះចាញ់រួចបានប្រគល់ ៣ ខេត្តភាគខាងជើងឱ្យទៅប្រទេសដាយ-វៀត នាពេលនោះ។

បន្តការឈ្លានពានលើកទី៥នៅឆ្នាំ១៣០១, ស្ដេចដាយ-វៀតឈ្មោះ ត្រឹង ញ៉ឹន តុង (Tr`n Nhn Tong:) បានរៀបអាពាហ៍ពិពាហ៍នយោបាយលើកទី១ ដោយលើកកូនស្រីឈ្មោះ វៀន ត្រឹន (Huyen Tran) ឱ្យស្ដេចចាមឈ្មោះ ជយសិម្ហវម្ម័ទី៣ធ្វើជាអគ្គមហេសី មាននាមថាៈ បរមេក្ខរ៉ារី, សំណូមពរ ឱ្យស្ដេចចាមប្រគល់ឱ្យដី ២ខេត្តភាគខាងជើងគឺៈខេត្តអូ និងខេត្តលី, ទុកជាចំណងដៃ, រហូតដល់ឆ្នាំ១៣០៦,ស្ដេចចាមក៏បានយល់ព្រមប្រគល់ខេត្តទាំង២ (មុននិងក្រោយមកទល់ពេលនេះគឺ៥ខេត្ត)ឱ្យទៅដាយ-វៀត្ប បន្ទាប់មកបាន១ឆ្នាំស្ដេចចាមក៏បានស្លាប់ទៅ, ស្ដេច-ដាយ-វៀតក៏បានប្រើឱ្យ ត្រឹន ខាក់ចុង (Trâ`n Khac Chung) ទៅធ្វើពុតជាចូលរួមពិធីបុណ្យសព, ហើយក៏បានរកល្បិចរំដោះកូនស្រីស្ដេចដាយវៀត យកវិលត្រឡប់មកស្រុកវិញនៅឆ្នាំ១៣០៧ រីដី២ខេត្តជាចំណងដៃនោះ, ដាយ-វៀត មិនបានសងមកប្រទេសចម្ប៉ាវិញទេ។

បន្តការឈ្លានពានលើកទី៦, នៅថ្ងៃទី២១ ខែមីនា, ឆ្នាំ១៤៧១, ស្ដេចដាយ-វៀតឈ្មោះឡេ ថាញ់ តុង (Lê Tha´nh Tông) ដោយយកមូលហេតុតាមបង្គ្រាប់ពួកបះបោរតែ ការពិតពួកយួនបានសម្លាប់ពូជសាសន៍ចាមប្រមាណ៦០.០០០នាក់ និងចំនួន៣០.០០០ នាក់ធ្វើជាទាសករ,ដុតកំទេចទីក្រុងវិជ័យ, ចាប់ស្ដេចចាមឈ្មោះ ពោកប្បាស យកទៅធ្វើទារុណកម្ម រហូតបាត់បង់ជីវិត, រួចក៏បានលើកបុត្រារបស់ស្ដេចពោកប្បាស ឈ្មោះ ស្យាពោឡឹង ឡើងគ្រងរាជ្យបន្តក្រោមការគ្រប់គ្រងរបស់ប្រទេសដាយ-វៀត និងកាន់កាប់តំបន់វិជ័យ ភាគខាងជើងនៃប្រទេសចម្ប៉ា សព្វថ្ងៃហៅថាៈបិញដិញ និង ក្វាងង៉ាយ(Bi`nh Đinh, Quan Ngai) ពួកចាមដែលនៅសេសសល់ក៏ នាំគ្នារត់មករស់នៅភាគខាងត្បូងក្នុងតំបន់ជ្រោះកូម៉ុង,បន្តធ្វើការតស៊ូប្រឆាំងនិងទ័ពយួនអស់រយៈពេល១៦០ឆ្នាំ ចាប់តាំងពីឆ្នាំ១៤៧១-១៦៣១ ដើម្បីស្វែងរកដំណោះស្រាយបញ្ហាសង្គ្រាមរវាងចាម-វៀត ទើបមានការរៀបចំអាពាហ៍ពិពាហ៍នយោបាយជាលើកទី២នៅឆ្នាំមមែ១៦៣១ ស្ដេចយួន ង្វៀន ភុក ង្វៀន (Nguyn Phu´c Nguyn) បានលើកកូនស្រីឈ្មោះ ង្វៀន ភុក ង៉ុក ខ្វា (Nguyn Phu´c Ngoc Khoa) ត្រូវជាប្អូនស្រីរបស់ម្ចាស់ក្សត្រី ព្រាចចក្រ វដ្ដី (ឈ្មោះពិតៈ Nguyên Phu´c Ngoc Van ) ជាអគ្គមហេសីនៃព្រះបាទ ជ័យជេដ្ឋាទី២នៅឯប្រទេស កម្ពុជានាពេលនោះ, (**ក្នុងសម័យយុគអន្ធកាល**) នេះក៏ជាឱកាសល្អសម្រាប់ប្រទេសដាយវៀត បញ្ជូនប្រជារាស្ដ្រយួនឱ្យចូលមកនៅលើដែនដីចម្ប៉ា និងប្រទេសកម្ពុជាផងដែរ។

ដើម្បីរកវិធីបញ្ជូនប្រជារាស្ដ្រមកលើដែនដីចម្ប៉ា និងកម្ពុជាឱ្យបានឆាប់ទាន់ចិត្ត ប្រទេសដាយវៀតក៏បានបន្តសង្គ្រាមផ្ទៃក្នុងរវៀង ត្រកូលអភិជន ត្រីញ និងង្វៀន (Trinh-Nguên) ហេតុនោះប្រជារាស្ដ្រដាយ-វៀតមានមូលហេតុគ្រប់គ្រាន់ដើម្បីធ្វើដំណើរទៅទិសខាងត្បូង, ចូលមកសុំស្នាក់នៅក្នុងប្រទេសចម្ប៉ានិងកម្ពុជាបានយ៉ាងស្រួល ព្រោះអគ្គមហេសីនៃស្ដេចទាំងពីរប្រទេសនេះក៏ជាបុត្រីនៃស្ដេចដាយ-វៀត ង្វៀនភុកង្វៀនផងដែរ, រហូតដល់ឆ្នាំ ១៦៧៧, ប្រទេសដាយ-វៀតបានចែកចេញជា ពីរភាគខាងជើងប្រគល់ឱ្យស្ដេចត្រីញ (Trinh:) កាន់កាប់, រីឯភាគខាងត្បូងប្រគល់ឱ្យស្ដេច ង្វៀនៈ (Nguyên)កាន់កាប់, សង្គ្រាមផ្ទៃក្នុងក៏បានបង្អាក់ ជាបណ្ដោះអាសន្ន ស្ដេច ត្រីញ ភាគខាងជើងក៏ បានបែរចុងអាវុធទៅសម្លាប់ត្រកូលអភិជន **"ម៉ាក"** (Mac)នៅកាវបាំង (Cao Ba`ng) ឆ្នាំ ១៦៧៧សម្លាប់ត្រកូល វូ(Vu)នៅត្វៀង-ក្វាង (Tuyen Quang)នៅឆ្នាំ១៦៩៩ភាគឦសាននៃ ប្រទេសដាយ-វៀត។

ពេលផ្អាកសង្គ្រាមផ្ទៃក្នុង ស្ដេចង្វៀនភុក ចូ (Nguyên Phu´c Chu )ក៏បានបើកការវាយលុកចូលមកក្នុងប្រទេសកម្ពុជានៅខែមិនា ឆ្នាំ១៦៩០, ចាប់បានស្ដេចខ្មែរនិងព្រះរាជវង្សានុវង្សទាំងអស់ក្នុងរាជកាលជ័យជេដ្ឋាទី៣នៃព្រះចៅពញាសូរ យកទៅឃុំខាំងនៅ**"សាយក្កន"**សព្វថ្ងៃហៅថាៈយ៉ា-ដីញៈ (Gia Đinh[3]) ប្រទេស



ដាយ-វៀតធ្វើទុកទារុណកម្មរហូតបាត់បង់ជីវិតស្ទើរតែដាច់ពូជរាជវង្សខ្មែរនាពេលនោះ ទើបលើកអ្នកម្នាងទៃឡើងគ្រងរាជ្យនៅឆ្នាំ១៦៨៨។ បន្ទាប់មក នៅខែសីហា ឆ្នាំ១៦៩២ ស្ដេច ង្វៀន ភុកចូ ក៏បានវាយលុកចូលប្រទេសចម្ប៉ា ចាប់បានស្ដេចចាមឈ្មោះ ពោសត្យៈនិងរាជវង្សានុវង្សបញ្ជូនទៅស្រុកយួនដាក់ពន្ធនាគារនៅផូស្វឹង (Phu´ Xuân) នៅឆ្នាំ ១៦៩៣ ធ្វើទារុណៈកម្មរហូតបាត់បង់ជីវិត រួចក៏បានលើកស្ដេចថ្មីឈ្មោះ ជ័យក្រីព្រៃ ជាព្រះអនុជស្ដេច ពោសត្យៈឡើងគ្រងរាជ្យជំនួសបន្ត ពេលនោះស្ដេចយួនឈ្មោះ ង្វៀន ភូក ចូ (Nguyên Phu´c Chu:) ក៏បានគម្រៀមឱ្យស្ដេចថ្មីដែលគេបានបន្តបឡើងឱ្យចុះហត្ថលេខាលើសន្ធិសញ្ញា៥ខ ទុកជាកិច្ចព្រមព្រៀងសន្តិភាពរវៀងចាម និងវៀតណាមនៅឆ្នាំ១៧១២។

**តើសព្វថ្ងៃកិច្ចព្រមព្រៀងសន្តិភាពនោះនៅឯណាទៅ?**

ប្រទេសកម្ពុជាពេលនោះក៏មានវាសនាដូចប្រទេសចម្ប៉ាដែរ ពេលដែលព្រះចៅពញាសូ និងម្ចាស់អង្គនន់ទី២ បានសោយទីវង្គត់ក្នុងពន្ធនានៅ **"សាយក្កន"** ស្ដេចដាយ-វៀតក៏បានបញ្ជូន បុត្រារបស់អង្គនន់ទី២ ទ្រង់នាមអង្គអ៊ុមទី១, ពីប្រទេសដាយ-វៀតមកគ្រងរាជ្យក្នុងរាជកាល កែវ ហ៊្វាទី៣, ឆ្នាំ១៦៩៩, ជាស្ដេចឋិតនៅក្រោមបញ្ជាពីប្រទេសដាយ-វៀតជាបន្តបន្ទាប់, ក្រោយមកនៅឆ្នាំ១៧១១-១៧១៤, សង្គ្រាមដណ្ដើមរាជអំណាចក្នុងប្រទេសកម្ពុជាក៏បានកើតឡើងរវាងអង្គអ៊ុមទី១ និងធម្មរាជាទី៣, អង្គធម្ម ក៏បានទៅពឹង សៀម, រី អង្គអ៊ុម ក៏បានរត់ទៅពឹងយួនដាយ-វៀត, ប្រទេសកម្ពុជាស្ថិតក្នុងអស្ថេរភាពជិត២០០ឆ្នាំ តាំងពីឆ្នាំ១៦៧៤រហូតដល់ឆ្នាំ១៨៤០ ក្រោមការឆ្លាតវៃនៃព្រះបាទអង្គឌួងបានយកប្រទេសខ្មែរដាក់ក្រោមខ្សែការពានៃប្រទេសបារាំង ទើបទប់ស្កាត់បានពីការលុកលុយរបស់ប្រទេសសៀម និងដាយវៀត។

ស្ថានភាពនៃប្រទេសចម្ប៉ា និងកម្ពុជានាពេលនោះ, មិនខុសគ្នានិងស្ថានភាពនៃប្រទេសកម្ពុជាយើងសព្វថ្ងៃនេះទេ, តើរបបប្រល័យពូជសាស្ដ្រអ្នកណាជាអ្នកបង្កើតឡើង? ដើម្បីអ្វី?

**(មានបន្តនៅលេខក្រោយ)**

## តមកពីទំព័រទី ០២ ចៅក្រមខ្មែរដំបូងបង្អស់ចូលរួមទិវាកេរ...

សម្តែងភាពរំភើប ដែល បានជួបបងប្អូនខ្មែរ ដ៏ច្រើន បែបនេះ។ អ្វីដែលលោក ចៅក្រម ចាប់អារម្មណ៍ ដំបូងគេ គឺការសម្តែង របាំខ្មែររបស់ក្រុមរបាំ អង្គរ។ លោកថា មួយជីវិត លោក មិនដែលបាន ឃើញការសម្តែងសិល្បៈដ៏ អស្ចារ្យដូច្នេះទេ។ នារាត្រី នោះខ្មែរផុសបាន បង្ហាញជូននូវរបាំខ្មែរបី មានរបាំជូនពរ របាំក្ងោក ពោធិសត្វ នឹងរបាំស្វា ព្រមទាំងរបាំឡាវមួយ ឈ្មោះរបាំជូនពរឡាវ។

តាមរយៈរបាំ និងអារ្យធម៌ដ៏រុងរឿងរបស់ ខ្មែរ លោក លឹម ម៉េង និយាយថា ពិភពលោក មិនគប្បីមើលឃើញប្រទេសខ្មែរ ថាជាវាលពិឃាត នោះទេ។ លោកថា បងប្អូនខ្មែរដែលភៀសខ្លួន មក នៅសហរដ្ឋអាមេរិក សុទ្ធតែហែលឆ្លងទុក្ខ វេទនា និងការលំបាកសព្វបែបយ៉ាងទម្រាំមាន ថ្ងៃនេះ។ ដូច្នេះ លោកលើកទឹកចិត្តឱ្យបងប្អូន ទាំងអស់ នាំគ្នាចូលរួមឱ្យបានច្រើនកុះករ ក្នុងជីវ ភាពនយោបាយ។ លោកចង់ឃើញបងប្អូនខ្មែរ ចូលរួមក្នុងការបោះឆ្នោតផ្សេងៗដើម្បីប្រយោជ ន៍ និងភាពខ្លាំងនៅក្នុងសហគមន៍ខ្មែរ។

លោករៀបរាប់អំពីខ្សែជីវិត ការតស៊ូទម្រាំ មានថ្ងៃនេះ។ លោកថា កាលពីដំបូងលោកចូល ធ្វើការបានប្រាក់តែមួយម៉ោង ៣.៥ដុល្លារ ប៉ុណ្ណោះ។ ពេលនៅសាលា លោកមិនដែលហ៊ាន ចេញលេងនឹងគេទេ ដ្បិតលោកគ្មានប្រាក់ ដើម្បី ចំណាយសម្រាប់ទិញអាហារសម្រន់។ លោកថា លោករស់អាស្រ័យការចែកទាន ជាសម្លៀក បំពាក់ពីអ្នកដទៃ ដើម្បីលោកបានស្លៀកពាក់ សមរម្យនឹងគេ។ ប៉ុន្តែលោកបន្តតស៊ូ និងទទួលបាន ជោគជ័យជាបន្តបន្ទាប់។ការតស៊ូ និងភាពជោគ ជ័យក្នុងជីវិតរបស់លោកចៅក្រម លឹម ម៉េង បានបណ្តុះគំនិតឱ្យយុវជន និងមនុស្សខ្មែរ-អាមេរិកដទៃទៀត យកធ្វើជាគំរូ និងរៀនសូត្រ តាម។

លោកចៅក្រម លឹម ម៉េង កើតនៅប្រទេស កម្ពុជា នៅមុនរបបខ្មែរក្រហមបន្តិច។ លោក បាត់បង់បងប្រុសបង្កើតម្នាក់ និងជីដូនបង្កើត ម្នាក់ក្នុងរបបខ្មែរក្រហម។ មិនខុសពីកុមារខ្មែរ ដទៃទៀត លោកត្រូវពួកខ្មែរក្រហមបង្ខំឱ្យធ្វើ ពលកម្ម ដោយត្រូវធ្វើការតាំងពីព្រឹកព្រលឹមទល់ ព្រលប់។ ក្រុមគ្រួសាររបស់លោក បានរត់ភៀស ខ្លួនទៅកាន់ប្រទេសថៃជាងមួយឆ្នាំ និងប្រទេស ឥណ្ឌូនេស៊ី រយៈពេល៦ខែ មុននឹងបានមកប្រទេស អាមេរិក។ ពេលមកដល់អាមេរិក លោករស់នៅ រដ្ឋ ជរចា ដោយសារម្តាយរបស់លោករកបានការ ងារធ្វើនៅព្រះវិហារសាសនាគ្រីស្តមួយ។ លោក ចៅក្រម បានរៀនចប់សាលាច្បាប់។ ពេលរៀន ចប់លោករកការងារបានធ្វើជាមួយចៅក្រមនៅក្នុង មូលដ្ឋានរបស់លោក។ ក្រោយមក លោកបាន បង្កើតការិយាល័យមេធាវីខ្លួនឯង។ ដោយការខិតខំ


ពលបាល រឿន វាសនា ថតជាមួយ គ្រីស្ទីនា អេពយូ និងសុបិន្ត គិន

ប្រឹងប្រែងជួយសហគមន៍ នៅទីបំផុតលោកត្រូវ ពលរដ្ឋនៅសហគមន៍លោកបោះឆ្នោតជាចៅក្រម ខ្មែរលើកដំបូង នៅតុលាការជាន់ខ្ពស់នៃរដ្ឋ ជរចា។

ចំណែកឯលោកពលបាល រឿន វាសនា ក្នុង ឯកសណ្ឋានកងទ័ពយ៉ាងសង្ហាបានមានប្រសាសន៍ អំពីការតស៊ូ និងភាពជោគ ជ័យក្នុងអាជីពរបស់ លោក។ លោកបានបង្កើត មូលនិធិរូបរួមខ្មែរ ដើម្បី លើកកម្ពស់ និងថែរក្សាវប្បធម៌ខ្មែរ និង ជួយផ្តល់ធនធានដល់សហគមន៍។ លោកបានរៀប រាប់អំពីការមើលឃើញនូវទុក្ខវេទនា និងភាព ក្រីក្ររបស់ពលរដ្ឋខ្មែរនៅប្រទេសកម្ពុជា ក្នុងអំឡុង ពេល លោកទៅធ្វើបុណ្យសព្វឪពុករបស់លោក។ លោកឃើញភាពខ្លោចផ្សាររបស់ពលរដ្ឋខ្មែរ ដែលត្រូវ អាជ្ញាធរខ្មែរបណ្តេញចេញពីលំនៅ ដ្ឋាន។ លោក តាំងចិត្តខិតខំធ្វើកិច្ចការ ដើម្បីជួយ ដល់សហគមន៍ ខ្មែរនៅអាមេរិក និងនៅប្រទេស កម្ពុជា។

លោកពលបាល រឿន វាសានា មានដើម កំណើតនៅខេត្តបាត់ដំបង បានភៀសខ្លួនមករស់


ពលបាលឯក រឿន វាសនា

នៅអាមេរិកនៅដើមឆ្នាំ១៩៨០ ជាមួយនឹងក្រុម គ្រួសារ។ បន្ទាប់ពីរៀនចប់វិទ្យាល័យ លោកបាន ចូលធ្វើជាទាហានអាមេរិក ក្នុងអង្គភាពកងថ្មើរ ជើង។ លោកបានបន្តបម្រើកងទ័ពអស់រយៈពេល ១០ឆ្នាំ និងបានឡើងឋានៈជាពលបាលនៃកង អនុសេនាតូច។ លោកបានបំពេញបេសកកម្មនៅ ប្រទេស បូស្នី និង អាហ្គានីស្ថាន។ ក្រោយពី ឈប់ធ្វើទាហាន លោកបានរៀនចប់ថ្នាក់បរិញ្ញ ប័ត្រផ្នែកគ្រប់គ្រងយុត្តិធម៌ និងច្បាប់ នៃសាកល វិទ្យាល័យ Western Connecticut State University។

ក្នុងរាត្រីនោះដែរ លោក ស្រី គ្រីស្ទីណា អេពយូ នាយកឱសថាល័យ រីម៉េឌាម ជាអ្នក គាំទ្រកម្មវិធីកីឡាតមាស បានឡើងថ្លែងថា... "យើង មកជួបជុំគ្នានៅទីនេះ ដើម្បីចូលរួម និងផ្តល់តម្លៃ ដ៏ខ្ពស់ដល់វប្បធម៌អាស៊ានអាមេរិកកាំង..."។

ក្នុងរាត្រីដ៏សែនមនោរម្យនោះ ភ្ញៀវកិត្តិ យសទាំងអស់មានជា អាទិ៍ រ៉ែតនី អេលីយ៉ុត អភិបាលក្រុង កូរី បាឡិន ជ័រ នឹង ប៊ីល សាមារ៉ា ជាទីប្រឹក្សាសាលាក្រុង ជីម ឡេរី គណកម្មការ សាលាក្រុម អ្នកតំណាង Sponsors ថ្នាក់ដឹកនាំ នៃសហគមន៍នៅឡូវែល បានស្តាប់យ៉ាងជក់ ចិត្តនូវសាច់រឿង និងភាពជោគជ័យ នៃជនជាតិ ខ្មែរអាមេរិកាំង និងបានទទួលទានអាហារយ៉ាង ឆ្ងាញ់ពិសា រួមនឹងបានរាំកំសាន្តយ៉ាងសប្បាយ រហូតដល់យប់ជ្រៅ។

**ចំណាប់អារម្មណ៍របស់ការយាល័យនិពន្ធ:**
នារាត្រីដ៏មានអត្ថន័យសម្រាប់កេរដំណែលអាស៊ុ-ប៉ាស៊ីហ្វិក សម្រាប់តំបន់នៃរដ្ឋម៉ាសាឈូសិត អវត្ត មានគ្មាន បុព្វហេតុដ៏គួរឱ្យកត់សំគាល់ គឺសមាគម ខ្មែរមិនមានបញ្ជូនដំណាងមកទេ។ អវត្តមានដែល មានបុព្វហេតុ ក៏មានអតីតក្រុមប្រឹក្សាសាលាក្រុង ខ្មែរលោក អ៊ុង រីទ្ធី នឹងមិត្រភ័ក្តិយើងដឹងថា លោកបានធ្វើពហិការមិនចូលរួម ពីធីនេះ ដោយ សារមានតំណាងគណបក្សប្រជាជន មកធ្វើជាពីធី ករនៅទីនោះលោក អ៊ុង រីទ្ធី ជា ថ្នាក់ដឹកនាំគណបក្ស សង្គ្រោះជាតិ។ កាលពីឆ្នាំ មុន២០១៤ នាខែ ដដែល លោក អ៊ុង រីទ្ធី បាន បង្កើតទិវាដូចគ្នានេះ នៅ១សប្តាហ៍ក្រោយពី **ខ្មែរផុសស.រ.អា.** ប្រារព្ធ ពីធីរំលឹកកេរដំណែលវប្បធម៌អាស៊ុ-ប៉ាស៊ុហ្វិក


គ្រីស្ទីនា អេពយូ


ពិធីករដឹកនាំដោយ ទិក ហាវ និង តុលា យុទ្ធ

# សហគមន៍ខ្មែរក្រុងឡូវែល បោះឆ្នោតរើសយករូបជនភៀសខ្លួន និងអង្គរវត្ត

ដោយៈ ស្គាយ បុណ្យ

នៅថ្ងៃសៅរ៍ ទី ៩ ខែ ឧសភា វេលាម៉ោង ១២ កន្លះ ដល់ ម៉ោង ៣ កន្លះ គណៈកម្មាធិការសាងសង់បូជនីយស្ថានខ្មែរនៃទីក្រុងឡូវែល ដែលមានលោកអភិបាលក្រុង រ៉តនី អ៊ុល្បៀត ជាអធិបតី បានរៀបចំពិធីតាំងបង្ហាញរូបភាពតាមរចនាបទខ្មែរ សម្រាប់ឱ្យបងប្អូនខ្មែរក្នុងសហគមន៍ មានឱកាសបោះឆ្នោតជ្រើសរើសយករចនាបទមួយដែលខ្លួនពេញចិត្ត ដើម្បីយកទៅឆ្លាក់សង់ជាបូជនីយស្ថាន ដាក់នៅក្នុងបរិវេណសាលាក្រុងឡូវែល។ បូជនីយស្ថាននេះ ជានិម្មិតរូបសហគមន៍ខ្មែរ។



ទិដ្ឋភាពរាប់សន្លឹកឆ្នោតនៅវត្តពន្លឺពុទ្ធចក្រ

ការផ្តល់ឱកាសឱ្យពលរដ្ឋខ្មែរ មានសិទ្ធិចូលរួមធ្វើសេចក្តីសម្រេចចិត្ត លើគម្រោងនានាដែលមានផលប៉ះពាល់ដល់សហគមន៍ខ្លួន គឺជាគោលការណ៍គ្រឹះនៃអភិបាលកិច្ចល្អ ក្នុងស្មារតីលើកស្ទួយលទ្ធិប្រជាធិបតេយ្យ តម្លាភាព ការចូលរួម ការផ្តល់តម្លៃដល់ពលរដ្ឋម្ចាស់ខ្មែរជាម្ចាស់ឆ្នោត និង ភាពសុខដុមរមនានៅក្នុងសហគមន៍ខ្មែរ។

រចនាបទទាំងបីមាន ទី ១ រូបស្ត្រីជនភៀសខ្លួន ដែលកំពុងឈរបីទារក ដើរបណ្តើរបំបៅដោះកូនបណ្តើរ និងមានកូនប្រុសស្រីតូចៗនៅឈរជាប់ខ្លួន កំពុងដើរហាលភ្លៀង ភៀសខ្លួនចេញពីសង្គ្រាម ដោយមានរូបបាយ័ននៅបង្កប់ខាងក្រោយ។ រចនាបទទី១ នេះជាស្នាដៃរបស់លោក យ៉ារី លីវណ្ណ។ ចំណែកឯរចនាបទទី២ ជាស្នាដៃលោក ខឹម ចន្ថា មានរូបជនភៀសខ្លួនប្រុសស្រីចាស់ក្មេងចម្រុះ និងមានរូបប្រាសាទអង្គរវត្តនៅខាងក្រោយ។ រចនាបទទី៣ មានរូបស្ត្រីជនភៀសខ្លួនកំពុងទូលបង្វិច ដើរកាត់ភ្លៀង ជាស្នា

តទៅទំព័រទី ១០



# ឆ្លើយទៅលោកនិងលោកតំណាងរាស្ត្រ លិម គិមយ៉ា

**ដោយគណបក្សសង្គ្រោះជាតិប្រទេសបារាំង**

យើងខ្ញុំដែលមានរាយនាមខាងក្រោម មានការភ្ញាក់ផ្អើលជាខ្លាំង ដោយឃើញលោក Lim Kim-Ya ដែលជាតំណាងរាស្ត្រមណ្ឌលខេត្តកំពង់ធំ របស់គណបក្សសង្គ្រោះជាតិ កំពុងតែធ្វើយុទ្ធនាការ វាយប្រហារមួលបង្កាច់ ថ្នាក់ដឹកនាំគណបក្ស ជាពិសេសលើរូបលោកប្រធាន សម រង្ស៊ី អត់ឈប់ឈរជាសាធារណៈ។

ជាក់ស្តែង ដូចអត្ថបទខាងក្រោម ចុះផ្សាយនៅថ្ងៃទី៣០ ខែមេសា ឆ្នាំ២០១៥ គាត់បានលើកឡើងថា លោកប្រធាន សម រង្ស៊ី ជាមេភូតភរ ហើយផ្សព្វផ្សាយព័ត៌មានបំភាន់មតិមហាជនថា លោកប្រធាន សម រង្ស៊ី លោក គួយ ប៊ុនរឿន និងលោក អេង ឆៃអ៊ាង មានពាក់ព័ន្ធនឹងរឿងពុករលួយធ្ងន់ធ្ងរ ជាមួយគណបក្សប្រជាជន។

ទង្វើបែបនេះ យើងខ្ញុំមិនអនុគ្រោះឱ្យបានទេ ហើយសង្ឃឹមថា គណបក្សសង្គ្រោះជាតិនឹងយកករណីនេះទៅពិចារណាហើយចាត់វិធានការណាមួយ ដើម្បីទប់ស្កាត់កុំឱ្យមានមនុស្សបែបនេះ ឬលើកទឹកចិត្តអ្នកដទៃទៀតបន្តសកម្មភាពមួលបង្កាច់ បំបែកបំបាក់គណបក្សតទៅទៀត។

យើងខ្ញុំសូមរំលឹកថា វប្បធម៌សន្ទនា គឺជាយុទ្ធសាស្ត្រមួយរបស់គណបក្សសង្គ្រោះជាតិ ដើម្បីបញ្ចប់សង្គ្រាមជាស្ថាពរ និងទប់ស្កាត់ប្រើអំពើហិង្សា នាពេលបោះឆ្នោតក្រោយៗខាងមុខទៀត។

យុទ្ធសាស្ត្រនេះ បានសម្រេចដោយលោកប្រធាន សម រង្ស៊ី និងលោកអនុប្រធាន កឹម សុខា ព្រមទាំងមានការគាំទ្រពីថ្នាក់ដឹកនាំគណបក្សទាំងអស់។

ដូច្នេះ បើលោក Lim Kim-Ya មិនយល់ស្របនឹងសេចក្តីសម្រេចនេះទេ គាត់មានសិទ្ធិបញ្ចេញមតិ ជាលក្ខណៈប្រជាធិបតេយ្យតាមរយៈស្ថាប័ននានារបស់បក្ស។ មិនគួរយកមកហែកហួរ យ៉ាងអនាធិបតេយ្យរបៀបនេះទេ។

ហេតុដូច្នេះ យើងខ្ញុំយល់ថា លោក Lim Kim-Ya មានជម្រើសតែពីរគត់:

**១.** ត្រឡប់មកសង្ងំនៅស្រុកបារាំងវិញ រង់ចាំមើលតើយុទ្ធសាស្ត្ររបស់បក្សនឹងបានជោគជ័យ ឬអត់ ជាជាងនៅរំខានដល់បងប្អូនយើងកំពុងតែតស៊ូនៅក្នុងស្រុក។

**២.**លាលែងពីគណបក្សសង្គ្រោះជាតិតែម្តង ព្រោះតាមតែយើងខ្ញុំធ្លាប់ស្គាល់និងដឹងច្បាស់ លោក Lim Kim-Ya ក៏មិនដែលបានជួយ ឬធ្វើអ្វីឱ្យរីកចម្រើនដល់គណបក្សឡើយ ទាំងនៅស្រុកបារាំង ក៏ដូចនៅប្រទេសកម្ពុជា។

**ធ្វើនៅប៉ារីស ថ្ងៃទី៣ ខែឧសភា ឆ្នាំ ២០១៥**

Sok Sophath, Lim Sreng, Khauv Michel, Thuch Rattana, Peng MunySara, Suon Chhayphorn, Prum Roth, Buth Thierry, Chhim Ratha, Hang Chan Vannak, Lim Vuthya, Seng Saraun, Prom Bol, Sok Vincent, Ros Sariny,Seng Horl, Seng Chen An, Sakou Samoth, Tith Huon, Thai Makarar, Suon Narith, Vann Vanarin, Ung SamOk, Hel Lora

## អត្ថបទ លោក លិម គិមយ៉ា បកប្រែក្រៅផ្លូវការ ពីភាសាបារាំង

**វប្បធម៌សន្ទនា មានហានិភ័យ...ដល់ស្លាប់**

ជាមួយលោក សម រង្ស៊ី និងលោក ហ៊ុន សែន បានបរិហារឱ្យដឹងតាមការថ្លែងចុងក្រោយរបស់ ហ៊ុន សែន។ ការបរិហាររបស់ ហ៊ុន សែន ទាក់ទងនឹងគំរោងច្បាប់ការលើកលែងទោសថ្នាក់ដឹកនាំចាស់ គឺជាបំណងរបស់លោក សម រង្ស៊ី។ ប៉ុន្តែលោក សម រង្ស៊ី បាននិយាយថាគឺលោក ហ៊ុន សែន ទេដែលបានសុំទៅលោក។ តើអ្នកណាជាអ្នកភូតកុហកក្នុងរឿងនេះ? ដូចជារឿងប្រាក់ ២០លានដុល្លារ ដែលលោកហ៊ុនសែនបានប្រកាសពីថ្ងៃ៨សីហា២០១៤ជាពាក្យចរចាមអារាមថា លោកគួយ ប៊ុនរឿន និង អេង ឆៃអ៊ាង ជាមួយ សម រង្ស៊ី បានទទួលពីបក្សប្រជាជនកម្ពុជា។ គ្មាននរណាម្នាក់សួរទេ ហើយលោក ហ៊ុន សែន បានប្រកាសភ្លាមថាគ្មានខ្វល់ ដែលធ្វើឱ្យអល់ឯកដល់អ្នកដទៃ។ ដូចគ្នានេះដែរ លោក សម រង្ស៊ី ក៏គ្មានខ្វល់ឆ្លើយទៅអ្នកកាសែតដែររឿងនេះ។ គ្មានអ្វីបន្ថែមទេ។ ក្នុងរឿងនេះខ្ញុំមិនជឿទេ ព្រោះភោគទ្រព្យ ប្រទេសបានត្រូវក្រុមបក្សប្រជាជនកម្ពុជាដណ្តើមយក។ លើសពីនេះ ហ៊ុន សែនបានប្រកាស ថាខ្លួនគ្មានលុយទេនៅពេល នោះទោះបីជាខ្លួនមានបំណងនឹងឱ្យក៏ដោយ។ សំនួរដែលសួរថាតើបក្សប្រជាជនកម្ពុជាបានឱ្យ២០លានដុល្លារ ដល់លោកទាំង៣នាក់នេះឬទេ? បើទេ ត្រូវបដិសេធមិនត្រូវទុកសេចក្តី សង្ស័យនេះដល់យុទ្ធិកៈឬមតិសាធារណៈឡើយ។ ហើយហ៊ុនសែនអាចនឹងទាញយកប្រយោជន៍។

តមកពីទំព័រទី ០៨

## សហគមន៍ខ្មែរក្រុងឡូវែល បោះឆ្នោតរើស...

ដែរបស់លោក សុឃឿន ប៉ូត ។

មានបងប្អូនខ្មែរប្រុសស្រីចាស់ក្មេង ៣០៦ នាក់បានទៅចូលរួមបោះឆ្នោត ។ ជាលទ្ធផលសន្លឹកឆ្នោតគាំទ្ររចនាបទទី ១ មាន ៤១ សម្លេង រចនាបទ ទី ២ មានសម្លេងគាំទ្រ ២០៦ សម្លេង និង រចនាបទទី ៣ មានសម្លេងគាំទ្រ ៥៩ សម្លេង ។

ក្នុងពេលកំពុងរាប់សន្លឹកឆ្នោត ដែលមានមន្ត្រីសាលាក្រុងឡូវែលពីរនាក់ជាអ្នករាប់ ព្រះសង្ឃខ្មែរពីរអង្គគង់ចាំសង្កេតការណ៍ ។ បងប្អូននៅក្នុងសហគមន៍ខ្មែរជាច្រើនទៀត ជួយឃ្លាំមើលដំណើរការរាប់សន្លឹកឆ្នោតនេះផងដែរ ។

ដំណើររាប់សន្លឹកឆ្នោត និងការប្រកាសលទ្ធផលបោះឆ្នោត ប្រព្រឹត្តទៅបានត្រឹមត្រូវ និងទទួលអាចទទួលយកបាន ។

ព្រះភិក្ខុ វិជ្ជាសម្បន្នោ ឈួម សំបូ ដែលគង់ជាសាក្សីក្នុងពេលរាប់សន្លឹកឆ្នោត មានសង្ឃដីកាសាទរលទ្ធផលបោះឆ្នោតនេះ ។ ព្រះអង្គមានព្រះទ័យសោមនស្ស ដែលបានឃើញបងប្អូនខ្មែរ ចូលរួមសាមគ្គីគ្នា ដើម្បីបោះឆ្នោតជ្រើសរើសបូជនីយស្ថានខ្មែរមួយ សម្រាប់សហគមន៍ខ្មែរទាំងមូល ។

ទោះជាមានការផ្សព្វផ្សាយតាមវិទ្យុ និងទូរទស្សន៍ខ្លះក្តី ក៏បងប្អូនខ្មែរមួយចំនួនមានការភាន់ច្រឡំចំពោះការបោះឆ្នោតជ្រើសរើសរចនាបទបូជនីយស្ថាន ដែលផ្តួចផ្តើមឡើងដោយសាលាក្រុងឡូវែលនេះ ។ ពួកគាត់ស្មានថា ការបោះឆ្នោតនេះ គឺជាការបោះឆ្នោតជ្រើសរើសរចនាបទរូបព្រហ្មមុខបួន ដែលនឹងត្រូវសាងសង់នៅកាច់ជ្រុងផ្លូវច្រមុះជ្រូកទល់មុខភោជនីយស្ថានប៉ៃលិន នៅក្បែរសួនប៉ៃលិន ។ គម្រោងសាងសង់ព្រហ្មមុខបួននោះ គឺជាគម្រោងមួយដាច់ដោយឡែកពីគម្រោងរបស់សាលាក្រុងឡូវែល ។ គម្រោងនោះផ្តួចផ្តើមដោយក្រុមខ្មែរថោន ។ លោក គង់ សេងលី ដែលជាប្រធានខ្មែរថោន កាលពីថ្ងៃទី ៩ ខែ មេសា ឆ្នាំ ២០១៥ ក្នុងកម្មវិធីរបស់ក្លឹបសារព័ត៌មានខ្មែរផុស មានប្រសាសន៍ថា មានគេបរិច្ចាគដីច្រមុះជ្រូក ដែលស្ថិតនៅផ្លូវកែងរវាងផ្លូវ ពរានចហ ]តរពេត និង ដដលសេខេ ]តរពេត ដើម្បីសាងសង់បូជនីយស្ថាននេះ ។ រចនាបទនៃបូជនីយស្ថានរបស់គម្រោងក្រុងខ្មែរនេះ ត្រូវបានជ្រើសរើសរួចហើយ ។ បូជនីយស្ថាននេះ គឺជារូបព្រហ្មបាយ័ន ដែលមានកម្ពស់ ៨ ហ្វីត ។ សព្វថ្ងៃនេះ ជាងចម្លាក់កំពុងឆ្លាក់រូបបូជនីយស្ថាននេះនៅឯស្រុកខ្មែរ ។ ពេលធ្វើរួច គេនឹងដឹកមកក្រុងឡូវែល ។ ថវិកាទាំងអស់សម្រាប់គម្រោងបូជនីយស្ថានព្រហ្មបាយ័ននេះ គឺបានមកពីក្រសួងវប្បធម៌នៅប្រទេសកម្ពុជា ។



ចំណែកឯរូបបូជនីយស្ថាន ដែលបោះឆ្នោតនៅវត្តពន្លឺពុទ្ធចក្កកាលពីថ្ងៃសៅរ៍ កន្លងទៅនេះ គឺជាគម្រោងផ្តួចផ្តើម ដោយសាលាក្រុងឡូវែល ដែលពុំ មានពាក់ព័ន្ធ នឹងថវិកាពីរដ្ឋាភិបាល កម្ពុជា ដើម្បីសាងសង់នោះទេ ។ យើងនៅមិនទាន់ទទួលព័ត៌មានអំពីថវិកា សម្រាប់សាងសង់បូជនីយស្ថាននេះនៅឡើយ ។ ប៉ុន្តែបើតាមការបង្ហើបឱ្យដឹងពីសមាជិកខ្លះនៃគណៈកម្មាធិការ សាងសង់បូជនីយស្ថានរបស់សាលាក្រុងឡូវែល មូលនិធិសម្រាប់សាងសង់នេះអាចនឹងបានមកពីការធ្វើវិភាគទានពីបងប្អូនខ្មែរ នៅក្នុងសហគមន៍ទីក្រុងឡូវែលទាំងមូល ។ គម្រោងរបស់ សាលាក្រុងនេះ មានការចូលរួមពីអង្គការ សមាគមន៍ និងអ្នកតំណាងនៅក្នុងសហគមន៍ខ្មែរក្នុងទីក្រុងឡូវែល ជាច្រើនរូប ដែលមានសមាសភាព នៅក្នុងគណៈកម្មាធិការសាងសង់បូជនីយដ្ឋាន ។

**រាយការណ៍បន្ថែម:** នៅលើលទ្ធផលនៃការបោះឆ្នោត ជ្រើសយករូបណាមួយជាជ័យលាភីនោះ រូបលេខ២ របស់វិចិត្រករ ចន្ថា កែម បានសន្លឹកឆ្នោត ច្រើនដាច់ឈ្នះគេ ក៏ប៉ុន្តែមានការទិទាន ជាច្រើន ក៏លេចចេញមកដែរ ។

**១-រូបលេខ១** របស់សិល្បករទិត្យៀន លីវណ្ណ ជារូបគំនូរមិនទាន់ចប់ ដែលម្ចាស់ផ្ទាំងគំនូរប្រកែកមិនទទួលយកពីព្រោះលោកថាគណកម្មការមានផ្ទាំងគំនូរ ដែលគូរចប់របស់លោក ។

**២-រូបលេខ៣** ជាផ្ទាំងគំនូររបស់សិល្បករ សារឿន ប៉ូត ដែលនៅលើនោះ មានឈ្មោះដល់ទៅ២ គឺឈ្មោះ ចន្ថា កែម ផងនឹងឈ្មោះ សារឿន ប៉ូតផង ដែលអ្នកបោះឆ្នោតស្រពេចស្រពិល មិនបានដឹងថាហេតុអ្វី?

**៣-មានការតវ៉ា**នៅពេលកំពុងបោះឆ្នោត ដោយលោក រីទ្ធី អ៊ុង ទៅលោកអភិបាលក្រុង រ៉េតនី អេលីយ៉ុត នឹងទៅលោក ខេវិន ខប្លិន នាយករងសាលាក្រុង ។

នៅមានចំណុចខ្មៅជាច្រើន ដែលទាំងអ្នកបោះឆ្នោត នឹងវិចិត្រករ មិនដឹងនៅឡើយ ដូចជាថា នរណាជាអ្នកចេញថ្លៃសាងសង់ រូបសំណាកនោះ? ហេតុអ្វីក៏ផ្ទាំងគំនូរមានដល់ទៅ ២ខាង រីឯរូបចម្លាក់នៅមុខសាលាក្រុងមានតែម្ខាងប៉ុណ្ណោះ ។ ទំនងជាសាលាក្រុងទុកភារៈកិច្ចគណកម្មការរូបសំណាក ដែលនឹងប្រជុំនៅថ្ងៃអង្គារខាងមុខ ជាអ្នកសម្រេចលើតម្លៃនៃការបោះឆ្នោតនោះ ៕



# កងកម្លាំងពិសេសស.រ.អា.សម្លាប់មេបញ្ជាការក្រុមរដ្ឋអ៊ីស្លាមនៅស៊ីរី និងចាប់ខ្លួនប្រពន្ធរបស់គាត់

VOA News

១៧ ឧសភា ២០១៥

សេតវិមាននិងក្រសួងការពារប្រទេសស.រ.អា.បាននិយាយកាលពីថ្ងៃសៅរ៍ថាកងកម្លាំងពិសេសស.រ.អា.បានសម្លាប់មេបញ្ជាការម្នាក់នៃក្រុមរដ្ឋអ៊ីស្លាម ហើយចាប់បានប្រពន្ធគាត់នៅក្នុងប៉ែកខាងកើតនៃប្រទេសស៊ីរី ។

ការវាយប្រហារឆ្មក់កាលពីយប់ថ្ងៃសុក្រមានទិសដៅវាយប្រហារបុរសទុយនីស៊ីម្នាក់ឈ្មោះ Abu Sayyaf ដែលរដ្ឋាភិបាលក្រុងវ៉ាស៊ីនតោនបានពិណនាថាមានទាក់ទិននឹងកិច្ចប្រតិបត្តិការខាងយោធានិងខាងហិរញ្ញវត្ថុរបស់ក្រុមជនសកម្មប្រយុទ្ធនេះ ដោយមានរួមមានផ្សារងងឹតលក់ឧស្ម័ននិងប្រេងដែលផ្តល់ប្រាក់ដល់សកម្មភាពជាច្រើនរបស់អង្គការនេះផងដែរ ។

សេតវិមានបាននិយាយថាកាលពីយប់ថ្ងៃសុក្រថាលោកប្រធានាធិបតីស.រ.អា. បារ៉ាក់ អូបាម៉ា បានបញ្ជាដល់ក្រសួងការពារជាតិឱ្យបញ្ជូនក្រុមទាហានស.រ.អា.ដែលមានមូលដ្ឋានក្នុងប្រទេសអ៊ីរ៉ាក់ឱ្យធ្វើប្រតិបត្តិការនៅ al-



ផែនទីនៃប្រទេសស៊ីរី

Omar ។

ប្រពន្ធរបស់មេដឹកនាំនៃក្រុមរដ្ឋអ៊ីស្លាមរូបនេះឈ្មោះ Umm Sayyaf កំពុងឋិតនៅក្នុងការឃុំឃាំងរបស់ក្រុមយោធាស.រ.អា.ក្នុងប្រទេស អ៊ីរ៉ាក់ ។ នៅក្នុងពេលឆ្មក់វាយប្រហារនោះស្ត្រី វ័យក្មេង Yazidi ម្នាក់ដែលប្តីប្រពន្ធនេះបានចាប់ឃុំឃាំងបានត្រូវដោះលែងឱ្យមានសេរីភាព ។

បើតាមអ្នកស្រី Bernadette Meehan អ្នកនាំពាក្យនៃក្រុមប្រឹក្សាសន្តិសុខជាតិបានឱ្យដឹងថាគ្មានទាហានស.រ.អា.ណាម្នាក់ស្លាប់ ឬត្រូវរបួសទេនៅក្នុងកិច្ចប្រតិបត្តិការនោះ ។

ក្រុមមន្ត្រីស.រ.អា.បាននិយាយថា ការឆ្មក់វាយប្រហារដែលបានសម្លាប់មេបញ្ជាការរូបនេះមិនមែនជាលទ្ធផលនៃកិច្ចសហប្រតិបត្តិការជាមួយរដ្ឋាភិបាលរបស់ប្រធានាធិបតី Bashar al-Assad ទេ ៕

## ស្ត្រីលើផ្ទាំងគំនូរ

ដោយៈមីសែល វ៉ាសង | May 1, 2015 - ជីខាមបូឌាដេលី

ការតាំងពិព័រណ៍រូបធ្វើឱ្យវិចិត្រករស្ត្រីមកជុំគ្នាក្នុងការតាំងពិព័រណ៍ដំកម្រការតាំងពិព័រណ៍សិល្បៈក្នុងក្រុងបាត់ដំបងកាលពីថ្ងៃសៅរ៍ តំណាងឱ្យរឿងរ៉ាវកម្រមួយនៃវិចិត្រករស្ត្រី ។ កម្រពីព្រោះមានជាងគំនូរនិងជាងចម្លាក់ស្ត្រីតិចតួចណាស់នៅក្នុងប្រទេសនេះ មិនថាជាជនជាតិខ្មែរ ឬបរទេសទេ ។

គោលគំនិតសម្រាប់ការតាំងពិព័រណ៍នេះ **"ស្ត្រីដោយស្ត្រី"** បានកើតឡើងនៅឯពិធីអាពាហ៍ពិពាហ៍របស់ អឿ សុគន្ធារី ជាវិចិត្រករស្ត្រីម្នាក់ក្នុងចំណោមវិចិត្រករស្ត្រីល្បីៗនៅក្នុងប្រទេសកម្ពុជានៅពេលដែលវិចិត្រករ ឆាន់ ឌីណា បានពិភាក្សាជាមួយ ដារ៉េន ស្វលឡូ នៃវិចិត្រសាលឡូថឹសអំពីគំនិតរបស់នាងក្នុងការរៀបចំតាំងពិព័រណ៍ជាក្រុមជាមួយវិចិត្រករស្ត្រីពីរនាក់ដែលជាមិត្តនឹងគ្នា ៕

# ខ្មែរអ៊ីស្លាមមិនចង់ឃើញការសងសឹកគ្នារវាងហ្សកដានីនិងក្រុម ISIS

ហេង រស្មី

០៦ កុម្ភៈ ២០១៥

ភ្នំពេញៈ ពលរដ្ឋខ្មែរអ៊ីស្លាមទាំងនិស្សិតរហូតដល់មន្ត្រីជាន់ខ្ពស់ បានសម្តែងការព្រួយបារម្ភចំពោះការសម្លាប់គ្នាទៅវិញទៅមករវាងក្រុមអ៊ីស្លាមជ្រុលនិយម ISIS និងការបើកប្រតិបត្តិការវាយប្រហារតាមផ្លូវអាកាសរបស់ប្រទេសហ្សកដានីទៅលើក្រុមសកម្មប្រយុទ្ធអ៊ីស្លាមបន្ទាប់ពីបានសម្លាប់អ្នកបើកបរយន្តហោះប្រទេស ហ្សកដានីម្នាក់ ។

ពលរដ្ឋខ្មែរអ៊ីស្លាមបានទស្សន៍ទាយថាសង្គ្រាមអាចនឹងផ្ទុះឡើងកាន់តែធំឡើងថែមទៀតនៅក្នុងតំបន់មជ្ឈិមបូព៌ាដែលទាមទារឱ្យមានការសម្របសម្រួលមួយចៀសវាងអំពើហិង្សាកាប់សម្លាប់គ្នាដោយសារតែការប្រកាន់តឹងរ៉ឹងៗខ្លួន ។

ប្រព័ន្ធផ្សព្វផ្សាយនៅទូទាំងពិភពលោកបាននិយាយអំពីសកម្មភាពដុតសម្លាប់ទាំងរស់ អ្នកបើកបរយន្តហោះប្រទេសហ្សកដានីម្នាក់ ឈ្មោះ Moaz Al គាសាសបហេដោយក្រុម ISIS នៅក្នុងទ្រុងដែកយ៉ាងព្រៃផ្សៃបំផុត ។

ជាការឆ្លើយតបមកវិញប្រទេសហ្សក ដានីបានកាត់ទោសប្រហារជីវិតអ្នកទោសសកម្មប្រយុទ្ធជនជាតិអ៊ីស្លាមពីរនាក់ក្នុងនោះមានស្ត្រីម្នាក់ដោយព្យួរកកាលពីម្សិលមិញនេះដើម្បីជាការឆ្លើយតបនឹងពួកសកម្មប្រយុទ្ធដែលបានដុតសម្លាប់អ្នកបើកបរយន្តហោះរបស់ខ្លួន ។

លោក អះម៉ាត់ យ៉ះយ៉ា ប្រធានសមាគមអភិវឌ្ឍន៍ខ្មែរអ៊ីស្លាមកម្ពុជាមានប្រសាសន៍ថាអ៊ីស្លាមកម្ពុជាមិនគាំទ្រទៅនឹងសកម្មភាពសម្លាប់យ៉ាងព្រៃផ្សៃទាំងនោះទេ ។

លោកបានបញ្ជាក់ថាប្រសិនណាបើប្រទេសហ្សកដានី នៅតែចិញ្ចឹមចិត្តធ្វើការវាយប្រហារតាមអាកាសប្រឆាំងនឹងក្រុមសកម្មប្រយុទ្ធISIS នោះសង្គ្រាមអាចនឹងរីករាលដាលនៅក្នុងតំបន់មជ្ឈិមបូព៌ាហើយប្រទេសជិតខាងហ្សកដានី មួយចំនួននឹងមិនមានសន្តិភាពនិងសុវត្ថិភាព ។

លោកនិយាយថាៈ «**ខ្ញុំខ្លាចតែរឿងហ្នឹង វារីកតែធំទៅហើយសង្គ្រាមពេញមជ្ឈិមបូព៌ា អត់មានពីណានៅបានសុខមួយទេ ។វាយគ្នាឯងទាំងអស់ពេញតែម្តងមិនដឹងអ្នកណា ខ្វះច្របូក ច្របល់ពេញតែហ្នឹង ហើយអ្នកណាលូកដៃចូលទៅអ្នកហ្នឹងស្លាប់**» ។



លោក Moaz Al Kasasbeh អ្នកបើកបរយន្តហោះ ចំបាំងរបស់ប្រទេសហ្សកដានី ត្រូវបានក្រុមឧទ្ទាមអ៊ីស្លាមក្នុងប្រទេស ស៊ីរី ចាប់ខ្លួនកាលពីខែធ្នូ ឆ្នាំ២០១៤ ក្នុងខណៈពេលដែលលោកហោះប្រតិបត្តិការបំពេញបេសកកម្មជាមួយក្រុមសម្ព័ន្ធមិត្តដែលដឹកនាំដោយសហរដ្ឋអាមេរិកបើកការវាយប្រហារតាមអាកាសទៅលើក្រុម«ISIS» ។

លោក អ៊ីសា ឧស្មាន ប្រជាពលរដ្ឋខ្មែរអ៊ីស្លាមម្នាក់ក្នុងទីក្រុងភ្នំពេញដែលបានតាមដានព័ត៌មានតាមបណ្តាញប្រព័ន្ធផ្សព្វផ្សាយ ។ លោកនិយាយថាលោកមានការរន្ធត់និងតក់ស្លុតនៅពេលដែលឃើញក្រុមឧទ្ទាមបានសម្លាប់ទៅលើអ្នកបើកយន្តហោះរបស់ប្រទេសហ្សកដានី ។

លោកមានប្រសាសន៍ថាពលរដ្ឋខ្មែរអ៊ីស្លាមប្រឆាំងជំទាស់ទៅនឹងទង្វើទាំងនេះទេក៏ប៉ុន្តែលោកទាមទារឱ្យមានដំណោះស្រាយមួយដើម្បីចៀសវាងសង្គ្រាមបង្ហូរឈាម ។

លោកនិយាយថាៈ«**ខ្ញុំគិតថាប្រសិនណាបើរឿងហ្នឹងដោះស្រាយមិនបានទេធម្មតាទេការគុំគួនគ្នា ចងកំហឹងគ្នាចេះតែកើតឡើងធំឡើងៗ ។ ខាងនេះសម្លាប់មួយ ខាងនោះសម្លាប់ពីរ ចេះតែចាប់សម្លាប់គ្នាទៅវិញទៅមកតែអញ្ចឹង យើងមានអ្វីចំណេញទៅ**» ។

លោក ស្លេះ ណាស៊ី ប្រធានមជ្ឈមណ្ឌលព័ត៌មានមូស្លីមកម្ពុជាមានប្រសាសន៍ថាបញ្ហានេះគឺជារឿងធំមួយសម្រាប់ពិភពលោកមិនមែនត្រឹមតែប្រទេសហ្សកដានីម្នាក់ឯងនោះទេ ដោយសារតែមានប្រទេសជាច្រើនបានចូលរួមប្រយុទ្ធប្រឆាំងនឹងក្រុម ISIS ។

លោកបញ្ជាក់ថាដើម្បីបញ្ចប់ជម្លោះនេះបានទាល់តែគ្រប់ភាគីទាំងអស់បើកការចរចាគ្នាដើម្បីបញ្ចប់សង្គ្រាម ។

លោកនិយាយថា«**ខ្ញុំគិតថាវិធីដែលផ្សះផ្សារបំផុតចង់ឱ្យក្រុមដែលអះអាងថាជាតំណាងនៃក្រុមនីមួយៗហ្នឹងចរចាគ្នាហើយរកចំណុចរួមមួយដោយសន្តិវិធី ដើម្បីចៀសវៀងការធ្វើឱ្យស្ថានភាពប្រឆាំងគ្នាទៅវិញទៅមកកាន់តែធ្ងន់ធ្ងរ**» ។

កញ្ញា ហ៊ិន ហេង និស្សិតឆ្នាំទី៣ នៃសាកលវិទ្យាល័យពុទ្ធិសាស្ត្រ ផ្នែកគិលានុបដ្ឋាយិកាក៏គាំទ្រឱ្យមានការផ្សះផ្សារដែរ ។

កញ្ញានិយាយថាៈ «**យោបល់ខ្ញុំមិនចង់ ឱ្យមានអំពើអញ្ចឹងកើតឡើងទៀតពីព្រោះអំពើដែលថាការសងសឹកគ្នា សម្រាប់គ្នាទៅវិញទៅមកគឺមិនមែនជាការដោះស្រាយបញ្ហាដ៏ល្អ**» ។

ក្រុមភេវករអ៊ីស្លាមដែលធ្លាប់មានទំនាក់ទំនងជាមួយក្រុមអាល់កៃដា ធ្លាប់បានមកសំងំលាក់ខ្លួនក្នុងប្រទេសកម្ពុជារយៈពេល៦ខែ ។

កាលពីម្សិលមិញនេះតុលាការកំពូលរបស់ប្រទេសកម្ពុជាបានតម្កល់សាលដីការបស់តុលាការជាន់ទាបដែលបានកាត់ទោសកាលពីឆ្នាំ២០១០ ប្រឆាំងនឹងសមាជិកអាល់កៃដាចំនួន៣ឱ្យជាប់ពន្ធនាគារម្នាក់ៗចំនួន៨ឆ្នាំ ។ ក្នុងនោះមាន២នាក់ជាជនជាតិបង់ក្លាដេស និងម្នាក់ទៀតជាជនជាតិនេប៉ាល់ពីបទប៉ុនប៉ងវាយប្រហារតាមបែបភេរវកម្មទៅលើស្ថានទូតបស្ចឹមប្រទេសសំខាន់ៗដែលរួមស្ថានទូតអាមេរិក អូស្ត្រាលី និងប្រទេសអង់គ្លេស ៕

# ស្តីពីទីក្រុង

# About the Town

By Deb Belanger

ដោយ: Deb Belanger, ប្រែសម្រួល

ដោយ: ថាច់ វណ្ណា

**បុណ្យកំសាន្តនៅដំបន់លេងស្គី ណាសហូបាវ៉ាឡេ (Nashaba Valley) ដែលគេធ្លាប់ហៅថាៈ** ចម្រៀងស្នេហានៅតាមជនបទ។សូមអញ្ជើញយកស្បែកជើង និងមួកកង្វៀលគោ (cowboy) មកជាមួយ យកទៅដំបន់លេងស្គីនៅណាសហូបាវ៉ាឡេ (Nashoba Valley, Westford, MA ។ ក្នុងឱកាសបុណ្យស្រុក ថ្ងៃទី២៩ ខែឧសភា ឆ្នាំ ២០១៥ ដែលបានសម្តែងដោយក្រុម ញូវ-អ៊ីងឡឹន (New England). សូមត្រៀមសម្លៀកបំពាក់ល្អៗបែប ពីសម័យបុរាណ មានភ្លេងកំសាន្ត មានភេសជ្ជៈនិងសាច់អាំង មានក្រុមតន្ត្រីជនបទរាំច្រៀងក្នុងរយះពេល៣ថ្ងៃ មានអ្នកលក់សាច់អាំងប្រកប់ដោយរស់ជាតិពិសេស មានលក់ស្រាបៀរតាមរបៀបស្រុកស្រែចម្ការ មានការប្រណាំងរទេះគោ ប្រណាំងជ្រូក កន្លែងសម្រាប់កូនក្មេងលេង និងល្បែងសម្រាប់គ្រួសារជាច្រើនបែប។

អ្នកស្រុក ញូវ-អ៊ីងឡឹនភាគច្រើនចូលចិត្តក្រុមតន្ត្រីនិងសិល្បះនៅតាមជនបទ រួមមាន: the Dusty Gray Band, Walkin' the Line, Boys of Rockingham, និងមានរាំចង្វាក់រ៉ក យ៉ាងស្ទាត់ជំនាញបែប ម៉ាយកូវ ចែកសិន (Michelle Jackson) និងមានផ្តល់មេរៀនសម្រាប់លោកអ្នករៀនរាំផងដែរ ទិញសំបុត្រចូលថ្លៃ១០ដុល្លារ ក្មេងក្រោមអាយុ១០ឆ្នាំ






ចូលឥតគិតថ្លៃព័តិមានបន្ថែម ឬទិញសំបុត្រតាមវ៉ែនសាយ: **www.skinahoba.com**

**Country Fest at Nashoba Valley Ski Area:** Calling all Music Lovers and Country Fans! Bring your cowboy boots and cowboy hat and head on down to Nashoba Valley Ski Area in Westford, MA from May 29-31, 2015 for Country Fest, presented by Fest Events New England. Get ready for a good old fashion Country show down with Bands, Brews & BBQ! Country Fest will feature 3 Days of Live Country Music & Line Dancing, BBQ vendors serving up their succulent, finger-licking BBQ specialties (so come hungry!), a Beer and Wine Garden, a Mechanical Bull Riding Competition, Racing Pigs at the Hog Speedway, Kiddieland and many more family friendly activities. Some of New England's favorite Country bands and artists including the Dusty Gray Band, Walkin' the Line, Boys of Rockingham and more will be rocking the stages, while Line





Dancing Professional, Michelle Jackson, will be offering up lessons for all to learn the basics of line dancing. Admission is $10 and children under 10 are free. For more information and to purchase tickets, visit **www.skinashoba.com.**

**នៅថ្ងៃបុណ្យលក់ម្ហូបតាមរថយន្ត ឡេកស៊ីងតិន** (Lexington, MA): ជារៀងរាល់ឆ្នាំបុណ្យកំសាន្តស្រុកនៅ ឡេកស៊ីងតិន(Lexington) មានភាពសប្បាយអ៊ូអរក្នុងរយះពេលមួយខែក៏បានឈានមកដល់ថ្ងៃទីបញ្ចប់ សូមអញ្ជើញទៅទស្សនាមើល តើគេបានលក់អ្វីខ្លះនៅក្នុងរថយន្តថ្ងៃទី២៩ ខែឧសភា ពីម៉ោង៥ ដល់ម៉ោង៩ល្ងាច សូមកុំចំអើនអាហារនៅផ្ទះ សូមអញ្ជើញទៅទិញអាហារប្លែកៗនៅក្នុងរថយន្តនិងនៅក្នុងហាងយ៉ាងឆ្ងុយឆ្ងាញ់ និងតន្ត្រីចម្រៀងស្តាប់កំសាន្ត មានលក់បាយ-មាន់ស្រស់ៗជាមាន់ដើរ (Chicken on the Road) មានលក់នៅជ្រុងផ្លូវ: Massachusetts Avenue and Woburn Street Fairgrounds in Lexington, MA., ព័តិមានបន្ថែមសូមអញ្ជើញមើលវ៉ែបសាយ:**http://tourlexington.us/RevolutionaryRevelryCalendar.html**

**Food Truck Festival, Lexington, MA:** As the annual month long celebration in Lexington, Revolutionary Revelry, comes to an end be sure to check out the Food Truck Festival on Friday, May 29th from 5:00-9:00pm. Take a night off from cooking and purchase food from different food truck vendors and local restaurants while enjoying great food, entertainment and activities. A few of the food trucks include The Bacon Truck, Chicken and Rice Guys and Chicken on the Road. No entry fee, but food costs per truck vary. Located on the corner of Massachusetts Avenue and Woburn Street Fairgrounds in Lexington, MA. For more information visithttp://**tourlexington.us/RevolutionaryRevelryCalendar.html** .( To pag ២៨ )

# ខ្មែរដំបូងគេដែលបានកសាងផ្សារប៉ៃលិននៅឡូវែល ( ត )

ដោយ: សូបិន ពិន

***លោក ឡាច ប៊ុនរិទ្ធ អតីតនាយទាហាន បញ្ជូនសារ និងភរិយា ម៉ាលី ថៃ ជាម្ចាស់នៃភោជនីយដ្ឋានប៉ៃលិន បានផ្ដល់កិច្ចសម្ភាសន៍ដល់ សូបិន ពិន កាលពីថ្ងៃទី១៦មេសា២០១៥ នៅភោជនីយដ្ឋានរបស់លោក ស្ដីអំពីកំណើតនៃពាណិជ្ជកម្ម នៃសហគមន៍ខ្មែរ ដែលបានក្លាយទៅជាក្រុងខ្មែរនាពេលឆ្នាំចុងក្រោយនេះ មានអត្ថន័យតពីលេខមុន ដូចតទៅ***



ផ្សារប៉ៃលិនបន្ទាប់ពីឆេះកាលពីឆ្នាំ១៩៩១

**ម៉ាលី ថៃ** ឆេះម្ដងនេះធ្ងន់ធ្ងរតែម្ដង... សាលាក្រុង នឹងប៉ូលិសពេលនោះ គេតឹងតែងណាស់ដែរ ចាប់ពួកក្មេងទាំងនោះរាល់ថ្ងៃនៅតែមិនអស់ 

**ខ្មែរផុស** តើពេលនោះ គ្មានសមាគម ឬអង្គការណាជួយជ្រោមជ្រែងពង្រឹងសង្គមបានទេឬ?

**ប៊ុនរិទ្ធ ឡាច** ខ្ញុំក៏មានទៅជួយសមាគមខ្មែរដែរ តាំងពីដំបូងមកម្លេះ

**ខ្មែរផុស** តើលោកជាស្ថាបនិក មែនឬទេ?

**ប៊ុនរិទ្ធ ឡាច** មិនមែនទេ! សមាគមខ្មែរគេកើត២ឆ្នាំហើយ ទើបខ្ញុំទៅដល់ ក៏ជួយគេទៅ... មិនតិចតួច ជួយដល់ទៅ១៧ឆ្នាំ រហូតដល់បានសញ្ញាប័ត្រកោតសរសើរថា ជាអ្នកជួយសមាគមយូរជាងគេ...ធ្លាប់ធ្វើជាប្រធានក៏មាន ធ្វើជាអនុប្រធានក៏មាន ជាអ្នកកាន់ហិបប្រាក់ក៏មានធ្វើ គ្រប់តែកន្លែងឱ្យតែគេត្រូវការ...

**ខ្មែរផុស** បើអីចឹង លោកកាន់សមាគមផង កាន់ហាងផង តើហាងឆេះពេលណា?

**ប៊ុនរិទ្ធ ឡាច** អានោះក្រោយមក ហើយទេ! ម៉ាលី ថៃ ភ្លើងឆេះពេលយើងកំពុងពង្រីក... យើងពង្រីកថែមទៀត ទិញដីខ្លួនឯងបន្ថែមតម្លៃ ៦០ម៉ឺនដុល្លា រហូតដល់ចុងឯណោះ... ដំណើរការណ៍បាន៤ឆ្នាំ ស្ថានភាពសេដ្ឋកិច្ចក៏ធ្លាក់តឹងតែងនៅអាមេរិកយើងនេះ ខ្ញុំក៏អស់សមត្ថភាពទប់ទល់បាន ធានាគារគេអូសយកទៅដាក់ដេញថ្លៃ... ខ្ញុំប្រឹងទប់អាខាងធំ កុំឱ្យរលំជាមួយគ្នា ហើយទៅឈរដេញថ្លៃយកអាខាងតូចមកវិញដែរ តែត្រូវគេលើកពេល... ភ្លេចខ្លួនមួយភ្លែត អាខាងតូចត្រូវ វដ្ឋា យ៉ែម លក់ឱ្យគេបាត់ ខ្ញុំឥតដឹងមុនសោះ ទាល់តែមានគេមកទារថ្លៃឈ្នួលផ្ទះ ទើបដឹងថា គេលក់បាត់ទៅហើយ... ខ្ញុំស្ដាយណាស់ ពីព្រោះខំប្រឹងពេក តើបន្ទោសនរណាបាន? វដ្ឋា គាត់ជាអ្នករកស៊ីខាង"**រាលអេស្តេត**"កាត់លក់ឱ្យនរណាក៏បានដែរ។ ហេតុនោះហើយបានជាដាច់"**ប៉ៃលិន**"មួយកំណាត់ ទៅគេបាត់ទៅ នៅសល់បានអាធំ២ជាន់នេះ១ដែរខ្មែរផុស ចុះដំណើរការណ៍សមាគម ពេលដែលលោកជាអ្នកធ្វើការនៅទីនោះ ស្ថានភាពយ៉ាងម៉េចដែរ?

**ប៊ុនរិទ្ធ ឡាច** ដំណើរការបានល្អណាស់! មនុស្សជុំគ្នា ធ្វើបុណ្យចូលឆ្នាំម្ដងៗ ធ្វើនៅ"**អាររេណាសនទ័រ**"មានមនុស្សមករាប់ម៉ឺននាក់ មកមើលកម្មវិធីអីក៏មានដែរ ខ្ញុំសុំឱ្យយកថ្លៃឱ្យតិច ដើម្បីឱ្យបងប្អូនចូលឱ្យច្រើន យើងយកម្នាក់១០ដុល្លា យកលុយជួយសមាគម... យើងបានបង្កើតពីបុណ្យអុំទូក ទៅយកទូកពីភ្នំពេញមួយមក លោក ហ៊ុន សែន ថាសួរថាចង់បានអាប៉ុណ្ណា? ខ្ញុំថាយកអាធំជាងគេបង្អស់ លោកបានឱ្យទូក១ ជិះបានចំណុះ៧២នាក់ ប្រវែង ១០៥ហ្វិត តែឱ្យដឹក

តទៅទំព័រទី ១៩

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ជំពសិចប្រែសម្រួលពីកាសែតអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី

# គោឧសភរាជបរិភោគសណ្តែក និងពោតច្រើន ក្នុងព្រះរាជពិធីច្រត់ព្រះនង្គ័លឆ្នាំនេះ

ដោយ: ឃួន ណារិម | May 7, 2015

គោឧសភរាជមិនបរិភោគស្មៅដែលជាអាហារប្រចាំថ្ងៃរបស់វាទេអំឡុងព្រះរាជពិធីច្រត់ព្រះនង្គ័លធ្វើឡើងនៅក្នុងក្រុងបាត់ដំបង កាលពីម្សិលមិញ ហើយបានងាកទៅបរិភោគពោត និងសណ្តែកជំនួសវិញ ដែលនេះជាទំនាយថា កសិករនឹងទទួលបានទិន្នផលដំណាំពោត និងសណ្តែកខ្ពស់នៅឆ្នាំនេះ។

លោក ចាន់ សុផល អភិបាលខេត្តបាត់ដំបង និងលោកស្រី គីម ប៊ុណ្ណារ៉ា ដែលជាភរិយារបស់លោក បានដើរតួតំណាងឱ្យស្តេចមាឃ និងព្រះមេហួរ ក្នុងព្រះរាជពិធីដ៏ឱឡារិកនៅលើទីលានបាត់ទាត់ក្នុងក្រុងនាភាគឧត្តរនេះ និងបាចពូជស្រូវតាមគន្លងនង្គ័ល ខណៈព្រះមហាក្សត្រ នរោត្តម សីហមុនី និងក្រុមមន្ត្រីជាន់ខ្ពស់កំពុងតែយាងទត និងទស្សនា។



គោឧសភរាជមួយនឹមដើរជុំវិញកីឡាដ្ឋានក្នុងក្រុងបាត់ដំបង អំឡុងពេលច្រត់ព្រះនង្គ័ល កាលពីម្សិលមិញ។ រូបថត: Masayori Ishikawa

ប៉ុន្តែពួកគេមកចូលរួមដើម្បីមើលថា តើគោឧសភរាជដែលមានតួនាទីសម្រេចជោគវេសនា

តទៅទំព័រទី ២៣

# For the Royal Oxen, It's Back to Beans and Corn

By Khuon Narim | May 7, 2015

The holy oxen turned down their daily fare of grass at the Royal Plowing Ceremony in Battambang City on Wednesday, instead snacking on corn and beans, suggesting that farmers will enjoy bumper harvests of those crops in the year ahead.

Battambang provincial governor Chan Sophal and his wife, Kim Bunara, played the coveted roles of Sdach Meak and Mehour at the lavish, televised ceremony on a football pitch in the northern city, sprinkling rice seeds in a plow's furrow as King Norodom Sihamoni and a posse of high-ranking officials looked on.

A pair of holy oxen are paraded around a football pitch in Battambang City on Wednesday during the Royal Plowing Ceremony. (Masayori Ishikawa)

But what the dignitaries had really come to see were the oxen, on whose muzzles-which would lead each animal to feed from one of seven bowls containing corn, beans, rice, sesame, water, rice wine or grass-the country's agrarian fortunes?hinge.

Continued to Page 23

# ការនាំចេញស្ករសទៅកាន់សហភាពអឺរ៉ុបធ្លាក់ចុះ បន្ទាប់ពីឆ្នាំដែលមានការកើនឡើងខ្លាំង

ដោយ: ហ្សមប៊ែរ ភីធឺរ៍ | May 13, 2015

យោងតាមទិន្នន័យស្តីពីពាណិជ្ជកម្មរបស់សហភាពអឺរ៉ុបបានឱ្យដឹងថា ការនាំចេញស្ករសរបស់កម្ពុជាទៅកាន់សហភាពអឺរ៉ុបបានធ្លាក់ចុះ៤១ភាគរយកាលពីឆ្នាំមុន ដែលជាការធ្លាក់ចុះមួយគួរឱ្យកត់សម្គាល់សម្រាប់ការនាំចេញមួយនៅក្នុងចំណោមការនាំចេញដ៏ចម្រូងចម្រាសបំផុតនៅកម្ពុជា។

ដោយត្រូវបានចាត់ទុកថា ជា **"ស្ករឈាម"** ដោយគ្រួសារដែលបាត់បង់ផ្ទះសំបែង និងដីស្រែចម្ការរបស់ខ្លួនដោយសារចម្ការអំពៅនៅទូទាំងប្រទេស កម្ពុជាបាននាំចេញស្ករសប្រមាណ ៣៨.០០០តោនគិតជាទឹកប្រាក់ប្រមាណ១៧.៤លានដុល្លារទៅកាន់តំបន់អឺរ៉ុប ដែលជាទីផ្សារធំបំផុតរបស់ខ្លួននៅក្នុងឆ្នាំ២០១៤ ។

ការនាំចេញសរុបកាលពីឆ្នាំមុនគឺបានធ្លាក់ចុះស្ទើរពាក់កណ្តាលបើធៀបទៅនឹងការនាំចេញស្ករសរបស់កម្ពុជាទៅកាន់តំបន់អឺរ៉ុបកាលពីឆ្នាំ២០១៣ ប៉ុន្តែ វានៅតែជាការនាំចេញច្រើនបំផុតទី២ បើធៀបនឹងការនាំចេញជារៀងរាល់ឆ្នាំ ចាប់តាំងពីឆ្នាំ២០០៩មក នៅពេលសហភាពអឺរ៉ុបបានលើកលែងពន្ធសម្រាប់ទំនិញកម្ពុជាក្រោមគម្រោងពាណិជ្ជកម្ម **"អ្វីៗទាំងអស់លើកលែងតែអាវុធ"** របស់ខ្លួន សម្រាប់ប្រទេសដែលមានការអភិវឌ្ឍន៍តិចតួច។

ប្រទេសអ៊ីតាលី និងប៊ុលហ្គារីបានទិញច្រើនជាងគេបំផុតក្នុងចំណោមការនាំចេញស្ករសកាលពីឆ្នាំមុនរបស់កម្ពុជា។ ប្រទេសផ្សេងៗទៀតបន្ទាប់ពីប្រទេសទាំងពីរនេះ គឺសាធារណរដ្ឋឆែក ប្រទេសក្រិក អេស្ប៉ាញ និងប្រទេសបែលហ្ស៊ិក។

ទោះបីជាស្ករសគឺជាទំនិញមួយចំណែកតូចនៃអ្វីដែលប្រទេសកម្ពុជានាំចេញទៅសហភាពអឺរ៉ុបក្តី តែវាគឺជាទំនិញដែលបង្កឱ្យមានភាពចម្រូងចម្រាសបំផុតនៅក្នុងប្រទេស។

យោងតាមអង្គការសិទ្ធិមនុស្សបានឱ្យដឹងថា ក្រុមហ៊ុនចម្ការអំពៅនៅកម្ពុជារួមទាំងក្រុមហ៊ុនចម្ការអំពៅមួយចំនួនដែលគ្រប់គ្រងដោយលោក លី យ៉ុងផាត់ សមាជិកសភាមកពីគណបក្សប្រជាជនកម្ពុជាផងដែរនោះបានលួចប្លន់ដីស្រែពីអ្នកភូមិរាប់ពាន់នាក់ ហើយបានបណ្តេញពួកគាត់រាប់រយនាក់ចេញពីផ្ទះសំបែងរបស់ខ្លួន ដោយធ្វើ

តទៅទំព័រទី ២០

# Sugar Exports to Europe Drop After Peak Year

By Zsombor Peter | May 13, 2015

Cambodia's sugar shipments to Europe fell by 41 percent last year, according to trade data from the European Union (E.U.), a significant drop for one of the country's most controversial exports.

Dubbed **"blood sugar"** by the families that have lost their homes and farms to sugarcane plantations across the country, Cambodia in 2014 shipped 38,000 metric tons of the commodity to the E.U.-its main market-worth $17.4 million.

Last year's total is a little over half as much sugar as Cambodia exported to the E.U. in 2013, but still the second most of any year since 2009, when Europe granted duty-free access to Cambodian goods under its Everything But Arms trade scheme for least developed countries.

Italy and Bulgaria bought up most of last year's sugar exports. The rest went to the Czech Republic, Greece, Spain and Belgium.

Though sugar makes up a small fraction of what Cambodia exports to the E.U., it has arguably been the country's most controversial commodity.

According to rights groups, Cambodia's sugar plantations- including a few owned by CPP Senator Ly Yong Phat-have stolen farmland off thousands of villagers and thrown hundreds of them out of their homes, driving them into poverty and debt. Their **"clean sugar campaign"** urges companies and customers abroad not to buy from Cambodia.

Though the E.U. has rebuffed calls to end its trade benefits for the country's sugar, Equitable Cambodia director Eang Vuthy, whose NGO has been helping families evicted by plantations, believes the drop in 2014 exports is thanks to the campaign.

**"It's because the sugar issue in Cambodia is well known, and buyers**

Continued to Page 20

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីភាសាអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី

# រដ្ឋមន្ត្រីក្រសួងការបរទេសអះអាងថា ដីដែលមានវិវាទជាដីរបស់វៀតណាម

ដោយ ទាន តិមតិន | May 7, 2015

លោក ហោ ណាំហុង រដ្ឋមន្ត្រីក្រសួងការបរទេសបានរងការរិះគន់យ៉ាងខ្លាំងពីសមាជិកសភាគណបក្សប្រឆាំង និងក្រុមអ្នកភូមិក្នុងខេត្តត្បូងឃ្មុំ បន្ទាប់ពីលោកបានផ្ញើលិខិតជូនលោក ហេង សំរិន ប្រធានរដ្ឋសភានៅសប្តាហ៍នេះដោយអះអាងថា ដីមួយផ្នែកដែលប្រជាជនខ្មែរកំពុងធ្វើស្រែចម្ការនោះ តាមពិតជារបស់វៀតណាម។ លោក ហោ ណាំហុង បានសរសេរលិខិតមួយច្បាប់ឆ្លើយតបទៅនឹងសំណើរបស់សមាជិកសភាគណបក្សសង្គ្រោះជាតិសុំជំនួយពីរដ្ឋមន្ត្រីក្រសួងការបរទេសរូបនេះបន្ទាប់ពីមានសេចក្តីរាយការណ៍ពីកសិករក្នុងឃុំជាំ ស្រុកមេមត់ថា ទាហានវៀតណាមបីនាក់ក្នុងចំណោមទាហានវៀតណាម៦នាក់ដែលបានយកថ្នាំសម្លាប់សត្វល្អិតបាញ់លើដំណាំរបស់ពួកគាត់កាលពីថ្ងៃទី១៩ ខែមេសា។

បើទោះជាកសិករទាំងនេះអះអាងថា ពួកគាត់បានធ្វើស្រែចម្ការលើដីនេះច្រើនទសវត្សរ៍មកហើយក៏ដោយ ក៏លោក ហោ ណាំហុង បានមានប្រសាសន៍ថា ដំណាំទាំងនេះបានដាំឆ្លងបង្គោលព្រំដែនដែលត្រូវបានកែប្រែជាផ្នែកមួយនៃអនុស្សរណៈនៃការយោគយល់រវាងប្រទេសពីរ។

លោក ហោ ណាំហុង បានសរសេរនៅក្នុងលិខិតចុះកាលបរិច្ឆេទថ្ងៃច័ន្ទថា **"ថ្មីៗនេះ ក្នុងឆ្នាំ២០១៥ ប្រជាពលរដ្ឋរបស់យើងបានដាំដំណាំលើផ្ទៃដីទំហំ១៦,៦ ហិកតាលើដីវៀតណាមដែលបានបណ្តាលឱ្យវៀតណាមប្រតិកម្មដោយការបាញ់សម្លាប់សត្វល្អិតលើដំណាំរបស់កសិករយើង"**។

ការវាយតម្លៃរបស់លោក ហោ ណាំហុង កាលពីម្សិលមិញត្រូវបានច្រានចោលដោយលោក ម៉ៅ មុន្នីវណ្ណ សមាជិកសភាគណបក្សសង្គ្រោះជាតិ ដែលកាលពីពេលថ្មីៗនេះបានទៅកាន់តំបន់នោះនៅក្នុងឃុំជាំ ហើយបានមានប្រសាសន៍ថា លោកប្រហែលកោះហៅរូបគាត់ឱ្យឆ្លើយបំភ្លឺនៅចំពោះមុខគណៈកម្មការរដ្ឋសភា។

លោក មុន្នីវណ្ណ បានមានប្រសាសន៍ថា **"ខ្ញុំគិតថា ការបកស្រាយរបស់លោក ហោ ណាំហុង គឺ**

**តទៅទំព័រទី ២១**

# Foreign Minister Says Land in Dispute Vietnam's

By Kuch Naren | May 7, 2015

Foreign Affairs Minister Hor Namhong has come under fire from an opposition lawmaker and villagers in Tbong Khmum province after sending a letter to National Assembly President Heng Samrin this week asserting that a piece of land being farmed by Cambodians actually belongs to Vietnam.

Mr. Namhong wrote the letter in response to a request from CNRP lawmakers for the foreign minister's intervention following reports from farmers in Memot district's Choam commune that three Vietnamese soldiers were among six Vietnamese nationals who killed their crops with chemicals on April 19.

While the farmers claim to have been cultivating the land for decades, Mr. Namhong said their crops had crossed over a border marker that was modified as part of a 2011 memorandum of understanding (MoU) between Cambodia and Vietnam.

**"Recently, in 2015, our citizens grew crops on 16.6 hectares of land on Vietnamese soil that caused Vietnam to react by spraying chemicals on our farmers' crops,"** Mr. Namhong wrote in the letter, dated Monday.

Mr. Namhong's assessment was on Wednesday refuted by opposition CNRP lawmaker Mao Monyvann, who said he visited the area recently, and would consider calling the foreign minister for questioning at the National Assembly.

**"I think that Hor Namhong's interpretation is just based on the maps made in 1982 or 1983 that were nullified by the Paris Peace Agreement [in 1991], as [the maps] were made while the Vietnamese controlled our country,"** Mr. Monyvann said.

Ky Tet, who claims he has been farming in the area since 1982, said that he and about 100 other villagers witnessed the six Vietnamese destroying their crops and managed to detain the three soldiers.

**"The three Vietnamese carrying**

**Continued to Page 21**

# លោកស្រី មូរ សុខហួរ នៅស្ងៀម អំឡុងការសាកសួរនៅតុលាការ

ដោយ ម៉ិច ដារ៉ា | MAY 12, 2015

លោកស្រី មូរ សុខហួរ សមាជិកសភាគណបក្សប្រឆាំងបានបដិសេធមិនឆ្លើយសំណួរទាំងអស់អំឡុងការសាកសួរនៅសាលាដំបូងរាជធានីភ្នំពេញកាលពីម្សិលមិញ ដោយបានប្រាប់ចៅក្រមត្រឹមតែថា លោកគ្មានសិទ្ធិកោះហៅលោកស្រីទេ ដោយសារលោកស្រីមានអភ័យឯកសិទ្ធិរួចផុតពីការផ្តន្ទាទោស។

កាលពីឆ្នាំមុន លោកស្រី មូរ សុខហួរ បានដឹកនាំយុទ្ធនាការមួយដើម្បីចូលទៅកាន់ទីលានប្រជាធិបតេយ្យក្នុងរាជធានីភ្នំពេញ អំឡុងការជាប់គាំងក្រោយការបោះឆ្នោតជាមួយគណបក្សប្រជាជនកម្ពុជា។ បន្ទាប់ពីការតវ៉ាបានប្រែក្លាយជាហិង្សាកាលពីថ្ងៃទី១៥ ខែកក្កដា លោកស្រីត្រូវបានចាប់ខ្លួនជាមួយសមាជិកសភាគណបក្សសង្គ្រោះជាតិប្រាំមួយរូបទៀត ដែលក្រោយមកអ្នកទាំងអស់ត្រូវបានចោទប្រកាន់ពីបទ **"ដឹកនាំកុបកម្ម"**។

បន្ទាប់ពីកិច្ចព្រមព្រៀងរវាងលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន និងលោក សម រង្ស៊ី មេដឹកនាំគណបក្សប្រឆាំង សមាជិកសភាគណបក្សសង្គ្រោះជាតិបានទទួលយកអាសនៈរបស់ខ្លួននៅក្នុងរដ្ឋសភា ហើយទទួលបានអភ័យឯកសិទ្ធិ។ ទោះជាយ៉ាងណា ចាប់តាំងពីពេលនោះមក សមាជិក

**តទៅទំព័រទី ១៨**

*លោកស្រី មូរ សុខហួរ ចូលមកតុលាការក្រុង ភ្នំពេញ កាលពីម្សិលមិញ។ ស៊ីវ ចាន់ណា*

# Mu Sochua Silent During Court Questioning

By Mech Dara | May 12, 2015

Opposition lawmaker Mu Sochua said she refused to answer all questions put to her during questioning at the Phnom Penh Municipal Court on Monday, telling the judge only that he had no right to summon her due to her parliamentary immunity from prosecution.

Last year, Ms. Sochua led a campaign to gain access to Phnom Penh's Freedom Park during the postelection standoff with the ruling CPP. After a protest turned violent on July 15, she was arrested along with six other CNRP lawmakers, who were all later charged with **"leading an insurrection."**

Opposition lawmaker Mu Sochua arrives for questioning at the Phnom Penh Municipal Court on Monday. (Siv Channa/The Cambodia Daily)

Following a deal between Prime Minister Hun Sen and opposition leader Sam Rainsy the next week, the CNRP lawmakers took their seats in the National Assembly and gained immunity. However, a number have since been summoned back to court for questioning over the July 15 incident.

Ms. Sochua-the most prominent of the arrested lawmakers-said outside the court Monday that she remained silent throughout her questioning after asking the judge why he was ignoring her parliamentary immunity.

**Continued to Page 18**

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសំរួលពីកាសារអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី

# សារមន្ទីរអាមេរិកប្រគល់រូបចម្លាក់ហនុមានឱ្យប្រទេសកម្ពុជា

ដោយៈ ម៉ិច ដារ៉ា និង គ្រិស ម៉ូល្លឺរ ។ May 11, 2015

បន្ទាប់ពីត្រូវគេលួចពីប្រាសាទកោះកេរ ក្នុងខេត្តព្រះវិហារ រូបចម្លាក់ហនុមានបានតម្កល់នៅឯសារមន្ទីរក្លេវឺឡែន ក្នុងសហរដ្ឋអាមេរិក អស់រយៈពេល៣៣ឆ្នាំ មុននឹងបញ្ជូនមកប្រទេសកម្ពុជាវិញ កាលពីម្សិលមិញ ។

រូបចម្លាក់ហនុមាន ដែលត្រូវបានលួចពីប្រាសាទកោះកេរ ក្នុងខេត្តព្រះវិហារ ត្រូវបានប្រគល់មកឱ្យប្រទេសកម្ពុជាវិញកាលពីថ្ងៃអាទិត្យ ក្រោយពីរយៈពេល៣៣ឆ្នាំជាទ្រព្យរបស់សារមន្ទីរសិល្បៈ ក្លេវឺឡិន នៅសហរដ្ឋអាមេរិក លោក ប្រាក់ ស៊ុនណារ៉ា អគ្គនាយកនៃអគ្គនាយកដ្ឋានបេតិកភណ្ឌ ក្រសួងវប្បធម៌ និងវិចិត្រសិល្បៈ បានបញ្ជាក់កាលពីថ្ងៃអាទិត្យថា រូបចម្លាក់នេះគ្រោងមកដល់កាលពីយប់មិញនៅអាកាសយានដ្ឋាន អន្តរជាតិភ្នំពេញ ។

លោកបានមានប្រសាសន៍ថា **"រូបចម្លាក់នឹងមកដល់នៅម៉ោង៨និង៣០នាទីយប់ ហើយរូបចម្លាក់នេះធ្វើក្នុងរចនាបថកោះកេរនាសតវត្សរ៍ទី១០ គេបានប្រគល់វាមកវិញពីអាមេរិក"** ។

លោកមិនអធិប្បាយបន្ថែមទេ តែបានប្រាប់ថា សន្និសីទព័ត៌មានផ្លូវការមួយស្តីពីរូបចម្លាក់នេះ នឹងត្រូវធ្វើនៅទីស្តីការគណៈរដ្ឋមន្ត្រីនៅថ្ងៃអង្គារ ។

យោងតាមវិបសាយរបស់សារមន្ទីរសិល្បៈក្លេវឺឡិន បានឱ្យដឹងថា រូបចម្លាក់ធ្វើពីថ្មភក់សតវត្សរ៍ទី១០នេះមានកម្ពស់ប្រហែល១១៦សង់ទីម៉ែត្រ និងទទឹង៥៤សង់ទីម៉ែត្រ អង្គុយលុតជង្គង់ មានដងខ្លួនជាមនុស្សនិងក្បាលស្វា ។

លោកស្រី អាន ឡឺម៉េស តំណាងអង្គការយូណេស្កូនៅកម្ពុជា បានមានប្រសាសន៍ថា ច្បាស់ណាស់រូបចម្លាក់នេះពីដើមឡើយនៅជាប់នឹងជើងទ្រ ប៉ុន្តែវាបានបាត់ពីទីនោះ នៅពេលបុរាណវត្ថុវិទូជីកកកាយរកឃើញជើងទម្រដែលរកមិនឃើញពីមុននៅក្នុងប្រាសាទចិននៃបរិវេណប្រាសាទកោះកេរកាលពីឆ្នាំមុន ហើយបានកំណត់ទីតាំងដាក់លាក់របស់រូបចម្លាក់នោះ ។

និយាយពីប្រាសាទចិន លោកស្រី ឡឺម៉េស បានមានប្រសាសន៍ថា **"ខ្ញុំគិតថា ភ័ស្តុតាងបញ្ជាក់ថា វាមកពីកន្លែងនោះ ពីព្រោះវាជាការផ្គូផ្គងជើងទម្រជាមួយរូបចម្លាក់នោះ"** ។

លោកស្រីបន្ថែមថា **"អង្គការយូណេស្កូ ពេញចិត្តជាខ្លាំងនិងដឹងគុណចំពោះសារមន្ទីរក្លេវឺឡិន ដែលយល់ព្រមប្រគល់វាមកវិញ"** ។

លោក គង់ វីរៈ ប្រធានសារមន្ទីរជាតិកម្ពុជា ក្នុងក្រុងភ្នំពេញ បានមានប្រសាសន៍ថា រូបចម្លាក់នេះនឹងត្រូវប្រគល់ទៅឱ្យសារមន្ទីរជាតិនៅថ្ងៃច័ន្ទ ហើយនឹងត្រូវតាំងបង្ហាញនៅទីនោះ ។

កាលពីខែឧសភាឆ្នាំមុន កាសែត The Plain Dealer របស់ក្លេវឺឡិន បានរាយការណ៍ថា លោកស្រី សុនីញ៉ា រី គីនតានីលឡា អ្នកអភិរក្សសិល្បៈឥណ្ឌានិងអាស៊ីអាគ្នេយ៍របស់សារមន្ទីរក្លេវឺឡិន បានធ្វើដំណើរមកប្រទេសកម្ពុជា ជាច្រើនខែមុននោះ ដើម្បីព្យាយាមកំណត់ ថាតើរូបចម្លាក់នេះមកពីប្រាសាទចិន មែនឬយ៉ាងណា ។

កាសែតនេះបានដកស្រង់សម្តី លោកស្រី គីនតានីលឡា ដែលនិយាយនៅពេលនោះថា **"ការងាររបស់យើងអំពីរូបចម្លាក់នេះ និងប្រភពដើមរបស់វាកំពុង ដំណើរការនៅឡើយ និងប្រើពេលវេលាច្រើន ប៉ុន្តែរហូតមកដល់ពេលនេះផ្អែកលើការស្រាវជ្រាវដល់ទីកន្លែងរបស់ខ្ញុំក្នុងប្រទេសកម្ពុជា កាលពីដើមឆ្នាំនេះ ខ្ញុំអាចរាយការណ៍ថា ខ្ញុំមិនបានរកឃើញភ័ស្តុតាងជាក់ស្តែងណាមួយដើម្បីបញ្ជាក់ថា ហនុមាននៅក្លេវឺឡិនមានប្រភពមកពីប្រសាទចិននោះទេ"** ។

ទាំងលោកស្រី គីនតានីលឡា ទាំងលោកស្រី ខារ៉ូលីន ហ្គូសស្កត់ អ្នកនាំពាក្យរបស់សារមន្ទីរ មិនបានឆ្លើយតបភ្លាមៗទៅនឹងសំណើសុំការពន្យល់ទេ ។

លោកស្រី ឡឺម៉េស បាននិយាយថា លោកស្រីមិនបានដឹងថាអ្វីដែលបានជំរុញឱ្យសារមន្ទីរនេះប្រគល់ រូបចម្លាក់នេះមកវិញនោះទេ ប៉ុន្តែវាមិនទាន់ដល់ពេលត្រូវស្នើសុំឱ្យប្រគល់ទេ មុនពេលជើងទម្របន្ថែមទៀតនៅប្រាសាទនោះត្រូវបានរកឃើញកាលពីឆ្នាំ មុននោះ ។

លោកស្រីបាននិយាយថា **"ខ្ញុំគិតថា យើងមិនអាចស្នើសុំពិតប្រាកដ ដោយគ្មានការបញ្ជាក់ភ័ស្តុតាងឡើយ"** ៕ និត

# Looted Statue Officially Returned to Cambodia

By Chris Mueller | May 13, 2015

Nearly five decades after a centuries-old statue of the Hindu monkey god



*Apsara dancers perform at the Council of Ministers Tuesday during a ceremony celebrating the return to Cambodia of a looted 10th century statue of the Hindu monkey god Hanuman. (Siv Channa/The Cambodia Daily)*

Hanuman was looted from a temple in Cambodia, the Cleveland Museum of Art officially handed it over to the government Tuesday during a ceremony at the Council of Ministers building.

Once part of a depiction of an epic battle between two other monkey deities, the statue was carved in the 10th century and housed at Preah Vihear province's Prasat Chen temple, which was built as part of the one-time Khmer Empire capital of Koh Ker.

It is believed that thieves severed the sandstone statue from its base some time in the 1960s.

Evidence uncovered late last year by the Cleveland Museum showed that the statue's head and body were offered for sale in Bangkok in 1968 and 1972, respectively, according to a statement posted to the museum's website on Monday.

This new information suggested that the statue was illegally taken out of Cambodia in the late 1960s, Cleveland Museum director William Griswold said Tuesday in an interview at the National Museum in Phnom Penh.

"We had established the piece had appeared for the first time on the art market in Asia during the early years of civil unrest in Cambodia," he said.

After leaving Thailand, the statue made its way to New York, where in 1982 the museum bought it.

Sonya Rhie Quintanilla, the Cleveland Museum's curator of Indian and Southeast Asian art, who joined Mr. Griswold at the National Museum, said she began an investigation into the statue's provenance in 2013 after seeing reports that its pedestal had been found at Prasat Chen.

Then, in January 2014, she traveled to the temple with a mold of the Hanuman to see if the base had indeed been found.

"So I checked…and was able to determine nothing that had been excavated at that time could actually be shown to have been part of the Cleveland Hanuman," she said.

Five months later, a government excavation began at the temple and additional pedestals were found, including the Hanuman's true base, said Kong Vireak, the director of the National Museum.

"We needed hard evidence to be sure it was looted and, with Hanuman, the base matched the statue," he said.

Mr. Griswold said that when he visited Cambodia in February he was informed of the match and discussions immediately began for the statue's return.

Starting Wednesday, the National Museum will exhibit the Hanuman along with another statue it was originally displayed with at the temple.

# លីនដា សូភាព ស៊ូ ទៅធ្វើការនៅឧទ្យានប្រវត្តិសាស្ត្រជាតិ


លិនដា សូភាព ស៊ូ

ខ្មែរផុស ស.រ.អា.

នាយកប្រតិបត្តសមាគម **"អង្គរ"** លិនដា សូភាព ស៊ូ ទើបនឹងមានការងារថ្មីមួយ គឺទទួលការតែងតាំងកាលពីថ្ងៃ ២៨មេសា២០១៥ នៅក្នុងក្រុមអ្នកគ្រប់គ្រងឧទ្យានប្រវត្តសាស្ត្រជាតិ "National Historical Park" ជា **"នាយកបកប្រែភាសានឹងអប់រំ"** ។

សេចក្ដីសម្រេចចិត្ត បញ្ចូល លិនដាសូភាព ស៊ូ ទៅក្នុងក្រុមអភិបាល ដោយសារ លីនដា មានចំណេះនឹងជំនាញ ជាអ្នករៀបចំសហគមនិ នឹងជាអ្នករៀបចំអ្នកគ្រប់គ្រងអង្គការ ដែលជំនាញនេះនឹងជួយដល់ឱទ្យានជាតិដែលធ្លាប់តែផ្ដល់សេវាច្រើនឆ្នាំមកហើយនឹងបន្តរទៅទៀត នៅឡូវែលនេះ នេះជាសម្ដីប្រធានស៊ុព័រអាំងតិនដិន ស៊ីឡែស ប៊ីណាដូ។ រីឯលោកស្រីអគ្គនាយក ឪរកាស គ្រីតសាយតូ នៃមជ្ឈមណ្ឌលសុខភាពសហគមន៍ បានបន្ថែមថា ការតែងតាំងនេះប្រាកដជានឹងនាំឱ្យមានទំនាក់ទំនងយ៉ាងមាំរវាង ទីក្រុង មណ្ឌលសុខភាព នឹងឱទ្យាន នឹងអាចបង្កើតការងាររួមគ្នាបានទៀតផង។ លោកស្រីបន្តរថា យកទេពកោសល្យលីនដា មកចូលរួមគឺជាផ្លូវមួយទៀតដែលលើកដំកើងរួមគ្នា នូវសុខភាពប្រសើរឡើងនៅឡូវែល។

ឆ្នាំ២០១៣ ឱទ្យានប្រវត្តិសាស្ត្រជាតិនៅឡូវែល នឹងមជ្ឈមណ្ឌលសុខភាពសហគមន៍ បានរកឃើញថាទាំង២អង្គភាព បានត្រូវផ្ជាប់គ្នាដោយផ្លូវនឹងស្ពានអមព្រែកជីក កែរលំអលំនៅឋានថ្មីនៅអតីតរោងចក្រដំបាញ ធ្វើមានមនុស្សមាំមួនឬអ្នកជម្ងឺ ដើរកំសាន្ត លំហែរកាយ ដែលការិយាល័យសហព័ន្ធសុខភាពជនជាតិភាគតិច វាយតម្លៃថា គឺជាគុណភាពកីឡាក្នុង៥ខ្ពស់បំផុត នៃមណ្ឌលសុខភាពសហគមន៍នៅស.រ.អា.នេះដែលបានផ្ដល់ការថែរទាំសុខភាពដោយផ្លូវវប្បធមិ។

**សូមជូនពរ លីនដា សូភាព ស៊ូ នូវជោគជ័យក្នុងកិច្ចការងារថ្មីនេះ ។**



ឧទ្យានប្រវត្តិសាស្ត្រជាតិ
មជ្ឈមណ្ឌលសុខភាពសហគមន៍

# ពេជ្រ ទុំក្រវិល ចូលមរណភាពក្នុងជន្មាយុ៧១ឆ្នាំ



ខ្មែរផុស ស.ហ.អា

សិល្បករនិពន្ធ ដឹករឿងសម្ដែងនឹងជាគ្រូបង្ហាត់ដ៏ល្បីឈ្មោះនៅសាលករិទ្យាល័យវិចិត្រសិល្បតាំងពីឆ្នាំ១៩៦០ បានលាលោកនេះដោយជម្ងឺ កាលពីថ្ងៃសុក្រទី១៥ឧសភា២០១៥ នៅទីក្រុងភ្នំពេញ។ រឿងល្ខោនដែលធ្វើឱ្យលោកមានកេរឈ្មោះល្បីជាប្រវត្តសាស្ត្រ គឺក្នុងរឿង"ទុំទាវ" ដែលលោកទុំក្រវិលជាអ្នកនិពន្ធឱ្យទៅជារឿងល្ខោនយីកេផង ជាអ្នកដឹករឿងផង នឹងជាតួឯងសម្ដែង "នេនទុំ"ផង។ ជាសិស្សជំនិត របស់ព្រឹទ្ធាចារ្យ ឆេង ផុន ដែលបានក្លាយជារដ្ឋមន្ត្រីក្រសួងវប្បធមិ នៃរបបកម្ពុជាប្រជាមានិត លោក ពេជទុំក្រវិល នៅដើរតាមគន្លងគ្រូរបស់លោក បំពេញការងារជំនាញប្ដើមជីវិតសិល្បនឹងវប្បធមិខ្មែរសាជាថ្មី បន្ទាប់ពីរបបខ្មែរក្រហមរំលាយខ្ទេចខ្ទីអស់ជំនួសឱ្យលោកព្រឹទ្ធាចារ្យជាប់រវល់ដោយកិច្ចការនយោបាយ ។

មិនត្រឹមតែប៉ុណ្ណោះ ឆ្នាំ១៩៩៧ លោកជាអ្នកកាសែតក្នុងតួនាទីអនុប្រធានវិទ្យុអាស៊ីសេរីផ្សព្វផ្សាយទំព័រប្រវត្តិសាស្ត្រច្រើនរយភាគពីសហរដ្ឋអាមេរិក។ បន្ទាប់មកឆ្នាំ១៩៩៩ លោកទៅកាន់ដំណែងក្នុងរដ្ឋាភិបាល ជាអនុរដ្ឋលេខាធិការក្រសួងវប្បធមិ ។ លោកជាអ្នកស្រាវជ្រាវសរសេរសៀវភៅក្បួនសំដែងល្ខោន ចម្រៀងរបាំប្រពៃណី នឹងគ្រឿងដូរ្យតន្ត្រី ជាច្រើនក្បាលដំកល់បន្សល់ទុកឱ្យមនុស្សជំនាន់ក្រោយបានដឹងពីវប្បធមិរបស់ជាតិសាស្ត្រខ្លួនរួចជាស្រេច។

ថ្វីត្បិតតែមានតួនាទីសំខាន់ នឹងបំពេញការងារបានផ្លែផ្កាជូនជាតិ ក៏គ្រួសារលោកពេជ្រទុំក្រវិលមានជីវភាពទន់ទាប ដោយសារភាពស្មោះត្រង់ សុច្ចរិត នឹងមិនប្រកាន់បក្សពួកជាធំរបស់លោក ។ ភរិយារបស់លោក ជាបុត្រីព្រះអង្គម្ចាស់ នរោត្តម កន្ថុល អតីតនាយករដ្ឋមន្ត្រីខ្មែរ ជាមួយគ្នា លោកមានកូនប្រុសស្រី៥នាក់ ជាគ្រួសារថ្លៃថ្នូរមានកិត្តិយសគ្រប់គ្រាន់៕



## តមកពីទំព័រទី ១៥ លោកស្រី មូរ សុខហួរ នៅស្ងៀម អំឡុង...

មួយចំនួនត្រូវបានកោះហៅទៅសាកសួរនៅតុលាការជុំវិញហេតុការណ៍កាលពីថ្ងៃទី១៥ ខែកក្កដា។

លោកស្រី មូរ សុខហួរ ជាសមាជិកសភាដំផ្ទើមមួយរូបក្នុងចំណោមសមាជិកសភាដែលត្រូវបានចាប់ខ្លួន បានមានប្រសាសន៍នៅខាងក្រៅតុលាការកាលពីម្សិលមិញថា លោកស្រីនៅតែមិនឆ្លើយអំឡុងការសាកសួរ បន្ទាប់ពីសួរចៅក្រមថាតើហេតុអីបានជាលោកមិនយកចិត្តទុកដាក់នឹងអភ័យឯកសិទ្ធិសភារបស់លោកស្រី។

លោកស្រី មូរ សុខហួរ បានមានប្រសាសន៍សំដៅដល់មាត្រាក្នុងរដ្ឋធម្មនុញ្ញដែលផ្តល់អភ័យឯកសិទ្ធិ និងលក្ខខណ្ឌដែលក្នុងនោះអាចត្រូវបានដកថា **"ខ្ញុំបានសួរតុលាការ លោក កែវ មុនី ចៅក្រមស៊ើបសួរថា មុនពេលកោះហៅរូបខ្ញុំថាតុលាការត្រូវអនុវត្តតាមមាត្រា៨០"**។

លោកស្រីបានបន្ថែមថា **"ចៅក្រមរូបនោះបានប្រាប់ខ្ញុំថា គាត់មានសិទ្ធិមិនឆ្លើយសំណួររបស់ខ្ញុំ។ មាន១០ ឬប្រហែល១១ឬ១២សំណួរឯណោះទាក់ទងនឹងការតវ៉ាកាលពីថ្ងៃទី១៥ ខែកក្កដា ឆ្នាំ២០១៤ នៅទីលានប្រជាធិបតេយ្យ"**។

លោកស្រីបានមានប្រសាសន៍ថា **"ដោយសារតុលាការមិនបានអនុវត្តតាមមាត្រា៨០ ស្តីពីនីតិវិធីក្នុងការកោះហៅសមាជិកសភានោះ ដូច្នេះហើយខ្ញុំមានសិទ្ធិមិនឆ្លើយតបនឹងសំណួរដែលតុលាការបានសួរ"**។

នៅពេលត្រូវបានសួរថា តើអ្វីដែលលោកស្រីគិតថានឹងកើតឡើងបន្ទាប់ពាក់ព័ន្ធករណីប្រឆាំងលោកស្រី និងសមាជិកសភាដទៃទៀតនោះ លោកស្រី មូរ សុខហួរ បានមានប្រសាសន៍ត្រឹមតែថា លោកស្រីបានស្នើឱ្យមានការលើកលែងករណីនេះ។

លោកស្រីបានមានប្រសាសន៍ថា **"ខ្ញុំមិនដឹងទេ ប៉ុន្តែខ្ញុំមានសំណូមពរពីរចំពោះតុលាការនៅថ្ងៃនេះ...។ ទី១ តុលាការត្រូវអនុវត្តតាមច្បាប់រដ្ឋធម្មនុញ្ញ។ សំណូមពរទី២ គឺថាតុលាការត្រូវលើកលែងការចោទប្រកាន់មកលើរូបខ្ញុំដែលជាសមាជិកសភាមួយរូប"**។

លោកស្រីបានបន្ថែមថា **"តុលាការមិនបានឆ្លើយតបនឹងសំណូមពរទាំងនេះទេ"**។ ចៅក្រម កែវ មុនី មិនអាចទាក់ទងបានទេកាលពីម្សិលមិញ។

យោងតាមមាត្រា៨០ នៃរដ្ឋធម្មនុញ្ញ សមាជិកសភាអាចត្រូវបានដកអភ័យឯកសិទ្ធិរបស់ខ្លួនដោយសំឡេងឆ្នោតដាច់ខាតពីរភាគបីនៃសមាជិកសភា។ សមាជិកសភាបច្ចុប្បន្នមាន៦៨រូបមកពីគណបក្សប្រជាជនកម្ពុជា និង៥៥រូបមកពីគណបក្សសង្គ្រោះជាតិ ដោយមិនមានគណបក្សណាមួយមានសំឡេងភាគច្រើនដាច់ខាតឡើយ៕

សារុន

Continued from page 15

## Mu Sochua Silent During Court Questioning...

**"I asked the court-the investigating judge, Keo Mony-that before summoning me, the court has to implement Article 80,"** Ms. Sochua said, referring to the article of the Constitution that affords lawmakers immunity and provides conditions on which it can be revoked.

**"The court [judge] told me that he had the right not to answer my question,"** Ms. Sochua said. **"There were 10 questions, or about 11 or 12 questions, concerning July 15, 2014, at Freedom Park."**

**"Due to the court failing to implement Article 80 on the procedure for summoning a lawmaker, I therefore had the right not to answer the questions asked by the court,"** she said.

Asked what she thought would happen next with the case against her and the other lawmakers, Ms. Sochua said only that she requested to have it dropped.

**"I do not know, but I had two requests to the court today…. [First,] the court must implement constitutional laws,"** she said. "The second request was that the court drops all charges against me-a lawmaker."

Judge Mony could not be reached Monday.

According to Article 80 of the Constitution, a lawmaker can only have their immunity stripped by a two-thirds majority vote of the National Assembly. The current Assembly comprises 68 CPP and 55 CNRP lawmakers, affording neither party such a majority.

# គណបក្សសង្គ្រោះជាតិ គ្រោងធ្វើសិក្ខាសាលា ស្តីពីជំនាញក្នុងការដឹកនាំ

## Public Narrative Workshop for CNRP member

ខ្មែរផុសស.រ.អា.

**ឡូវែល:** គណបក្សសង្គ្រោះជាតិ បានចេញលិខិតអញ្ជើញសមាជិកសមាជិការបស់ខ្លួនឱ្យមកចូលរួមក្នុងសិក្ខាសាលាមួយស្តីអំពី **"ជំនាញក្នុងការដឹកនាំ"** ដែលនឹងប្រព្រឹត្ត ទៅនៅភោជនីយដ្ឋានសំពៅមាសថ្ងៃទី ៣១ខែឧសភាឆ្នាំ២០១៥ ចាប់ពីម៉ោង ៩ព្រឹក ដល់ ម៉ោង៥ល្ងាច ។



**អ្នកបកប្រែភាសាក្នុងពេលសិក្ខាសាលាគឺ លោក មួង ណារ៉េត**

**កំណត់អ្នកចូលរួម មានចំនួន ២៥រូប**

សូមឱ្យទាក់ទងទៅលោក ប៉ែន សុខផល លេខ ៩៧៨-៣៤៩ ១៧៧២

ឬទៅលោក មួង ណារ៉េត លេខ ៩៧៨-៤២៧ ៩៥ ៣៨គ្រូបង្ហាត់ គឺ ល័ររ៉េ ដេវូលពីល្យេ ហៅ **"វូប"** Laure DeVulpillieres "Voop" ដែលស្ម័គ្រចិត្តមកជួយបើកវគ្គ បង្ហាត់បង្រៀន **"ជំនាញក្នុងការដឹកនាំ"** ដើម្បីឱ្យបក្សសង្គ្រោះជាតិចេះវិធី ជ្រើសរើសសមាជិកសមាជិកាថ្មី បន្ថែមនឹងរបៀបរៃអង្គាស រកមូលនិធិ ដើម្បីបង្កើនឥទ្ធិពលនយោបាយរបស់បក្ស។

**"វូប"** ជាគ្រូបង្ហាត់នឹងស្រាវជ្រាវខាងជំនាញដឹកនាំមកពីសកលវិទ្យាល័យ **"ហាវឺត"** ធ្លាប់ធ្វើការបង្ហាត់បង្រៀនបែបនេះ ច្រើនដង ហើយក៏ធ្លាប់ទទួលរង្វាន់កោតសរសើ **"ឧត្តម"** ពីនាយកសាកលវិទ្យាល័យ ដោយសារការបង្ហាត់បង្រៀននិស្សិតផងដែរ ។

**Contact person: Sokphal Pen 987-349 1772 or NarethMuong 978- 427 9538**

---

តមកពីទំព័រទី ១៣ ខ្មែរដំបូងគេដែលបានកសាងផ្សារប៉ៃលិន...



មកខ្លួនឯង ខ្ញុំក៏សុខចិត្ត ដើម្បីយកមកទាល់តែកាត់ជាពាកង់ ទើបដាក់ **"កុងតេន័រ"** ចុះ យើងទិញទូកតូច១បន្ថែមជំនួន៤ទៀត ទិញស៊ីក្លូ១០ទៀតយកមកតាំងដង្ហែរនៅឡូវែល...

**ខ្មែរផុស** តើពេលនោះហើយឬដែលសមាគមន៍ ផ្តើមមានបញ្ហា ដោយប្រើរបស់លោក ហ៊ុន សែន មែនទេ?

**ប៊ុនរិទ្ធ ឡាច** អត់មានអីទាំងអស់! ពីព្រោះខ្ញុំឥតធ្វើនយោបាយ ខ្ញុំមិនចូលខាងណាទាំងអស់ គិតតែជួយសមាគមឱ្យបានរីកចំរើនតែប៉ុណ្ណោះ មានទាំងគេឱ្យប៊ុលឌីងធំមួយ គឺ **"ខនវ៉េយ"** ជាអ្នកឱ្យ យើងមានថវិការដល់រាប់លាន សម្រាប់កិច្ចធ្វើការសមាគមនេះ អុំទូកម្តង១មានមនុស្សមក ៥-៦ម៉ឺននាក់ អ្នកនយោបាយគេចូលចិត្តយើង ឱ្យតែមានបុណ្យ ពីធីអ្វី គេអញ្ជើញយើងទៅគ្រប់កន្លែង... តែដល់គេមកក្រោយ១មក ក៏បាត់បង់របស់របរអស់ បាត់ទាំងផ្ទះ ទាំងលុយកាក់ ខ្ញុំមិនដឹងទេ...

**ខ្មែរផុស** តើលោកចប់អាណត្តសមាគមនៅឆ្នាំណា?

**ប៊ុនរិទ្ធ ឡាច** ឈប់ធ្វើប្រធានសមាគមនៅឆ្នាំ២០០៣

**ខ្មែរផុស** តើលោកពេញចិត្តនឹងកិច្ចការសង្គម ដែលបានធ្វើហើយនោះដែរឬទេ?

**ប៊ុនរិទ្ធ ឡាច** ស្តាយ! ស្តាយចំពោះការងារដែលធ្វើបានធំដំណាស់ហើយ តែបាត់បង់ទៅវិញ ឧទាហរណ៍នៅ សង់ទ័រអារីណា នៅសមាគមធ្វើអ្វីក៏ត្រូវតែចូលរួមនឹងក្រុមនយោបាយ នៅស្រុក នេះចូលរួមតុសំខាន់១ **"ហ្វានរេសីញ"** ស្រោមសំបុត្រនិមួយ១២ពាន់ដុល្លា នឹកចង់បានក្លោងទ្វារក្រុងខ្មែរ តែទាំងអស់ក្លាយជាអតីតកាលទៅហើយ...

**ខ្មែរផុស** ត្រឡប់ទៅមើលអតីតវិញ ខ្ញុំចង់ដឹងថាតើលោកមានជាប់របបខ្មែរក្រហមទេ?

**ប៊ុនរិទ្ធ ឡាច** នៅជាប់មួយចប់! ពេលជំនាន់សាធារណរដ្ឋឆ្នាំ១៩៧០ ខ្ញុំរៀនសាលានាយទាហ៊ាននៅបែកចាន ដល់ចេញពីបែកចានក៏ទៅកាន់នៅ **"កុម្មងជង់ត្រង់"** គឺខាងបញ្ជូនសារ ។ ពេលខ្មែរក្រហមចូលមកដល់ ខ្ញុំជន្លៀសខ្លួនទៅកោះធំ ខេត្តកណ្តាល ទៅជិតមាត់ជ្រក ស្រុកយួន

**ខ្មែរ ផុស** តើបំរុងរត់ចេញទៅស្រុកយួនឬ? ហើយពេលនោះបានជួបមានគ្រួសារហើយឬនៅ?

**ប៊ុនរិទ្ធ ឡាច** ខ្ញុំគ្មានគំនិតរត់ទាល់តែសោះ... គ្រួសារឪពុកម្តាយខ្ញុំនៅខាងហ្លួងទាំងអស់

**ម៉ាលី ថៃ** យើងជាអ្នកស្រុកកំណើតជាមួយគ្នា... ពេលនោះគេសង្ស័យគាត់ថាជាមន្ត្រី ឬជាទាហ៊ាន គេឃុំគាត់នៅផ្ទះឪពុកគាត់...

**ខ្មែរផុស** តើគេសង្ស័យរឿងអ្វីទៅ ?

**(សូមអញ្ជើញតាមដាន ភាគ៣ ជាបន្តទៀតនៅលេខក្រោយ)**





តមកពីទំព័រទី ១៤

## ការនាំចេញស្ករសទៅកាន់សហភាពអឺរ៉ុប...

ឱ្យពួកគាត់ធ្លាក់ខ្លួនចូលក្នុងភាពក្រីក្រ និងជំពាក់បំណុលគេ។ **"យុទ្ធនាការស្ករស្អាតស្អំ"** របស់អង្គការសិទ្ធិមនុស្សជំរុញឱ្យក្រុមហ៊ុន និងអតិថិជនក្រៅប្រទេសកុំទិញស្ករសពីប្រទេសកម្ពុជា។

ទោះបីជាសហភាពអឺរ៉ុបបានច្រានចោលការអំពាវនាវឱ្យមានការបញ្ចប់ពាណិជ្ជកម្មស្ករសជាមួយប្រទេសកម្ពុជាក៏ដោយ តែលោក អ៊ាង វុទ្ធី ប្រធានអង្គការសមធម៌កម្ពុជាដែលកំពុងជួយគ្រួសារដែលត្រូវបានគេបណ្តេញចេញពីផ្ទះសំបែង និងដីស្រែចម្ការ ដោយក្រុមហ៊ុនចម្ការអំពៅនោះជឿជាក់ថា ការធ្លាក់ចុះនៃការនាំចេញក្នុងឆ្នាំ២០១៤ គឺដោយសារតែយុទ្ធនាការនេះ។

លោកបានមានប្រសាសន៍ថា **"វាគឺដោយសារតែ គេដឹងច្រើនអំពីបញ្ហាស្ករសនៅក្នុងប្រទេសកម្ពុជា ហើយអ្នកទិញមានការប្រុងប្រយ័ត្នកាន់តែច្រើនជាងមុន"**។

លោកបានគូសបញ្ជាក់ថា ជាភ័ស្តុតាងជាក់ស្តែង ក្រុមហ៊ុន Tate & Lyle ដែលជាក្រុមហ៊ុនស្ករសដ៏ធំរបស់អង់គ្លេសបានសម្រេចឈប់ទិញស្ករសពីកម្ពុជាកាលពីពីរបីឆ្នាំមុននេះ ហើយថាក្រុមហ៊ុនរបស់ប្រទេសអូទ្រីសមួយបានប្រាប់លោកកាលពីឆ្នាំមុនថា ខ្លួនក៏នឹងឈប់នាំចូលស្ករសពីកម្ពុជាដែរដោយសារបញ្ហាដ៏ចម្រូងចម្រាសនេះ។ រដ្ឋាភិបាលកម្ពុជាបានលើកឡើងថា បញ្ហាជុំវិញ **"ស្ករឈាម"** ក៏ជាមូលហេតុដែលធ្វើឱ្យក្រុមហ៊ុន Mitr Phol របស់ប្រទេសថៃបានបោះបង់ចោលចម្ការអំពៅចំនួនបីរបស់ខ្លួននៅកម្ពុជាក្នុងពេលថ្មីៗនេះដែរ។

លោក វុទ្ធី បានមានប្រសាសន៍ដោយសំដៅលើការធ្លាក់ចុះនៃការនាំចេញស្ករសថា **"សកម្មភាពទាំងអស់នេះបានធ្វើឱ្យមានការឈប់ទិញដូច្នេះ ហើយវានឹងមានផលប៉ះពាល់កាន់តែច្រើន ប្រសិនបើក្រុមហ៊ុនមិនព្រមចាត់វិធានការណាមួយដើម្បីរកដំណោះស្រាយជូនគ្រួសាររងគ្រោះនោះ"**។

ទោះបីជាសហភាពអឺរ៉ុបបានបដិសេធមិនព្រមបញ្ចប់ពាណិជ្ជកម្មនេះក្តី តែខ្លួនកំពុងចរចាជាមួយក្រសួងពាណិជ្ជកម្មជាងមួយឆ្នាំមកហើយទាក់ទិននឹងផែនការដ៏លម្អិតមួយ ដែលនឹងជួយគ្រួសារជនរងគ្រោះឱ្យវិលត្រឡប់ទៅរកជីវភាពដូចមុនពេលក្រុមហ៊ុនចម្ការអំពៅចាប់យកដីធ្លីរបស់ពួកគាត់វិញ។

លោក វុទ្ធី បានលើកឡើងទៀតថា អ្នកជំនាញចំនួនពីររូបដែលសហភាពអឺរ៉ុបបានជួលកាលពីដើមឆ្នាំនេះដើម្បីជួយនៅក្នុងផែនការនេះបានចុះទៅត្រួតពិនិត្យតំបន់មានជម្លោះបានមួយភាគធំ ហើយបានបញ្ចប់ការសិក្សារបស់ខ្លួនដែលឥឡូវនឹងត្រូវប្រើប្រាស់ដើម្បីតាក់តែងច្បាប់ពាក់ព័ន្ធនឹងការផ្តល់សំណង។

លោក ហ្សង់ហ្វ្រង់ស័រ កូតាំង ឯកអគ្គរដ្ឋទូតសហភាពអឺរ៉ុបប្រចាំប្រទេសកម្ពុជាបានលើកឡើងកាលពីម្សិលមិញថា លោករំពឹងថា រដ្ឋាភិបាលនឹងធ្វើសេចក្តីសម្រេចជាចុងក្រោយលើច្បាប់នេះនៅប៉ុន្មានសប្តាហ៍ខាងមុខ៕

ស៊ុយឈាង

Continued from page 14

## Sugar Exports to Europe Drop After Peak Year...

**are more careful,"** he said.

As proof, he noted U.K. sugar giant Tate & Lyle's decision to stop buying from Cambodia a few years ago, and said an Austrian company told him last year that it would also stop importing sugar from Cambodia because of the controversy. The Cambodian government said the stigma around **"blood sugar"** is also why Thailand's Mitr Phol recently gave up its three sugarcane plantations in the country.

**"All of this activity has caused this,"** Mr. Vuthy said, referring to the falling exports, **"and it will have even more impact if companies do not do anything to find a solution for the families."**

Though the E.U. has refused to end the trade benefits, it has been in negotiations with the Commerce Ministry for over a year on a comprehensive plan that would return families to the living standards they had before the sugarcane plantations took over their land.

Mr. Vuthy said a pair of experts the E.U. hired earlier this year to help with the plan have visited most of the disputed areas and finished their study, which will now be used to draw up the rules for compensation.

The E.U.'s ambassador to Cambodia, Jean-Francois Cautain, said Tuesday that he expected the government to finalize the rules in a matter of weeks.

តមកពីទំព័រទី ១៥

# រដ្ឋមន្ត្រីក្រសួងការបរទេសអះអាងថា...

**ផ្អែកលើផែនទីឆ្នាំ១៩៨២ ឬ១៩៨៣ប៉ុណ្ណោះ ដែលត្រូវបានច្រានចោលដោយកិច្ចព្រមព្រៀងសន្តិភាពក្រុងប៉ារីស ពីព្រោះផែនទីនេះត្រូវបានគូរខណៈដែលវៀតណាម បានគ្រប់គ្រងប្រទេសរបស់យើង"** ។

លោក គី ទេត អាយុ៤៧ឆ្នាំ ជាកសិករដែលអះអាងថា លោកបានធ្វើស្រែចម្ការលើដីនេះចាប់តាំងពីឆ្នាំ១៩៨២មកបានមាននិយាយថា លោកនិងអ្នកភូមិប្រហែល១០០នាក់ទៀតបានឃើញក្រុមនេះបំផ្លាញដំណាំ ហើយឃាត់ខ្លួនបានទាហានបីនាក់។

លោក ទេត បាននិយាយថា **"ទាហានវៀតណាមបីនាក់ស្ពាយធុងថ្នាំគីមីបីធុងរត់គេចខ្លួន ប៉ុន្តែយើងឃាត់ខ្លួនពួកគេបានបីនាក់រយៈពេលជាងមួយម៉ោង"**។ លោកបានបន្ថែមថា នគរបាលមូលដ្ឋានបានបញ្ចុះបញ្ចូលក្រុមអ្នកភូមិអនុញ្ញាតឱ្យទាហានប្រដាប់អាវុធទាំងនេះរួចខ្លួន ដោយសន្យាជួយដោះស្រាយបញ្ហានេះ។

លោក ទេត បានសម្តែងការរិះគន់ជុំវិញលិខិតរបស់លោក ហោ ណាំហុង ដោយនិយាយ-ថា **"លោកសន្និដ្ឋានទាំងងងឹតងងល់"** ថា ដីនេះជារបស់វៀតណាម។

អ្នកភូមិម្នាក់ទៀតឈ្មោះ អ៊ឹម ឃ្លោក ដែលមានដីទំហំ២ហិកតាដាំពោត សណ្តែក និងស្រូវត្រូវបានបំផ្លាញនោះ ក៏បានរិះគន់លិខិតនេះដែរ។

លោកបានមានប្រសាសន៍ថា **"ការបកស្រាយរបស់លោក ហោ ណាំហុង ថា ដីរបស់យើងស្ថិតនៅលើដីរបស់វៀតណាមនោះ ដូចជាគាត់ចាក់សម្លាប់ខ្ញុំអ៊ីចឹង□។ យើងបានធ្វើស្រែចម្ការលើដីនេះមុន និងក្រោយការដួលរលំនៃរបបខ្មែរក្រហមម្ល៉េះ វាជាដីរបស់ខ្ញុំ មិនមែនជាដីរបស់វៀតណាមទេ"**។

លោកបានបន្ថែមថា **"ប្រហែលជាដោយសារដំណាំដែលត្រូវបានបំផ្លាញនេះ មិនមែនជារបស់គាត់ បានជាគាត់និយាយបែបនេះ"**។

លោក ម៉ៅ ពៅ ស្នងការនគរបាលខេត្តត្បូងឃ្មុំ បានមានប្រសាសន៍ថា វាមិនច្បាស់ថាតើដីដែលមានវិវាទនេះជារបស់ប្រទេសណានោះ ដោយសារមិនទាន់មានការបោះបង្គោលព្រំដែន។

លោកបានមានប្រសាសន៍ថា **"ចន្លោះបង្គោលព្រំដែនលេខ៩៤ និង៩៥ មិនមានការបោះបង្គោលព្រំដែនបណ្តោះអាសន្នទេ។ ជួនកាលនេះក៏ជាមូលហេតុដែលតាមចោទថា កសិករវៀតណាមដាំដំណាំនៅលើដីរបស់យើងផងដែរ"**។

គេមិនអាចទាក់ទងលោក ហោ ណាំហុង ដើម្បីសុំអត្ថាធិប្បាយបានទេ៕

សារុន

Continued from page 15

## Foreign Minister Says...

**three chemical tanks were able to flee, but we held three Vietnamese authorities for more than an hour,"** Mr. Ket said, adding that local police persuaded the villagers to let the soldiers go after promising to help settle the matter.

Im Khlauk said his two hectares of corn, bean and rice crops were completely destroyed.

**"Hor Namhong's account, stating that our land is located on Vietnam's soil, is like he's stabbing me to death,"** he said. **"We farmed the land before and after the fall of the Khmer Rouge."**

Provincial police chief Mao Pov said it was unclear which country the disputed land belonged to, due to poor border demarcation.

**"Between border marker numbers 94 and 95, no temporary border posts have been installed,"** he said. **"That is why sometimes Vietnamese farmers also supposedly grow crops on our soil."**

តមកទំព័រទី ៥ ឃ្លុំមាត់អ្នកប្រឆាំង...

ហ៊ុន សែន ជាសារៈខ្មែរដ៏ស្មោះត្រង់ គេនឹងជួបស្រវឹងអំណាចជាមួយគ្នា នៅឋាននរក។ សុខចិត្តឃ្លុំមាត់ មិននិយាយនេះទំនងជាគណបក្សសង្គ្រោះជាតិមើលឃើញថា ទទួលផលចំណេញច្រើនដល់ជាតិ នឹងដល់សមាជិកខ្លួន បានច្រើនជាងហារនិយាយ ហើយប្រឈមនឹងគ្រោះថ្នាក់ទៅវិញ ដូចជាដោះលែងអ្នកទោសនយោបាយបានយកដីសម្បទានពីឈ្មួញមកវិញបានខ្លះ ចាប់ខ្លួនអ្នកមន្ត្រីពុករលួយធំៗទៅធ្វើទណ្ឌកម្ម សភាជាតិមានដំណើរប្រសើរជាងមុន សមាជិករដ្ឋាភិបាល ឡើងជ្រុញឱ្យសភាសួរដេញដោល មានឱកាសជួយគាំទ្រវាស្ត្របះបោរ ពេលត្រូវគេរំលោភសិទ្ធ... ដែលពេលមុនៗ មានតែអ្នកធំបរទេសទេ ជាអ្នកធ្វើឱ្យ។ ចំណែកគណបក្សប្រជាជនវិញ ទំនងជាគិតថាខ្លួនត្រូវការពេលជាង២ឆ្នាំទៀត ដើម្បីរៀបចំក្រុមខ្លួនឡើងវិញ ពេលអត់ពីគ.ជ.ប.ដូចពេលមុននោះទៅ នេះរាប់ទាំងល្បិចបំបែកសន្លឹកឆ្នោតគួរបដិបក្សលួចសន្លឹកឆ្នោត? លើសពីនេះទៅទៀត គេអាចគិតទៅដល់ពេលចាញ់ឆ្នោត តើត្រូវធ្វើឱ្យខូចលទ្ធផលនៃការបោះឆ្នោត ឬក៏ខ្វាស់ការផ្ទេរអំណាចរបៀបណា? តើបង្ករចលនាបាតុកម្មរបៀបណា កុំឱ្យគណបក្សកាន់អំណាចធ្វើការកើត បង្ហែមពីនោះ តើនឹងរក្សាមិត្តរួមពុករលួយនៅក្នុងម៉ាស៊ីនរដ្ឋរបៀបណា?

ទស្សនខាងក្រោយនេះ គឺយោងទៅតាមទស្សនកន្ទុយខ្សៀន របស់លោក ហ៊ុន សែនតែម្នាក់ឯង ប្រកបដោយល្បិច ដែលដឹកនាំការបោះឆ្នោតនាឱកាសកន្លងមកហើយដែលទាំងនេះ វានឹងផ្តល់លទ្ធផលនឹងខុសពីពេលមុនៗ ពីព្រោះអីចាប់ពីពេលនេះតទៅ ពលរដ្ឋលែងខ្លាចគណបក្សប្រជាជន ដូចពេលមុនៗទៀតហើយៗក៏ពុំមែនលោក ហ៊ុន សែន នឹងកងកម្លាំងលោកទេ ដែលពិន័យចលនាប្រជារាស្ត្រនោះ គឺប្រជារាស្ត្រទេ ដែលកាន់តែជិតបោះឆ្នោតទៅ នឹងកាន់តែមានកម្លាំងពិន័យលោក ហ៊ុន សែន រឹតតែធ្ងន់ធ្ងរជាលំដាប់នោះ វានឹងនាំនូវការវិនាសដល់គណបក្សប្រជាជនទាំងមូល ទៅអនាគត។

តាមពិតទៅ ក្នុងរយពេល៣០ ៤០ឆ្នាំចុងក្រោយនេះ អ្នកជំនាន់ក្រោយគណបក្សប្រជាជនបានទទួលជីវភាពនឹងការអប់រំ ប្រសើរនឹងទំនើបជាងរៀមច្បងជំនាន់មុនរបស់គេ អ្នកជំនាន់ថ្មីទាំងនោះ មិនស្គាល់ទេការលំបាករបស់ប្រជារាស្ត្រនោះ! តែកំពុងតែរងគ្រោះធ្ងន់ណាស់ដែរ ពីព្រោះពួកគេប្រាកដជាគិតមិនដូចមនុស្សជំនាន់ចាស់ទេ មានខ្លះថែមទាំងខ្មាស់អៀននឹងទង្វើដ៏កំសាក នៃរៀមច្បងខ្លួនឯងទៀតផង។ អ្នកទាំងនោះ នឹងនឹកស្តាយចំពោះរៀមច្បងខ្លួន ដែលមិនបានប្តូរដៃឱ្យទាន់ពេលវេលា មិនព្រមពិចារណាទៅរកឱកាសដែលចាស់ៗត្រូវចូលនិវត្តន៍មុនពេល រហូតដល់មានថ្ងៃនេះ។

ជាការពិតណាស់ ថ្ងៃដែលបញ្ចប់សករាជ្យ ៧មករា បានមកដល់តាំងពីខែកក្កដា២០១៣ មកម្លេះ តាំងតែពីសម រង្ស៊ី កឹម សុខា ចាប់ដៃគ្នានៅ

តទៅទំព័រទី ២៤

Continued from page 5

## SILENCE THE OPPONENTS!...

supreme national interests. To that effect it might have to tone down its rhetoric because there are more advantages than the risks. Through the culture of dialogue political prisoners are freed. Some land concession contracts are revoked. Some corrupt government officials are punished. The national assembly proceeds more smoothly. More government senior officials are summoned to the assembly to answer questions put by the opposition Members of the Assembly. The newly elected parliamentarians have better chance in addressing concerns of the protesters who rights have been abused. This used to be the work of some powerful foreigners to handle it.

The Cambodian People's Party seems to know that it needs two years or more to regroup after the National Election Committee, which used to be under its control, was dismantled. With the old NEC, the CPP could manipulate everything including its dirty tricks to cheat, evil intention to divide its opponents and vote stealing.

On top of that the CPP might be thinking about how to hinder the transition of power when it loses the National Election in the future. The CNRP has a lot of things to do to make sure the CPP will recognize the election results. It will also have to look into how to stop the CPP from clinging on to power when the CPP loses the election. Another issue is how to maintain the CPP's people, who have been corrupt, to remain in the state apparatus.

The author's view is based on the cunningness and dirtiness of Hun Sen in his evil tricks to manipulate every previous election. However, from now on, Cambodians are no longer intimidated by the CPP. Hun Sen will be punished by the people. The closer the election days the more pressure Hun Sen feels as more people are joining to punish him. Soon the CPP will be annihilated.

Over the past 40 years the CPP's younger generations enjoy lavish lifestyle and better education. Unfortunately they don't appreciate the people's suffering. However the CPP is degenerating each day because the CPP's new generations do not share the same philosophy as those of the older CPP's generations. Some CPP's new generations even feel ashamed of the cowardice of their senior members. The CPP's younger generations are feeling sorry now that their senior members do not choose to retire and let the young people take the lead.

The 7 January commemoration came to an end since 2013. There was no longer

Continued to Page 24

## តមកពីទំព័រទី ១៤ គោឧសភរាជបរិភោគសណ្តែក និងពោត...

ភោគផលកសិកម្មទូទាំងប្រទេសកម្ពុជា នឹងបរិភោគអាហារណាខ្លះក្នុងចំណោមអាហារទាំង៧មុខ ដែលមានដូចជា ពោត សណ្តែក ស្រូវ ល្ង ទឹក ស្រា និងស្មៅ។

លោក កង កេន ប្រធានអាចារ្យព្រហ្មបុរោហិត និងហោរាប្រចាំព្រះបរមរាជវាំង បានប្រកាសទៅកាន់អ្នកចូលរួមប្រមាណ ១.000 នាក់តាមឧគ្ឃោសនសព្ទថា **"ឆ្នាំនេះ ដំណាំទាំងនោះនឹងទទួលបានទិន្នផលច្រើន"**។

ទោះជាយ៉ាងណា បើក្រឡេកមើលមួយភ្លែតទៅលើចំណូលចិត្តរបស់គោឧសភរាជក្នុងរយៈពេលប្រាំឆ្នាំមកនេះ ប្រហែលជាធ្វើឱ្យប្រជាកសិករពិចារណាឡើងវិញចំពោះការផ្លាស់ប្តូរមុខដំណាំតាមការទស្សន៍ទាយបែបនេះ។ ក្នុងឆ្នាំ ២០១៤ គោឧសភរាជបានបរិភោគពោត និងសណ្តែក ក្រោយមកក៏បរិភោគស្រូវបន្តិចបន្តួច។ នៅឆ្នាំ២០១៣ គោឧសភរាជបានបរិភោគពោត និងស្មៅ ហើយនៅឆ្នាំ២០១២ ២០១១ និង ២០១០ គោឧសភរាជសុទ្ធតែបរិភោគពោត និងសណ្តែក។

ប៉ុន្តែ ដោយសារតែពេលនេះជារដូវបង្កបង្កើតផលដំណាំស្រូវនៅក្នុងខេត្តមួយចំនួន ហើយភ្លៀងនឹងបង្អុរចុះមកក្នុងពេលឆាប់ៗនោះ ការចាប់អារម្មណ៍កាលពីម្សិលមិញ បានផ្តោតទៅលើដំណាំស្រូវដែលជាស្បៀងដ៏សំខាន់របស់ប្រទេសកម្ពុជា ដោយកសិករមួយចំនួនព្រួយបារម្ភចំពោះការទស្សន៍ទាយអំពីពេលអនាគតដោយគោឧសភរាជ។

លោក កង កេន បានមានប្រសាសន៍តាមទូរស័ព្ទជាក្រោយថា **"កុំបារម្ភរឿងគោមិនបរិភោគស្រូវអី។ គោទាំងនេះបរិភោគពោត និងសណ្តែកស្ទើរតែទាំងអស់ ដូច្នេះដំណាំទាំងនោះនឹងទទួលបានទិន្នផលខ្ពស់"**។

ប៉ុន្តែ សម្រាប់អ្នកស្រី អ៊ឹម សាឃឿន អាយុ៥៩ឆ្នាំ ដែលជាកសិករម្នាក់នៅក្នុងស្រុករតនមណ្ឌល ខេត្តបាត់ដំបងវិញ ទិន្នផលពោត និងសណ្តែកគ្មានន័យអ្វីទាំងអស់សម្រាប់គាត់ ដោយសារតែដីទំហំ៥ហិកតារបស់គាត់សុទ្ធតែប្រើសម្រាប់បង្កបង្កើនផលដំណាំស្រូវ។

អ្នកស្រីនិយាយថា **"ខ្ញុំព្រួយបារម្ភថា ដំណាំស្រូវនៅឆ្នាំនេះនឹងមិនទទួលបានទិន្នផលច្រើនទេ ដោយសារគ្មានទឹកគ្រប់គ្រាន់។ កាលពីឆ្នាំមុន ដំណាំស្រូវល្អូតលាស់បានល្អ ពីព្រោះភ្លៀងបានធ្លាក់នៅដើមឆ្នាំ និងកណ្តាលឆ្នាំ។ ប៉ុន្តែ ឆ្នាំនេះ ភ្លៀងមិនទាន់ចាប់ផ្តើមធ្លាក់ទេ។ ទន្ទឹមនឹងនេះ ឱ្យនៅឆ្នាំនេះឧ គោក៏មិនស៊ីស្រូវទៀត"**។

អ្នកស្រីជឿថា ការបកស្រាយរបស់ហោរារូបនេះចំពោះចំណូលចិត្តរបស់គោឧសភរាជ គឺត្រូវណាស់។ អ្នកស្រីលើកឡើងទៀតថា **"ខ្ញុំជឿលើការទស្សន៍ទាយនេះ ព្រោះវាជាប្រពៃណីរបស់ខ្មែរ។ នៅពេលគេទស្សន៍ទាយដោយផ្អែកលើអ្វីដែលគោស៊ី យើងអាចមើលឃើញថា អ្វីដែលពួកគាត់និយាយគឺដូចអ្វីដែលកើតឡើងអ៊ីចឹង"**។

លោក សឿង សៀម អាយុ៣៩ឆ្នាំដែលជាកសិករម្នាក់នៅស្រុកសំរោងទង ខេត្តកំពង់ស្ពឺ មិនសូវមានអបិយជំនឿដូចនេះឡើយ។ គាត់និយាយថា **"រឿងដែលសំខាន់គឺថា ដំណាំស្រូវពឹងផ្អែកលើអាកាសធាតុ និងទឹកភ្លៀងគ្រប់គ្រាន់"**។ គាត់បានបញ្ជាក់ថា គាត់មានជំនឿតែប្រហែល៥ភាគរយប៉ុណ្ណោះសម្រាប់ការទស្សន៍ទាយរបស់គោឧសភរាជអំឡុងព្រះរាជពិធីច្រត់ព្រះនង្គ័ល។

លោក ហ៊ាន វ៉ាន់ហ៊ាន អនុប្រធាននាយកដ្ឋាននៅក្រសួងកសិកម្ម ក៏មិនសូវមានអបិយជំនឿដែរ។ នៅពេលទាក់ទងតាមទូរស័ព្ទ លោកបានមានប្រសាសន៍ថា ទោះបីជាគោឧសភរាជចូលចិត្តពោត និងសណ្តែកក្តី ក៏កសិករគួរតែប្រើសុភនិច្ឆ័យ។

លោកបានលើកឡើងបន្ថែមទៀតថា **"ព្រះរាជពិធីច្រត់ព្រះនង្គ័ល គឺជាផ្នែកមួយនៃជំនឿ និងប្រពៃណីរបស់យើង។ ប្រសិនបើយើងជឿទៅលើវាទាំងស្រុង ហើយបោះបង់ការដាំដំណាំផ្សេងៗទៀត នោះវានឹងគ្មានទិន្នផលឡើយ"**៕

សុខុម

Continued from page 14

## For the Royal Oxen, It's Back to Beans and Corn...

**"The royal oxen ate beans and corn," Kong Kan, the Royal Palace's chief Brahmin priest and astrologer, announced to the 1,000-strong crowd via a public address system. "This year, those crops will yield."**

A quick glance over the oxen's preferences over the past five years, however, might make farmers reconsider swapping crops on the back of such predictions. In 2014, the oxen chose corn and beans, later nibbling at the rice. The year before that, they ate corn and grass. And 2012, 2011 and 2010 were all corn and bean years.

But with the rice-planting season underway in some provinces and the rains soon to fall, attention turned Wednesday to the country's main staple, with a number of farmers worried about the future foretold by the oxen.

**"Do not be concerned that the oxen did not eat rice," Mr. Kan said later by phone, encouraging farmers to look at the positives. "The oxen ate almost all the corn and beans, so those crops will have great yields."**

But for Im Sakhoeun, a 59-year-old farmer in Battambang's Ratanak Mondol district, corn and bean yields mean nothing. On her five hectares of land, she grows rice.

"I am worried that this year's rice paddy will be no good because there is not enough water," she said, going on to compare this year's weather patterns to those in 2014.

"Last year, rice paddy grew well because the rain came at the beginning and in the middle of the year. But this year, the rain has not started," she said. "Also, [this year] the oxen did not eat rice."

Ms. Sakhoeun said she believed the astrologer's readings of the oxen's tastes were spot-on. "I believe the predictions because it is Khmer tradition. When they make predictions based on what the oxen eat, we can see that what they say is what happens," she said.

Soeung Siem, 39, a farmer in Kompong Speu province's Samraong Tong district, was more practical.

"The important things that rice crops depend on are weather and enough rain," he said, adding that he had about five percent confidence in the Royal Plowing Ceremony's predictions.

Hean Vanhan, a deputy department director at the Ministry of Agriculture, was also pragmatic. Reached by telephone, Mr. Vanhan said that despite the royal oxen's predilection for corn and beans, farmers should use common sense.

The plowing ceremony, he said, "is part of our faith and tradition.

**"If we believe it entirely and give up sowing our other crops, then there will be no yield,"** he added.

តមកពីទំព័រទី ២៣ ឃុំមាត់អ្នកប្រឆាំង...

ភ្នំពេញមក... តែបើយោងទៅតាមសម្តីប្រមាថជីវិតអ្នកដទៃពេលថ្មីៗនេះ លោក ហ៊ុន សែន នៅជឿនៅឡើយថា ការរក្សាអំណាចនៅមិនទាន់ហួសពេលនៅឡើយទេ នេះគឺជាការនៅជឿថា **«ផែនដីមិនវិលឡើយ គឺមនុស្សទេដែលវិលនោះ»** ។ យើងហ៊ាននិយាយពាក្យនេះ ដោយសារសំអាងទៅលើមូលដ្ឋានគាំទ្ររបស់គាត់ បានបាត់បង់អស់ទៅហើយ ហើយលោកនៅតែសាកល្បងយកមិត្រភ័ក្រ្តដែលនៅសេសសល់ ជាធនធានទៅប្រថុយនឹងល្បែងស៊ីសងអំណាច ជាចុងក្រោយថែមទៀត លោកទឹកថា «**លោកនៅមានអំណាច ជាអ្នកបង្កើតកងយោធពលខេមរយោធិន្ទខ្មែរនៅឡើយ**» តើលោកនឹងប្រើអំណាចនោះបានតទៅទៀតបានទេ នៅពេលគ.ជ.ប.ថ្មី នឹងធ្វើសេចក្តីប្រកាសលើកដំបូង នៅឆ្នាំ២០១៧ នឹងបន្ទាប់មកនៅឆ្នាំ២០១៨នោះ ពេលនោះវាហួសពេលទៅហើយ ពីព្រោះផែនដីនៅតែវិលចោលលោកតែដដែល ។

មែនហើយ ភាពឆ្លាតវៃរបស់លោក ហ៊ុន សែន បានធ្លាក់មកនៅចំណាត់ថ្នាក់អន់បំផុត ពីព្រោះសម រង្ស៊ី នឹង កឹម សុខា មិនបានទុកឱកាសឱ្យសមមិត្ត ហ៊ុន សែន ប្រើជំនាញរបស់គាត់ មកសម្លាប់បាតុករបានទៀតឡើយ រីឯវប្បធម៌សន្ទនា បានក្លាយជាអាវុធដ៏សាកសិទ្ធិឱ្យលោក ហ៊ុន សែន អាចធ្វើអត្តឃាដយ៉ាងល្ងង់ខ្លៅបំផុតបាន ៕

**Continued from page 23**

SILENCE THE OPPONENTS!...

the 7 January commemoration when Sam Rainsy and KemSokha started to hold hands and shoulder to shoulder in Phnom Penh.

Based on his recent threat of death against Mr.KemSokha it could be inferred that Hun Sen still believes that he still can cling on to power. He still thinks that it's not yet too late to remain in power. He might believe that the earth is not moving, but the people are.

It's fair to say that Hun Sen has lost his support. He still blindly believes that his remaining friends would still be the leverage for keeping him in power. He thinks that he still has the power. He creates the Royal Armed Forces.

Will Hun Sen be able to maintain his power when the new National Election Committee announces for the first time in 2017 and the second time in 2018 that his time has now come and that it's too late for him? The earth is moving and leaving him behind.

Hun Sen's smartness has dropped to the lowest level when Sam Rainsy and KemSokha have left no room for him to use his dirty tactics to kill protesters. The culture of dialogue has become the very effective weapon which eventually makes Hun Sen commit suicide cowardly.

### ឆ្នាំ២០១៥:បេក្ខជននិងឈរឈ្មោះ

# បោះឆ្នោតសាលាក្រុងឡូវែល




ខ្មែរផុសស.រ.អា.

មកទល់ថ្ងៃនេះ បេក្ខជនខ្មែរដែលមានបំណងឈរឈ្មោះជាក្រុមប្រឹក្សាអភិបាលក្រុងឡូវែល ដែលនឹងបោះឆ្នោតនៅខែវិច្ឆិកាខាងមុខ មានម្នាក់ គឺលោក **ប៉ាន សូ** ជាគ្រូបង្រៀន... តែនាថ្ងៃទី១៦នេះ មានបេក្ខជនថ្មី២រូបទៀត ដែលប្តេមបង្ហាញបំណងពីបេក្ខភាពក្នុងតំណែងដ៏ខ្ពង់ខ្ពស់សម្រាប់គ្រប់គ្រងក្រុងខ្មែរ គឺលោក **វាស្នា នួន** អតីតសមាជិកក្រុមប្រឹក្សាអភិបាលក្រុងពីអាណត្តមុន ដែលនឹងបង្ហាញបេក្ខភាពខ្លួន នៅថ្ងៃព្រហស្បតិ៍ទី២១ឧសភា នៅការិយាល័យមុនីវ៉ា ពីម៉ោង៧-៩យប់ ។ នៅមានម្នាក់ទៀត គឺ លោក **រដ្ឋា យ៉ែម** ថ្លែងប្រាប់ខ្មែរផុសស.រ.អា.ថ្ងៃសៅរ៍ ទី១៦នេះថា លោកនឹងដាក់បេក្ខភាពឈរឈ្មោះ ម្នាក់ទៀតដែរ ន័យធំបំផុតរបស់លោកគឺ ដោយសារខ្មែរគ្មានដំណាងនៅសាលាក្រុងដែលសម្បូរខ្មែររស់នៅ លោកនឹងគាំទ្រលោក រ៉តនី អេលិយ៉ុត ឱ្យជាប់ជាអភិបាលក្រុងតទៅទៀត ៕

KhmerPost USA, LLC
សារពត៌មានខ្មែរផុសសហរដ្ឋអាមេរិក
អាស័យដ្ឋាន 45 Merrimack St. Suite 218A. Lowell, MA 01852
លេខទូរស័ព្ទ Phone: 978 677-7163 | Fax: (978) 677-7092
អ៊ីម៉ែល info@khmerpost.us
អានកាសែតនៅគេហទំព័រ www.khmerpost.us
តាមដានយើងនៅទំព័រហ្វេសប៊ុក Like us at: www.facebook.com/KhmerPostUSA
ផ្សាយពាណិជ្ជកម្ម Advertising
អគ្គនាយកទីផ្សារ និងគ្រប់គ្រង សុបិន្ត ពិន Soben Pin, *Managing Partner*
លេខទូរស័ព្ទ 978 - 656 - 8141 (Mobile) 978 677-7163 (Office)
អ៊ីម៉ែលsobenpin@khmerpost.us
អ្នកនិពន្ធ Editorials
និពន្ធនាយក ពិន សំខុន Roger Samkhon Pin, *Publisher & Editor-in-Chief*
(978) 942 - 1641 | rogerpin@khmerpost.us

អ្នកនិពន្ធកិត្តិយស Contributed Writers:
Kim Phien, Richard Howe,Jr.

ច្នៃលោភ័ណភាពកាសែត Design Artist
Heng Chhunleng
នាយករដ្ឋបាល Office Manager 978-677-7163
Thach Vanna ថាច់ វណ្ណា

KhmerPost USA, LLC is an independent newspaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local community, and national news; and give an insight into Cambodian & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English. It published twice a month in Massachusetts serving Greater Lowell, Lynn, Revere, MA, Providence, RI, CT, NY, NJ, and Philadelphia, PA.

Mail subscription is available within the U.S. & Canada at 100.00 or 120 Euros in Europe per year.

The KhmerPost USA has full authorization from Bernard Krisher, the publisher of the Cambodia Daily to reproduce all the articles that are produced by the Cambodia Daily free of charge effective date: 6/19/2009

# ទូលព្រះបង្គំមិនហ៊ានវាយការណ៍ទេ ទាន ! (បន្តពីភាគ១)

ដោយៈ បញ្ញ សីឡា

ទ្រាំមិនបាននឹងរឿងហេតុអីចំឡែកកំពុងកើតឡើងនៅឋានព្រះឥន្ទរហូតដល់ធ្វើឱ្យព្រះអង្គវង្វេង ប្រកាច់ចាប់សឹងមិនឈ្នះយ៉ាងនេះក៏បន្តសួរបន្ថែម លោកតាក៏តបដោយរលូនៈ "ព្រោះពួកនាយសារថីវាបន្តកន្ទុយគ្នាដឹកជញ្ជូនពួកក្រុមគណៈប្រតិភូ ទេពរាជទូតតំណាង ជាភ្នែក ត្រចៀករបស់ព្រះឥន្ទនៅលើផ្ទៃផែនដីនៃរាជាណាចក្រកម្ពុជាដូចអារក្ខឱ្យថែរក្សាទឹកអារក្ខរក្សាដី អារក្ខព្រៃព្រឹក្សា អារក្ខរក្សាកោះរក្សា សមុទ្ររក្សាអាកាសជាដើម ពួកគេទាំងនេះខ្លាចត្រូវព្រះឥន្ទលោកកោះហៅឱ្យ ឡើងជួបព្រះអង្គធ្វើសាវណាការទើបខំរកជួលសារថីតាមផ្លូវម៉ាក្សេណូរឱ្យបានទៅគិតគូរមុនឱ្យ ហើយកុំឱ្យមានរឿងអាស្រូវកេរ្តិ៍..."។ ពិតជាមានរឿងប្លែកៗមែនទែននៅឋានព្រះឥន្ទឥឡូវនេះ ខ្ញុំហាក់ដូចចង់ទៅតាមលោកតាសារថីបានអើតមើលព្រះឥន្ទនឹងស្នំព្រមទាំងព្រះទេពីនឹងក្រុមទេពនិករទាំងឡាយម្តងមើលយល់ចិត្តខ្ញុំក៏លោកតាញញឹមៈ"អានចុតហ្មាយទៅ! អានទៅអាលោក ចៅនឹងបានយល់សេចក្តីមិនខាន"។ ខ្ញុំក៏ខំសម្លឹងចុតហ្មាយដោយផ្ទៀងផ្ទាត់ក៏បានដឹង ថា នៅឯព្រះរាជាណាចក្រកម្ពុជា



មានវិបត្តិខាងនាយសារថីទាំងឡាយដណ្តើមគ្នារកស៊ីក្រៅមិនអាចរកនាយសារថីមកដឹកខ្ញុំដើម្បីទៅគាល់សក្កទេវរាជ បានទេទើបនាយសារថីនៃលោកខាងលេចគឺតាណូអែលត្រូវបានពឹងពាក់ដោយការស្ម័គ្រចិត្តគ្នា កម្រែឱ្យអញ្ជើញអ្នកកាសែតមាននាមថា បញ្ញសីលាមកគាល់សក្កទេវរាជជាបន្ទាន់ដោយគ្មានប្រកែក។ ទទួលបានចុតហ្មាយនេះត្រូវរួសរាន់មកកាន់មហាទេពសាលាដោយកុំបង្អង់ឱ្យសោះ។

ខ្ញុំហាក់អល់អែកស្ទើរទៅស្ទើរទេ លោក-តាយល់ចិត្តក៏បន្ទរៈ "រៀបចំទៅអាលោកចៅមិនងាយបានទៅទទេៗយ៉ាង ។

នេះទេណា! ពីតជាសំណាងធំ អាលោកចៅនឹងបានឃើញនឹងដឹងរឿងចំឡែកៗដែលអ្នកដទៃគ្មានសំណាងបានដឹង ហើយយកមកចុះកាសែតពីតជា-នឹមបឿនៃ-ណាំអាលោកចៅ!"។ មិនបង្អង់យូរខ្ញុំក៏តាមក្រោយលោកតាយូរ

សំពៀតមួយដែលពេលណាក៏នៅក្បែរខ្លួនខ្ញុំហើយពេញទៅដោយឧបករណ៍ចាំបាច់សម្រាប់កត់ត្រាចងចាំតែពុំមែនឧបករណ៍សម្រាប់ចាប់ចងឡើយ!។

មិនបានប៉ុន្មាននិនាទីផងវិមានសក្កទេវរាជបានបញ្ចេញទិដ្ឋភាពយ៉ាងត្រកាលស្កឹមស្កៃបន្លេចចេញពីក្នុងទ្រូងព្រៃដែលមានជួរភ្នំខៀវស្រងាត់ពាត់ជុំវិញហើយមានបក្សាបក្សីគ្រប់ប្រភេទហោះហើរយ៉ាងខ្សេមខ្សាន្តលោកតាណូអែលក៏បន្លឺសម្លេងអ៊ោរៗរាជរថក៏បានមកចតឈប់នៅក្លោងទ្វារវិមានហើយទ្វារទាំងពីរបិទជិតហាក់បីដូចនៅឋានព្រះឥន្ទក៏

មិនសូវមានសុវត្ថិភាពដែរ ប្រហែលមានពួកភេរវករធ្វើភេរវកម្មដែរទេដឹង?!។ ពីរនាក់តាចៅឈររង់ចាំឆ្នាំមួយសន្ទុះក៏

ឃើញទ្វារតូចក្បែរទ្វារធំនៃកំពែងហើបបន្តិចឆ្មាំទេពក៏សួរបែបឆ្មើងឆ្មៃៈ "មានការអី?មកដៃទទេអញ្ចឹងឬ?" លោកតាណូអែលជ្រាបរឿងក៏មកឈរពាំងមុខខ្ញុំដើម្បីឆ្លើយជំនួសៈ"រឿងវាអញ្ចេះទេ នៅលើភពផែនដីនៃផ្ទៃស្រុកខ្មែរទាំងមូលមានវិបត្តិផ្នែកដឹកជញ្ជូន នាយសារថីទាំងឡាយរវល់តែរកស៊ីក្រៅឬម៉ាក់ស៊េណូរ សក្កទេវរាជរកសារថីលោកខាងកើតមិនបានសោះទើបពឹងលោកខាងលេចឱ្យខ្ញុំសារថីឈ្មោះលោកតាណូអែលប្រើសិនដើម្បីបញ្ជូនអ្នកសារព័តិមានឈ្មោះបញ្ញសីលានេះមកជួបព្រះអង្គ..."។ គ្រាន់តែឮពាក្យថាអ្នកសាពត៏មានភ្លាមឆ្មាំទេពភ្ញាក់ដូចគេកន្ត្រាក់ៈ

យ៉!អ្នកណាឱ្យវាមក?"។ លោកតាណូអែលបែរមកខ្សិបតិចៗៈ "ហុចចុតហ្មាយរបស់ព្រះអង្គឱ្យវាអានទៅអាចៅវាអានទៅអាចៅ! កុំឱ្យវាពូកែក្អេងក្អាងពេក"។ ខ្ញុំហុចចុតហ្មាយរបស់ព្រះឥន្ទឱ្យនាយឆ្មាំទេពដោយពុំបញ្ចេញវាចារមួយម៉ាត់ណាទេ ព្រោះខ្លាចសម្លេងញ័រៗរបស់ខ្ញុំធ្វើឱ្យនាយឆ្មាំទេពដឹងថាខ្ញុំកំពុងភិតភ័យ។ នាយឆ្មាំទេពយកចុតហ្មាយអានដោយផ្ទៀងផ្ទាត់បំផុតរួចហើយនិយាយតិចៗម្នាក់ឯងៈ "ការនេះចំឡែកមែនគ្មានក្នុងកម្មវិធីថ្ងៃនេះទេ យកទៅជូនលោកទេពអគ្គលេខាបានជ្រាបសិន..."។ និយាយចប់ភ្លាមនាយឆ្មាំទេពក៏កាន់ចុតហ្មាយបែរក្រោយដើរតម្រង់ទៅរកទេពវិមានយ៉ាងប្រញាប់ប្រញាល់។ បន្តិចក្រោយមកនាយឆ្មាំបណ្តើរទេពអគ្គលេខាចេញពីទេពវិមានដើរតម្រង់មករកលោកតាណូអែលនឹងខ្ញុំ។ ពេលមកជិតដល់គាត់ក៏ស្គាល់លោកតាណូអែលហើយបញ្ចេញវាចារយ៉ាងរាក់ទាក់ៈ "អូ! នាយសារថីនៃលោកខាងលេចដ៏ឆ្នើម។មានរឿងហេតុអីបានជាលោកនាយសារថីអញ្ជើញមកខុសរដូវ

តទៅទំព័រទី ៣១

# គ្រូទស្សន៍ទាយសម័យទំនើប



មានមនុស្សប្រជានិករច្រើនណាស់ តែងតែមានសេចក្ដីជំនឿ និងមនោសញ្ចេតនា រម្មណ៍ចំពោះខ្លួនឯង ដែលបានកើតមកជាមនុស្ស ហើយរស់នៅលើផែនដី ដោយមានគំនិតគិតឈ្វេងយល់ ដោយខ្លួនឯង ហើយដាក់សំណួរខ្លួនឯងថា តើរូបអាត្មាអញ នឹងមានសំណាងល្អប៉ុណ្ណា ឬមានសំណាង វាសនាអាក្រក់ ប៉ុណ្ណា នៅក្នុងមួយជាតិនេះ?

លុះគិតដូច្នេះហើយ ទើបទៅរកគ្រូទស្សន៍ទាយ ឱ្យជួយប្រមើលមើលទៅតាមពេលវេលាថ្ងៃខែឆ្នាំ និងពង្សអន្សាកំណើតរបស់ខ្លួន ដែលបានកើតមកនោះ ។ តើវាមានជតារាសីកំរិតខ្ពស់ ដល់ថ្នាក់ណា ឬកំរិតទាបដល់ថ្នាក់ណា ? បើសិន នៅមានកំរិតខ្ពស់មែននោះ រូបអញប្រាកដជាមានអំណាចបុណ្យសក្តិខ្ពស់បំផុតលើសអស់មនុស្ស ផងទាំងពួង ។

វាជាការពិត ការទស្សន៍ទាយដោយគ្រូ ទស្សន៍ទាយនេះ វាគ្រាន់តែជាការស្វែងរកលាភសក្ការៈ ជាកំរៃលុយកាកមាសប្រាក់សម្រាប់ខ្លួនតែប៉ុណ្ណោះ ។ ដូច្នេះការទស្សន៍ទាយនោះត្រូវតែធ្វើដោយតម្រូវទៅតាមចិត្តចង់បានរបស់មនុស្ស ដែលចូលមកឱ្យខ្លួនទស្សន៍ទាយដែរ ។

ដោយមើលឃើញជំនោរអំអួតដ៏ខ្លាំងក្លានៃបុគ្គលនេះហើយ ទើបបណ្ដាលឱ្យគ្រូទស្សន៍ទាយ សម័យទំនើបនេះ ទាញក្ដាឈ្នួនមកវាយអត្ថៈមើល តើបុគ្គលខ្លាំងនេះ និងទៅជាយ៉ាងណា នៅពេលបច្ចុប្បន្ន និងទៅអនាគតកាលនោះ?

**១ ទង្វើនិងការប្រព្រឹត្ត** បុគ្គលណាមួយដែល បានក្លាយទៅជាប្រមុខដឹកនាំកំពូល ដូចជាប្រធានាធិបតី នាយករដ្ឋមន្ត្រី ជាដើម ក្នុងឋានៈជា អ្នកដឹកនាំកំពូល ក៏ត្រូវតែមានច្បាប់ក្រិត្យក្រម និងកាតព្វកិច្ចសំខាន់ៗ ដែលត្រូវតែបំពេញឱ្យបានច្បាស់លាស់ ខ្ជាប់ខ្ជួនទៀតទាត់ ក្នុងសច្ចធម៌ យុត្តិធម៌ ពិតប្រាកដនោះដែរ ទើបសម្គត់ថា ជាមេដឹក នាំមានលក្ខណសម្បទាគ្រប់គ្រាន់ពេញ ទៅឧត្តមទេស បុគ្គលទៅបានពិតប្រាកដ ជាទីគោរពកោត ខ្លាច និងពេញចិត្តស្រឡាញ់ពីសំណាក់បណ្ដា ប្រជាពលរដ្ឋគ្រប់មជ្ឈដ្ឋាននោះផងដែរ ។

ផ្ទុយទៅវិញ បើប្រមុខដឹកនាំកំពូលត្រឡប់ ទៅជាប្រព្រឹត្តអំពើ និងនិយាយស្តី សុទ្ធតែប្រាសចាកពីបុគ្គលលក្ខណសម្បទា ដែលប្រកបដោយ គុណធម៌ សីលធម៌ សច្ចធម៌ យុត្តិធម៌ អស់រលីងទៅហើយនោះ ការទទួលបានលទ្ធផលផ្លែផ្កា ក៏ ត្រូវតែបានជួយដូចគ្នានេះដែរ ។ មានន័យថា បណ្ដាប្រជាពលរដ្ឋគ្រប់មជ្ឈដ្ឋានត្រញូវតែងើបក្រោកឈរឡើងប្រឆាំងទាមទារតវ៉ាឱ្យបញ្ឈប់ជាដាច់ខាតនូវអំពើប្រព្រឹត្តិដ៏មហាអាក្រក់ទាំងនោះ ចោលចេញទៅរហូតដល់ទាមទារឱ្យបុគ្គលខ្លាំងនេះ ចុះចេញពីតំណែងទៅ ហើយជ្រើសរើសយក មេដឹកនាំថ្មីមកជំនួសវិញ ដែលជាការផ្លាស់ប្តូរ មួយប្រកបដោយសន្តិវិធី និងសមស្របទៅតាមច្បាប់ ដែលមានចែងនៅក្នុងប្រទេស ដែលប្រកាន់យកគោលការណ៍លទ្ធិប្រជាធិបតេយ្យ សេរីពហុ បក្ស ពិតប្រាកដនោះផង ។

**២ ពាក្យសំដីនិយាយ** ក្នុងឋានៈជាមេដឹកនាំ ការប្រពាក្យសំដី គឺជាចំណុចសំខាន់បំផុត ពីព្រោះសំដីនិយាយរបស់មេដឹកនាំ គឺពិតជាមានអត្ថន័យ និងខ្លឹមសារ មានតម្លៃខ្ពង់ខ្ពស់ណាស់ ហើយបណ្ដាប្រជានិករទូរទាំងប្រទេសត្រូវតែស្ដាប់ និងផ្ទៀងផ្ទាត់ត្រងត្រាប់ ប្រព្រឹត្តតាម ដោយក្តី ស្មោះស្ម័គ្របំផុតផង ។

ប៉ុន្តែផ្ទុយទៅវិញ បើបុគ្គលខ្លាំងត្រឡប់ទៅជាប្រើពាក្យសំដីនិយាយចេញមកសុទ្ធសឹងពោរពេញទៅដោយភាពអសុរស ដើរប្រមាថមើលងាយ បន្តុះបង្អាប់មួលបង្កាច់ កំហែង គម្រាមបាញ់ បោះចាប់ដាក់គុកច្រវ៉ាក់ ខ្មោះខ្មៀង ជាដើម ។ល។ ពាក្យសំដីដ៏សែនអាក្រក់នេះហើយ ដែលជាសញ្ញាបង្ហាញប្រាប់ថា បុគ្គលខ្លាំងនេះ គឺពិតជាពុំបានគោរពដោយហ្មត់ចត់នូវច្បាប់រដ្ឋធម្មនុញ្ញ និងនិតិរដ្ឋទាំងអស់ ដែលបានតាក់តែងឡើង ដើម្បីធានារាប់រងដល់សេចក្ដីសុខសាន្ត សេចក្តីយុត្តិធម៌ តម្លៃនៃសិទ្ធិសេរីភាពគ្រប់បែប យ៉ាងនៃមនុស្សគ្រប់ៗគ្នា ដែលកំពុងតែរស់នៅក្រោមការដឹកនាំគ្រប់គ្រង របស់បុគ្គលខ្លាំងនោះ ឡើយ ។ សូម្បីតែរូបបុគ្គលខ្លួនឯងនេះផ្ទាល់ ក៏ត្រូវតែបានទទួលលទ្ធផលផ្លែផ្កា ដែលបានកើតចេញមកពីច្បាប់ទាំងនោះផងដែរ ។

ដោយយោងទៅតាមកត្តាកំណត់សំខាន់ទាំង ពីរខាងលើនេះ ទើបគ្រូទស្សន៍ទាយសម័យទំនើប គេអាចសន្និដ្ឋានបានយ៉ាងពិតប្រាកដថា បុគ្គលខ្លាំងកំពូល ដូចជាតួរអង្គលោក ហ៊ុន សែន ជា នាយករដ្ឋមន្ត្រីនៃប្រទេសកម្ពុជាសព្វថ្ងៃនេះ ដែលមានបណ្ដាប្រជាពលរដ្ឋខ្មែរទាំងអន្តរជាតិ គេបានយល់ដឹង និងមើលឃើញច្បាស់ក្រឡែត នូវគ្រប់អំពើប្រព្រឹត្តិ និងពាក្យសំដីនិយាយគេត្រូវ អាចទស្សន៍ទាយបានយ៉ាងសក្ដិសិទ្ធិបំផុតថា នៅពេលបច្ចុប្បន្ន និងទៅអនាគតកាល លោក ហ៊ុន សែន នេះ ពុំអាចទទួលបាននូវសេចក្ដីសុខ សាន្ត ស្ងប់សុខទាំងផ្លូវកាយ ទាំងផ្លូវចិត្តនោះសោះឡើយ ។ មានន័យថា គ្រប់កាលៈទេសៈ គ្រប់ពេលវេលា គាត់ទទួលបានតែអាការៈក្រេវក្រោធធ្វើយ៉ាងណាឱ្យអ្នកដែលប្រឆាំងនឹងអំណាចខ្លួននោះ បានទទួលនូវក្តីវេទនា ឈឺចាប់ វិនាស ចេញបាត់ពីមុខពីមាត់ខ្លួនទៅទើបបុគ្គលខ្លាំងនេះបានស្កប់ចិត្ត ស្ងប់អារម្មណ៍ មានសភាពដ៏សែនមហាអាក្រក់ ជាយ៉ាងណានោះក៏ដោយចុះ ។

ដូច្នេះលទ្ធផលផ្លែផ្កា ដែលកើតចេញមក នោះ វាពិតជាមានទម្ងន់គ្រប់គ្រាន់ទៅនឹងអំពើបាបកម្មយ៉ាងខ្លាំងក្លារបស់ខ្លួននោះដែរ ។ ពីព្រោះ គឺជាសច្ចធម៌ បើកាលណាប្រព្រឹត្តអំពើ និងនិយាយពាក្យសម្ដីវាសុទ្ធតែជាមហាអាក្រក់ចេញខ្លាតទៅហើយ វាក៏ត្រូវតែទទួលទោសពេញខ្នាតនោះវិញដែរ ។

មានឧទាហរណ៍ជាក់ស្តែងជា ភស្តុតាងរួចមកហើយ ចំពោះមេដឹកនាំកំពូលខ្មែរពីមុនមកតួយ៉ាងពពួកក្រុមមេខ្មែរក្រហម កម្ពុជាប្រជាធិតេយ្យ ដែលមានបុគ្គលខ្លាំងប៉ុន្មានក្បាលដូចជា ខៀវ សំផន, ប៉ុល ពត, អៀង សារី, នួន ជា ជាដើម ។ល។ ដែលនៅចុងបញ្ចាប់ទៅជីវិតអ្នកទាំងនោះ ត្រូវតែបានទទួលនូវសេចក្តី រងទុក្ខវេទនា នៅក្នុងទីឃុំឃាំង រហូតមកដល់ថ្ងៃស្លាប់ទៅ ដូចៗគ្នា ។

អំពើប្រព្រឹត្ត និងពាក្យសម្ដី របស់អរិយបុគ្គល ដែលប្រកបដោយអរិយធម៌ ប្រកដជា បានទទួលនូវលទ្ធផលផ្លែផ្កាពិតជាអរិយទ្រព្យ និងអរិយសច្ចៈ ដែលហៅថា ចតុរារិយាសច្ចធម៌ នោះដែរ ។

ការលើកឡើង អំពីប្រធានបទថា គ្រូទស្សន៍ ទាយសម័យទំនើបនេះ គឺគ្រាន់តែបញ្ជាក់បង្ហាញ ពីអំពើប្រព្រឹត្តិ និងពាក្យសំដីនិយាយចេញមកនៃ បុគ្គលដែលមានឋានៈជាមេដឹកនាំកំពូលដែលបានចាត់ទុកខ្លួនឯង ជាបុគ្គលខ្លាំងកំពូលខាងប្រើអំណាចបុណ្យសក្តិ និងទ្រព្យសម្បត្តិមហាសាល ហើយខិតខំប្រព្រឹត្តិអំពើអាក្រក់គ្រប់បែបយ៉ាង តាមតែអំពើចិត្ត ។ លុះដល់ចុងបញ្ចប់ទៅលទ្ធផលផ្លែផ្កា ក៏ត្រូវតែទទួលបានទៅតាមអំពើ ប្រព្រឹត្តិ និងពាក្យសំដីនិយាយនោះដែរ ជាពិតប្រាកដណាស់ ៕

# (from 12) ទិវាទេសចរណ៍នៅ Beacon Hill

ដោយ ឃត អូម៉ាលី
ប្រែសម្រួលដោយ មួង ណារ៉េត

លោក លូក អុលសិន អ្នកតំណាងសេវាទទួលភ្ញៀវរបស់ក្រុមហ៊ុន ស្តូនហិចជី និង ស្ប៉ា បានទទួលរង្វាន់កិត្តិយសកាលពីថ្ងៃទី ១៣ ខែឧសភា ឆ្នាំ២០១៥ ក្នុងទិវាទេសចរណ៍នៅ Beacon Hill ។ ទិវាទេសចរណ៍ ជាពិធីប្រមូលផ្តុំក្រុមហ៊ុនទេសចរណ៍មកគ្រប់រដ្ឋ ដើម្បីប្រារព្ធសេវាផ្នែកទេសចរណ៍ដែលមានសម្បូរបែប និងចម្រុះនៅក្នុងរដ្ឋនីមួយៗ។ ពិធីនេះជាឱកាសដើម្បីអ្នកដែលបម្រើផ្នែកវិស័យទេសចរណ៍បានមកជួបជុំគ្នា។ ទិវាទេសចរណ៍ ត្រូវបានរៀបចំឡើងដោយគណៈកម្មាធិការចម្រុះផ្នែកទេសចរណ៍ សិល្បៈ និងការអភិវឌ្ឍវប្បធម៌ក្រុមប្រឹក្សាទេសចរណ៍តំបន់នៃរដ្ឋម៉ាស្សាឈូសេតការិយាល័យទេសចរណ៍នៃរដ្ឋម៉ាស្សាឈូសេត និងសមាគមសណ្ឋាគារ និងសមាគមភោជនីយដ្ឋានរដ្ឋម៉ាស្សាឈូសេត។



លោក លូក អុលសិន បានទទួលរង្វាន់បដិសណ្ឋារកិច្ចនៃរដ្ឋម៉ាស្សាឈូសិត ផ្តល់ជូនដោយការិយាល័យសន្និបាត និងភ្ញៀវទេសចរណ៍នៃមហាតំបន់មែរីម៉ែក វ៉ាលី។ រង្វាន់នេះគឺផ្តល់ជូនលោក លូក អុលសិន ដើម្បីទទួលស្គាលស្នាដៃគាត់ ក្នុងការផ្តល់សេវាល្អអស្ចារ្យ ដល់ភ្ញៀវទេសចរណ៍នៅរដ្ឋម៉ាស្សាឈូសេត។ ដឹប ប៊ីឡែនជើ នាយកប្រតិបត្តិនៃការិយាល័យសន្និបាត និងភ្ញៀវទេសចរណ៍នៃមហាតំបន់មែរីម៉ែក វ៉ាលី មានប្រសាសន៍ថា "លូកបានបំពេញការងារយ៉ាងលេចធ្លោក្នុងវិស័យទេសចរណ៍របស់យើង។ យើងមានមោទនភាពចំពោះកិច្ចខិតខំប្រឹងប្រែងផ្នែកបដិសណ្ឋារកិច្ចនេះ"។

ជេមស៍ ហ្វូស្ទ័រ នាយកផ្នែកប្រតិបត្តិនៃក្រុមហ៊ុន ស្តូនហិចជី និងស្ប៉ាមានប្រសាសន៍យ៉ាងសង្ខេបខ្លីថា "លូកបានយកចិត្តទុកដាក់យ៉ាងខ្លាំងលើកការងារបដិសណ្ឋារកិច្ចនេះ។ គាត់ស្រលាញ់កិច្ចការនេះដោយស្មោះ។ គាត់បានធ្វើឱ្យភ្ញៀវទេសចរណ៍ពេញចិត្តយ៉ាងខ្លាំងចំពោះការទទួលស្វាគមន៍ដ៏ស្មោះស្ម័គ្រនេះ។ គាត់ពិតជាស័ក្តិសមនឹងទទួលបានរង្វាន់នេះ"។

ការិយាល័យសន្និបាត និង ភ្ញៀវទេសចរណ៍នៃមហាតំបន់មែរីម៉ែក វ៉ាលី ជាក្រុមប្រឹក្សាមួយដែលចាត់តាំងដោយរដ្ឋម៉ាស្សាឈូសេត ក្នុងចំណោមការិយាល័យទេសចរណ៍ចំនួន ១៦ ក្នុងតំបន់។ ការិយាល័យនេះ មានបេសកកម្មរួមមួយគឺអភិវឌ្ឍន៍ និងអនុវត្តយុទ្ធសាស្ត្រទីផ្សារដែលមានប្រសិទ្ធិភាព ដើម្បីបង្កើនចំនួនភ្ញៀវទេសចរណ៍ប្រចាំថ្ងៃ ដែលមកលេងតំបន់មីឌុលស៊ិច និងរដ្ឋម៉ាស្សាឈូសេត។ កាលពីឆ្នាំ ២០១៣ ឧស្សាហកម្មទេសចរណ៍ នៅតំបន់មីឌុលស៊ិច រកប្រាក់ចំណូលបានជាង ១។០០៨ ពាន់លាន-ដុល្លា ក្នុងផ្នែកចំណាយក្នុងស្រុក និងអន្តរជាតិផ្នែកទេសចរណ៍។ ក្នុងនោះ វិស័យទេសចរណ៍នេះអាចបង្កើតការងារបាន ៨.៦៨០ ការងារ និង រកប្រាក់ចំណូលបង់ពន្ធជូនរដ្ឋបានជិត៨០លានដុល្លា។ នៅទូទាំងរដ្ឋម៉ាសាឈូសេតវិស័យទេសចរណ៍រកប្រាក់ចំណូលបានជាង ១៨ ពាន់លានដុល្លាពីការចំណាយរបស់ភ្ញៀវទេសចរណ៍ជាតិ និងអន្តរជាតិ។ វិស័យទេសចរណ៍ក្នុងរដ្ឋម៉ាស្សាឈូសេត អាចរកការងារឱ្យមនុស្សបានធ្វើចំនួន ១២៩.០០០ ការងារ និងរកប្រាក់ចំណូលពន្ធរដ្ឋបានជាង ១.២ ពាន់លានដុល្លា។

ក្រុមប្រឹក្សាទេសចរណ៍ប្រចាំតំបន់នីមួយៗជាកម្លាំងជម្រុញកំណើនសេដ្ឋកិច្ច។ ពួកគេសហការគ្នាយ៉ាងស្និទ្ធជាមួយថ្នាក់ដឹកនាំរដ្ឋាភិបាល រដ្ឋាបាលក្រុងតាមមូលដ្ឋាន និងអាជីវកម្មក្នុងមូលដ្ឋាន ដើម្បីលើកស្ទួយវិស័យទេសចរណ៍ក្នុងកម្រិតតំបន់។ ក្រុមប្រឹក្សាទេសចរណ៍ប្រចាំតំបន់នីមួយៗមានជំនាញខាងផ្នែកទីផ្សារក្នុងតំបន់របស់ខ្លួន។ ពួកគេជួយផ្នែកអាជីវកម្មក្នុងការធ្វើផែនការទីផ្សារច្បាស់លាស់ ដោយផ្តោតគោលដៅទេសចរណ៍មកកាន់មហាតំបន់មែរីម៉ែក វ៉ាលី និង រដ្ឋម៉ាស្សាឈូសេត ដោយចាត់ទុកតំបន់ទាំងនេះថាជាទីកន្លែងសម្រាប់សម្រាកលំហែវិស្សមកាល សម្រាប់ពិធីជួបជុំគ្នាជាក្រុមប្រជុំ និង ធ្វើសន្និបាត និង កម្មវិធីកីឡា ទាំងសម្រាប់ភ្ញៀវជាតិ និងអន្តរជាតិ។

ការធ្វើផែនការទីផ្សារបែបផ្តោតទៅលើតំបន់ជាក់លាក់បែបនេះ ជួយបន្ថែមប្រាក់ចំណូលដល់រដ្ឋម៉ាស្សាឈូសេត តាមរយៈការប្រមូលពន្ធពីការជួលទីកន្លែង ពន្ធពីការទិញអីវ៉ាន់ និងពន្ធពីការលក់ចំណីអាហារ។ ការចំណាយរបស់ភ្ញៀវទេសចរណ៍អាចជួយឱ្យអាជីវកម្មតាមមូលដ្ឋានអាចដំណើរការទៅមុខបាន និងបង្កើនការងារសម្រាប់សហគមន៍មូលដ្ឋានរបស់យើង។

ក្រុមប្រឹក្សាទេសចរណ៍ប្រចាំតំបន់ទទួលបានការតែងតាំងពីរដ្ឋ និងកំពុងកំណត់គោលដៅទីផ្សារមកកាន់មហាតំបន់មែរីម៉ែក វ៉ាលី ក្នុងវិស័យសេវារបស់យើង។ យើងមានសមាសភាពចូលរួមទាំងអស់ ២១ក្រុងធំៗ រួមមានាំ Acton | Bedford | Billerica | Boxborough | Burlington | Carlisle | Chelmsford | Concord | Dracut | Dunstable | Lexington | Lincoln | Littleton | Lowell | Maynard | Stow | Tewksbury | Tyngsboro | Westford | Wilmington | Woburn

រូបថតភ្ជាប់ជាមួយ ដឹប ប៊ីឡែនជើ នាយកប្រតិបត្តិនៃការិយាល័យសន្និបាត និងភ្ញៀវទេសចរណ៍នៃមហាតំបន់មែរីម៉ែក វ៉ាលី រីឆាត ខូសេត នាយកប្រតិបត្តិនៃការិយាល័យទេសចរណ៍មហាជន លោក លូក អុលសិន តំណាងសេវាទទួលភ្ញៀវទេសចរណ៍ ក្រុមហ៊ុន ស្តូនហិចជី

អេលីន ដូណូយូ សមាជិកព្រឹទ្ធសភាប្រចាំរដ្ឋ

ខូលីន ហ្គារី តំណាងរាស្ត្រ

ខូរី អាត់ឃិន តំណាងរាស្ត្រ និង សហប្រធាននៃគណៈកម្មាធិការទេសចរណ៍ចម្រុះ សិល្បៈ និង វប្បធម៌

អេរិច ឡេះសិន តំណាងរាស្ត្រ និង សហប្រធាននៃគណៈកម្មាធិការទេសចរណ៍ចម្រុះ សិល្បៈ និង វប្បធម៌

# Tourism Day on Beacon Hill

By KhmerPost USA

Beacon Hill, Mass - May 13th, 2015. Tourism Day brought together the tourism industry across the commonwealth to celebrate the variety and diversity of our state'stourism offerings, and those who work in the industry serving our residents and guests.

Luke Olsen, Guest Services Representative of the Stonehedge Inn and Spa was as part of Tourism Day on Beacon Hill.Olsen was selected to receive the Massachusetts Hospitality Award by the Greater Merrimack Valley Convention & Visitors Bureau in recognition of his commitment to providing extraordinary service to Massachusetts visitors. "Luke's efforts to our industry have not gone unnoticed and we are proud of his service to the hospitality industry" said Deb Belanger, Executive Director of the Greater Merrimack Valley CVB.

James Foster, Director of Operations of the Stonehedge Inn and Spa summed it up best "Luke takes extraordinary attention to detail and has a genuine and sincere passion for hospitality and guest satisfaction. He is very deserving of this award"

Tourism Day was organized by The Joint Committee on Tourism, Arts & Cultural Development, Massachusetts Regional Tourism Councils, Massachusetts Office of Travel & Tourism, Massachusetts Lodging Association and Massachusetts Restaurant Association.

The Greater Merrimack Valley Convention & Visitors Bureau is one of the 16 state-designated Regional Tourism Councils in Massachusetts with the overall mission to develop and implement effective marketing strategies to increase the number of overnight visitors to Middlesex County and to Massachusetts. In calendar year 2013, the tourism industry in Middlesex County generated more than $1.008 billion dollars in domestic and international expenditures, supported more than 8,680, jobs and generated close to $80 million in state and local taxes. Statewide, Massachusetts generates more than $18 billion from domestic and international tourism spending. The tourism industry supports more than 129,000 jobs and returns more than $1.2 billion in state and local taxes.

Each Regional Tourism Council is an economic driver working closely with state government leaders, local municipalities and local businesses to promote tourism on the regional level. Each Regional Tourism Council specializes in marketing their regional assets, driving business through deliberate marketing plans that showcase the Greater Merrimack Valley as well as the Common wealth of Massachusetts as a premier destination for leisure, group, meetings and conventions and sports travel, both domestically and internationally. Results from these direct marketing programs are increased revenue to the State of Massachusetts through rooms' tax, sales tax and meals tax collections. Visitor spending supports Local business and increases jobs in our local communities.

As the designated Regional Tourism Council that markets The Greater Merrimack Valley Region, our services area is composed of a core 21 municipalities including Acton, Bedford, Billerica, Boxborough, Burlington, Carlisle, Chelmsford, Concord, Dracut, Dunstable, Lexington, Lincoln, Littleton, Lowell, Maynard, Stow, Tewksbury, Tyngsboro, Westford, Wilmington, Woburn.



តមកទំព័រទី ៤

# បោះឆ្នោតគណបក្សសង្គ្រោះជាតិនៅឡូវែល...

ប្រកួតរបស់ខ្លួននាថ្ងៃបន្ទាប់ថា **"ខ្ញុំសូមសសើរដល់ស្មារតីលោក វណ្ណៈ ម៉ែន ដែលបាននិយាយថា បើលោក ឆាន ទូច មិនព្រម ខ្ញុំក៏មិនអាចទទួលដំណែងជាប្រធាននេះបានដែរ ពីព្រោះនេះមិនមែនជារឿងខ្ញុំធ្វើប្រធាន ឬវណ្ណៈធ្វើប្រធាននោះទេ"** តែលោកបានសំដែងការអាក់អន់ចិត្តចំពោះប្រធានគណកម្មការបោះឆ្នោតគឺលោក អ៊ុង រិទ្ធី ដែលលោកថា **"មិនមានការអៀនខ្មាស់ នឹងធ្វើអ្វីដែលមិនគួរធ្វើ យើងព្រមព្រៀងគ្នារួចហើយ ថាត្រូវយកតាមបញ្ជីដែលមានរួចហើយ តែបែរជាមិនគោរពសន្យាទៅកៃឈ្មុះមនុស្សឱ្យមកចុះឈ្មោះ បើធ្វើដូចតែគណបក្សប្រជាជនទេ ខ្ញុំមិនអាចទទួលបានទេ"** ។ នៅពេលសួរថា បើលោកគិតថាត្រូវយកគណបក្សជាធំតើលោកទទួលដំណែងអនុប្រធាននោះដែរឬទេ? លោកឆាន ឆ្លើយថា ខ្ញុំមិនទាន់ដឹងទេ ថាខ្ញុំត្រូវធ្វើយ៉ាងណានោះ តែខ្ញុំដឹងថាពេលនេះ ខ្ញុំត្រូវតែមានភាពច្បាស់លាស់ ថាគណបក្សត្រូវធ្វើអ្វី នឹងមិនគួរធ្វើអ្វី? កុំឱ្យចេះតែមានមនុស្សមកកកូរយ៉ាងនេះតទៅទៀត។ លោក អ៊ុង រិទ្ធី ឆ្លើយតបនឹងសំនួរយើង ស្តីពីការធ្វើប្រធានគណកម្មការបោះឆ្នោតផង កៀងគរមនុស្សឱ្យទៅបោះឆ្នោតផង តើមែនទេ? លោកតប ថា **"ឥតបានធ្វើអ្វីខុសទេ អ្នកដែលគេមកបោះឆ្នោតសុទ្ធតែជាសមាជិកមកប្រជុំគ្រប់តែពេលដែលគណបក្សត្រូវការ...យើងឥតបានសន្យាថាប្រើបញ្ជីបៀបណាទេ ពីព្រោះធ្វើមិនទាន់ យើងសុំឱ្យមានការពន្យារពេលក៏មិនព្រម មានតែចុះឈ្មោះពេលបោះឆ្នោតតែម្តងនោះហើយ..."**

នៅពេលជួបលោក ស៊ីនួន ខាំ ប្រធានចប់អាណត្តិ បាននិយាយថា ឥឡូវអង្គរបានក្លាយទៅជាបាយហើយ បេក្ខជនទាំង២នាក់នឹកសង្ឃឹមថា ឈ្នះរៀងៗខ្លួន ហើយជាការធម្មតាទេដែលអ្នកចាញ់តែងតែឡាំប៉ា យ៉ាងនោះឯង... យើងបានសួរទៀតថា តើការបោះឆ្នោតហ្នឹងមានប្រើលក្ខន្តិកៈណាមួយឬក៏គ្មានទេ? បើមាន តើមានបានគោរពវាត្រឹមត្រូវឬទេ? លោក ស៊ីនួន ឆ្លើយថា **"លក្ខន្តិកៈមាន! តែមិនបានអនុវត្តតាមទេ ដោយសារមិនមានពេលវេលាគ្រប់គ្រាន់សម្រាប់រៀបចំ មានទាំងយកបញ្ជីចាស់មកបង្ហាញដោយមានលុបឈ្មោះសមាជិកចាស់ៗខ្លះចោលរួចជាស្រេចទៀតផង...បើនិយាយឱ្យចំទៅ លោកឆាន ទូចមិនមានសិទ្ធឈរឈ្មោះខ្លួនឯងផងទេ ខានមកយូរហើយ ទើបតែមកបដិភាគទាន៣០០ដុល្លា ពេលឈរឈ្មោះនេះទេ"** សំនួរបន្តទៅទៀតថាហេតុអ្វីក៏ត្រូវតែបោះឆ្នោតថ្ងៃទី១០នោះ? លោកស៊ីនួនតបវិញថា **"ពីព្រោះខាងណា គេចង់បានតំណែងជាប្រធាន ឱ្យបានមុនថ្ងៃដែលលោកប្រធាន សម រង្ស៊ី មកដល់ឡូវែលថ្ងៃ២៤នេះ ហើយគេជាអ្នកទទួល"** សួរថា ចុះឥឡូវនរណាជាអ្នកទទួល? ស៊ីនួន ឆ្លើយថា **"គេនៅជាអ្នកទទួលដដែល គឺយើងបានព្រមព្រៀងគ្នាអញ្ជើងចំណែកខ្ញុំ ទៅទទួលក្នុងនាមជាសមាជិកម្នាក់តែប៉ុណ្ណោះ"** នៅសំនួរចុងក្រោយយើងសួរថា តើមានបេក្ខជនណានិយាយពី **"វប្បធម៌សន្ទនាគ្នារបស់មេដឹកនាំ"** ដែរឬទេ? ចម្លើយថា មិនបានឮទេ មានតែគណៈកម្មការទេដែលបានលើកមកនិយាយ។

ថ្វីត្បិតតែចលនាប្រជាពលរដ្ឋនៅក្រៅប្រទេសដែលចង់ឃើញប្រទេសខ្មែរមានការផ្លាស់ប្តូរ កាន់តែសកម្ម កាន់តែមានប្រយោជន៍ តែនៅភ្នំពេញឯណោះ អង្គការកណ្តាលគណបក្សបានត្រឹមតែចាត់ទុកថាជា **"ចលនាគាំទ្រគណបក្សសង្គ្រោះជាតិ"** តែប៉ុណ្ណោះ ពុំមែនជា **"សាខាបក្ស"** ទេ ហេតុនេះហើយបានជាមិនមានការណែនាំ គំរូរចនាសម្ព័ន្ធ ផ្លូវការណ៍ណាមួយ ដែលនឹងបញ្ចប់ទំនាស់រ៉ាំរ៉ៃ ផ្ទៃក្នុងនៅឯបរទេសនោះទេ។ សមាជិកសំខាន់ខ្លះនៃគណបក្សសង្គ្រោះជាតិ បានទស្សន៍ទាយថា លោក សម រង្ស៊ី ដែលនឹងមកដល់ឡូវែល នឹងមិនដោះស្រាយទំនាស់ NA នឹង USA នោះទេ។

ម្យ៉ាងទៀត ចាប់តាំងពីលោក ហ៊ុន សែន - សម រង្ស៊ី អនុវត្តវប្បធម៌សន្ទនា រវាងបក្សប្រឆាំងនឹងបក្សកាន់អំណាចមក គេលែងឃើញមានការចង្អុលបង្ហាញ វិបត្តិក្នុងប្រទេសជាសាធារណៈដូចមុនទៀតហើយ ថ្វីត្បិតតែមានការពន្យល់ថាបានផលផ្លែផ្កាច្រើនជូនប្រជាជាតិហើយក៏ដោយ តែចលនាប្រឆាំងនឹងវប្បធម៌ថ្មីនេះ ចេះតែផុសផុលឡើងកាន់តែខ្លាំង តាមរយៈហ្វេសប៊ុគនឹងយ៉ាងចំហរ ដោយសារវប្បធម៌នេះ បង្ហាញភាពស៊ុំគ្រលំមានអាថ៌កំបាំង នឹងអនុគ្រោះដល់អំពើទុច្ចរិត នឹងអយុត្តិធម៌យ៉ាងច្រើននៅឡើយ ផ្ទុយស្រឡះពីមេរៀន ដែលគណបក្សប្រឆាំងធ្លាប់បង្រៀនពលរដ្ឋខ្មែរពីមុនពេលចូលសភាជាតិ។ ជម្ងឺនេះប្រាកដជាបានរាលដាល ឆ្លងដល់បេក្ខជនប្រធាននៅរដ្ឋម៉ាសាឈូសិត ដែលមិនហ៊ានប្រឈមមុខនឹងចលនាប្រឆាំងនឹង ទស្សនៈសង្គ្រោះជាតិថ្មី ដែលចេះតែក្តៅឡើងៗនេះ ហើយការបោះឆ្នោតដែលសំដៅទៅរកការជានាគ្នា ទំនងជាឆេះជាភ្លើងទៅវិញហើយ ។

គណបក្សសង្គ្រោះជាតិរដ្ឋម៉ាសាឈូសិតជាប់គាំងដោយគ្មានប្រធាន ដូចគ្នានឹងការវិវត្តជាប់គាំងនយោបាយនៅភ្នំពេញដែរ ។ នេះក៏ដោយសារខ្វះខាតកត្តាពាះ គ្មានច្បាប់បោះឆ្នោត គ្មានគណកម្មការអព្យាក្រឹត្យ គ្មានវិន័យគ្រប់គ្រាន់។ គេដោះស្រាយបញ្ហាយ៉ាងណា សូមមើលគំរូនៅភ្នំពេញ ឬក៏ទទួលយកការព្រមព្រៀងជាមិត្រភាពនឹងមានលក្ខខណ្ឌណាមួយ មុនពេលលោក សម រង្ស៊ី មកដល់ ពីព្រោះពេលនោះជាឱកាសសំខាន់មួយ ដែលប្រព័ន្ធផ្សព្វផ្សាយមកជុំគ្នាផ្តោតភ្នែក មកនៅឡូវែលនេះ ដែលការបែកបាក់ផ្ទៃក្នុង មិនអាចលាក់ជិតបានឡើយ ៕



លោក ឆាន ទូច ពិគ្រោះយោបល់ជាមួយអ្នកគាំទ្រលោក

ទិដ្ឋភាពពេលប្រកាសលទ្ធផល



សមាជិកគណបក្សសង្គ្រោះជាតិមកបោះឆ្នោត

តមកទំព័រទី ២៦

## ទូលព្រះបង្គំមិនហ៊ានរាយការណ៍ទេទាន!...

កាលយ៉ាងនេះលោក ។

នាយ វដ្តូវណ្ណូអែលកន្លងផុតយូរហើយតើលោកនាយ?" ។ លោក តាណូអែល នៅតែញញឹមស្រស់ដដែល: "មិនទាន់បានអានចុតហ្មាយព្រះអង្គទេឬលោកទេពអត្តលេខា? ចុតហ្មាយ ព្រះអង្គ

គឺឆ្នាំទេពបានកាន់ទៅជូនលោកអត្តលេខាអំបាញ់មិញ នេះហើយតើ?" ។ លោកទេពអតលេខាទង់ង៉ក់បែរមករកឆ្នាំទេព១ក៏ធ្វើត្រូន១លូកហោប៉ៅយកចុតហ្មាយ ចេញមកជូនចៅហ្វាយខ្លួនភ្លាម ។ លោកទេពអត្តលេខា អានយ៉ាងផ្ចិតផ្ចង់ចប់ហើយក៏បែរមកសម្លឹងអ្នកក្រោមបង្គាប់ខ្លួនដោយភ្នែកថ្លោះ "ម៉េចក៏មិនព្រមឱ្យចុតហ្មាយនេះមកអញពីមុនមក?" ។ នាយឆ្នាំ ទេព ឆ្លើយតប ទាំងភិតភ័យ: "ខ្ញុំព្រះបាទរកហុចមិនទាន់សោះគ្រាន់ តែជម្រាបព្រះតេជគុណថា លោកតាណូអែល នាំអ្នកកាសែតមកគាល់ព្រះសក្កទេវរាជភ្លាមព្រះតេជគុណ ប្រញាប់ប្រញាល់សូកព្រះបាទាចូលសុព័របាទរូចភ្លាម ក៏លោតភ្លែតចេញមកជួបភ្ញៀវពិសេសភ្លាមទៅខ្ញុំ ព្រះបាទរត់តាមក្រោយសឹងមិនទាន់" ។ ទេព អត្តលេខា ញញឹមមិនសូវសម: "បាទលោកនាយសារថីនៃលោកខាងលេចដំឆ្មើម! ឮថាលោកនាយសារថីនាំអ្នកកាសែតមកគាល់ព្រះអង្គខ្ញុំប្រញាប់មកស្វាគមន៍ក៏ពុំ ទាន់បានអានចុតហ្មាយព្រះអង្គ ។ លោកតាណូអែល នៅតែញញឹមដដែល: "មិនអីទេ១ សូមអរគុណណាស់ ដែលបានប្រញាប់ប្រញាល់ ។ ឮព្រះអង្គមានបន្ទូលថា ខាងផែនដីស្រុកខ្មែរកំពុងមានវិបត្តិខាងសេវាដឹកជញ្ជូនម្នាក់១គេខំតែដឹកជញ្ជូនតាមផ្លូវម៉ាកស្បេណ្ណូរអស់លោកមានបេសកកម្មមកគាល់សក្កទេវរាជតាមផ្លូវការត្រូវកកស្ទះគ្មានរាជរថណាមួយព្រមធ្វើការតាមបេសកកម្មរបស់ខ្លួនហេតុនេះហើយកញ្ចាស់ ណូអែលខ្ញុំត្រូវបានឱ្យមកទទួលភារៈកិច្ចនេះណា៎ លោកទេពអត្ត លេខាធិការខ្ញុំមកដឹកជញ្ជូនហ្វ្រី (free) ទេលោក! -គ្មានទារឈ្នួលព័ទ្ធអី ទេណា៎!! សូមជ្រាប" ។ ទេពអត្តលេខាមានទឹកមុខស្ងួត: "អរគុណ! អរគុណ ណាស់ដែលបានជួយសម្រួលយ៉ាងនេះលោកនាយ ។ នៅឯផែនដីស្រុកខ្មែរប៉ុន្មានឆ្នាំនេះពិតជាមមាញឹក មែនទែនមុនចូលឆ្នាំម្តង១ ព្រោះតែមានប្រតិភូយ៉ាងច្រើននៃក្រុមអនុរក្ស ដែលប្រចាំនៅទីនោះ ចង់មករាយការណ៍ឱ្យបានមុនទិវាសាវណាការនៃឆ្នាំថ្មីឆ្នាំមមែ នេះថ្វាយព្រះសុម្មិត្តិទេពទ្រង់ព្រះ-សណ្តាប់...អូរ!... រញ៉ីរញ៉ៃមែនទែនទៅណា៎លោកនាយអើយ!!" ។ ធ្វើហាក់ដូចភ្ញាក់លោកទេពអត្តលេខាចង្អុលមករូបខ្ញុំ ក៏សួរថា: "នេះឬអ្នកកាសែតឈ្មោះបញ្ញាសីលានោះ?" ។ លោកតាណូអែល ឆ្លើយជំនួសខ្ញុំហើយបានសុំឱ្យនាំយើងទាំងពីរទៅគាល់ព្រះសក្កទេវរាជកំពូលចក្រវាឡ ។ ទេពអត្តលេខាហាក់មិនចង់អនុញ្ញាត លោកតាណូអែល ឱ្យចូលគាល់ព្រះសុម្មិត្តិទេពទេ ។ ឆ្វេងយល់ដូច្នោះ ហើយទើបលោកតាណូអែលមានសំដីមាំនឹងច្បាស់១ ថាលោកត្រូវតែបានចូលគាល់សក្កទេវរាជដែរ ដើម្បីព្រះអង្គជ្រាបពីវត្តមានរបស់គាត់ផង នឹងអាចបានរាយការណ៍ថ្វាយ ព្រះអង្គផង ប្រសិនព្រះអង្គតម្រូវឱ្យធ្វើ ។ មើលទៅមិនអាចបំបែករូបខ្ញុំពីលោក តាណូអែលបានទេ លោកទេពអត្តលេខាក៏បង្ខំចិត្តឱ្យឆ្នាំទេព បើកទ្វារកំពែងអនុញ្ញាតឱ្យអ្នកទាំងពីរដើរចូលម្តងមួយ១តាមលំដាប់លំដោយ ៕

**(សូមរង់ចាំអានពីភាគ២តទៅទៀត ដើម្បីបានជ្រាបថា តើអ្នកទាំងពីរបានជួបសក្កទេវរាជ យ៉ាងដូចម្តេច)**



# តំបន់ទេសចរណ៍

# ប្រាសាទឯកភ្នំ



ខេត្តបាត់ដំបង ដែលធ្លាប់ជាមជ្ឈមណ្ឌលវប្បធម៌រុងរឿងមួយ ក្នុងសម័យបុរាណបានបន្សល់ទុកនូវកេរ្តិ៍ដំណែលវប្បធម៌ច្រើនក្នុងនោះមានប្រាសាទឯកភ្នំ គួរជាទីមោទនៈ ។ ប្រាសាទឯកភ្នំ មានឈ្មោះមួយទៀតគឺ ប្រាសាទវត្តឯក។

ប្រាសាទនេះមានចម្ងាយ ប្រមាណជា ១០គ។ម។ ខាងជើងនៃទីរួមខេត្ត នៅក្នុងភូមិគម ឃុំពាមឯក ខេត្តបាត់ដំបង។ បន្ទាប់ពីប្រាសាទបាណន់ ប្រាសាទនេះត្រូវគេលើកតម្កើងថា ជាប្រាសាទភ្នំ ដែលប្រកបដោយបុណ្យបារមីដ៏ឧត្តុង្គឧត្តម។ បច្ចុប្បន្ននេះប្រាសាទឯកភ្នំ កំពុងទាក់ទាញអ្នកទេសចរជាតិ និងអន្តរជាតិ ឱ្យមកទស្សនា ឬមកកំសាន្តលំហែកាយ។ ប្រាសាទឯកភ្នំ មានកសិណទឹកហ៊ុំព័ទ្ធជុំវិញ បែរមុខទៅទិសខាងកើត ហើយស្ថិតនៅលើគ្រឹះមួយដ៏រឹងមាំធ្វើអំពីថ្មភក់ និងថ្មបាយក្រៀម ដោយមានទីធ្លាមួយមានប្រវែងប្រមាណជា ៣០ម៉ែត្រ។ ផ្ទាំងសិលាចារឹកក្នុងប្រាសាទនេះបានឱ្យដឹងថា ប្រាសាទនេះត្រូវបានស្ថាបនាឡើងដោយ ព្រះបាទសុរិយាវរ្ម័នទី១ ដែលសោយរាជ្យសម្បត្តិនៅស.តទី១១នៃគ.ស សំរាប់ឧទ្ទិស ចំពោះលទ្ធិព្រហ្មញ្ញសាសនា។ តួប៉មប្រាសាទឯកភ្នំមានរាង ៤ជ្រុងស្មើ ធ្វើអំពីថ្មភក់ និងថ្មបាយក្រៀម ស្ថិតនៅលើខឿនមួយ មានកំពស់ប្រមាណជា ៤ម៉ែត្រ ។ ទំនងដោយសារលក្ខណៈបែបនេះហើយ បានជាគេឱ្យឈ្មោះថា ប្រាសាទឯកភ្នំ ។

ដូចប្រាសាទមួយចំនួនក្នុង រជ្ជកាលព្រះបាទសុរិយាវរ្ម័នទី១ដែរ ប្រាសាទឯកភ្នំមានថែវព័ទ្ធជុំវិញប្រាង្គប្រាសាទ ពីទិសខាង កើតទៅទិស ខាងលិចប្រវែងប្រមាណជា ២៥ម៉ែត្រ និងពីខាងជើងទៅទិសខាងត្បូង ប្រមាណជា ៤៩ម៉ែត្រ។ ប្រាសាទរបស់យើងបានទទួលរងគ្រោះយ៉ាងដំណំ ដោយសារភ្លើងសង្គ្រាម ហើយទើបតែត្រូវបានអភិរក្សយ៉ាងត្រឹមត្រូវកន្លងមកនេះ តែពុំទទួលមានការជួសជុលនៅឡើយ។ ទោះបីមានភាពទ្រុឌទ្រោមដោយមានគំនរថ្មបែកបាក់ដ៏ច្រើនធ្លាក់នៅលើដីពាសពេញដេរដាស់ជុំវិញប្រាសាទក្តី

ក៏ប៉ុន្តែប្រាសាទឯកភ្នំ នូវរក្សាបានឧត្តមភាព និងអធិរាជភាព និងសោភ័ណភាពរបស់ខ្លួននៅឡើយ អ្វីមួយជាទីចាប់អារម្មណ៍របស់ភ្ញៀវទេសចរ គ្រប់សញ្ជាតិ ។

ចម្លាក់ហោជាងនិងផ្តែរដ៏ល្អវិចិត្រ ដែលពាក់ព័ន្ធទៅនឹងប្រវត្តិព្រះអាទិទេពទាំងឡាយនៃព្រហ្មញ្ញសាសនា ដូចជា រឿងកូរសមុទ្រទឹកដោះជាដើម គឺជាចំណុចពិសេសទាក់ទាញការស្ងើចសរសើរ មិនដាច់មាត់ពីមហាជនមានទឹកចិត្តសទ្ធាជ្រះថ្លា។

ជារៀងរាល់ថ្ងៃមានអ្នក ស្រុកភូមិមកធ្វើការបន់ស្រន់ ដោយនាំមកនូវដង្វាយជាធូបទៀន ផ្កា ឬក៏ថវិកាបន្តិចបន្តួចឱ្យអាចារ្យម្នាក់ នៅប្រាង្គប្រធាននៃបូជនីយដ្ឋាននេះ ដែលគេចាត់ទុកថា ជាកន្លែងពិសិដ្ឋជាងគេបំផុត៕



